




ចំណេះដឹងគ្រប់វិនាទី

# គន្លឹះរៀនសរសេរ

# តែងសេចក្តី

ប្រធានពន្យល់
ប្រធានពិភាក្សា
ប្រធានប្រៀបធៀប

ងាយយល់ ឆាប់ចេះសរសេរតែងសេចក្តី

២០១៤

គង់ សុខហេង

www.yerngshare.blogspot.com

# តែងសេចក្តីបែបអត្ថាធិប្បាយ



## ១. និយមន័យ

- តែង : រៀបចំ រចនា កែច្នៃ កែលម្អ ធ្វើឲ្យមានរបៀប...។

- សេចក្តី : រឿងរ៉ាវ ហេតុការណ៍ ដែលមានជាប់ទាក់ទងគ្នាជាឃ្លា ល្បះ កថាខណ្ឌ អត្ថបទដែលមានន័យ និងបំណងច្បាស់លាស់ អាចស្តាប់បាន។

ដូចនេះតែងសេចក្តីមានន័យថាជាការរៀបចំពាក្យពេចន៍ ការតុបតែងរចនានៃឃ្លាល្បះណាមួយដើម្បីកែលម្អសេចក្តីឲ្យមានទំនាក់ទំនងជាអត្ថបទដ៏សមហេតុផល ត្រឹមត្រូវ មានខ្លឹមសារប្រកបដោយផលប្រយោជន៍ជាទីពេញចិត្ត។

## ២. ប្រភេទតែងសេចក្តីបែបអត្ថាធិប្បាយ

ប្រភេទនៃប្រធានតែងសេចក្តីបែបអត្ថាធិប្បាយមាន ៖

-អត្ថាធិប្បាយបែបពន្យល់

-អត្ថាធិប្បាយបែបពិភាក្សា

-អត្ថាធិប្បាយបែបប្រៀបធៀប

## ៣. សេចក្តីណែនាំក្នុងការសរសេរតែងសេចក្តី

ដើម្បីសរសេរតែងសេចក្តីឱ្យបានល្អ និងមិនមានការភាន់ច្រឡំ ឬចាក

ប្រធាន អ្នកតែងត្រូវ ៖

-ស្វែងរកពាក្យពិបាក ឬពាក្យគន្លឹះសំខាន់ៗរបស់ប្រធាន

-ស្វែងយល់ន័យរបស់ប្រធានឱ្យបានស៊ីជម្រៅ

-ពិចារណាឱ្យបានច្បាស់ថាតើជាប្រធានប្រភេទណា?

(ពន្យល់? ពិភាក្សា? ឬប្រៀបធៀប?)

-ស្វែងយល់ពីដែនកំណត់របស់ប្រធានឱ្យបានច្បាស់លាស់ថា តើគេឱ្យសរ-សេរត្រឹមកម្រិតណា? ឧទាហរណ៍ក្នុងរឿងអ្វី ?...

៤. ដើម្បីពង្រីកខ្លឹមសារនៃតែងសេចក្តីឲ្យបានក្បោះក្បាយនិងមានអំណះ អំណាងគ្រប់គ្រាន់ អ្នកសរសេរត្រូវ ៖

- ស្វែងយល់ពីតថភាពសង្គមឱ្យបានគ្រប់ជ្រុងជ្រោយ

- អានសៀវភៅអំពីចំណេះដឹងទូទៅឱ្យបានច្រើន

- អានស្នាដៃអក្សរសិល្ប៍ឱ្យបានច្រើន

- ចងចាំពីសកម្មភាព និងសម្តីរបស់តួអង្គឱ្យបានច្រើន និងច្បាស់លាស់

- រៀនស្វែងយល់ពីអត្ថន័យនៃរឿងនីមួយៗឱ្យច្បាស់លាស់

- ឧស្សាហ៍អានតែងសេចក្តីរបស់អ្នកនិពន្ធឱ្យបានច្រើន

- កត់ត្រាគំនិតអប់រំនៃអត្ថបទដើម្បីទុកជាជំនួយក្នុងការសរសេរតែង-សេចក្តី ។

## ៥. ការណែនាំអំពីវិធីតែង

### ៥.១. សេចក្តីផ្តើម

- ជាលំនាំដើមដើម្បីនឹងឈានចូលទៅរកបញ្ហា

- ត្រូវសរសេរឱ្យខ្លីល្មម ហើយផ្ចិតផ្ចង់

- យកគំនិតទូទៅដែលមានខ្លឹមសារមកផ្តើម

- ផ្តើមទាក់ទងនឹងប្រធាន

- ចៀសវាងការផ្តើមសេចក្តីចេញក្រៅប្រធាន ឬមិនទាក់ទងនឹងប្រធាន ទោះបីគំនិតនោះល្អខ្ពង់ខ្ពស់យ៉ាងណាក៏ដោយ ។ ហើយមិនត្រូវយកបញ្ហាក្រៅមកចោទទេ ។

- ចៀសវាងការប្រើពាក្យបាលី សំស្ក្រឹត ប្រសិនបើពាក្យនោះពុំមានតម្លៃចាំបាច់ទេ ហើយជាពាក្យដែលគេអាចយកពាក្យខ្មែរមកជំនួសបានដោយងាយ ។

- ចៀសវាងការផ្តើមសេចក្តីដូចប្រលោមលោក (ព្រះទិនករ បរ រាជរថ ព័ទ្ធភ្នំព្រះសុមេរុ... ។)

- ចៀសវាងការស្រាយបញ្ហានៅក្នុងសេចក្តីផ្តើម ។ មតិ គំនិត ឃ្លាប្រយោគដែលត្រូវប្រើនៅក្នុងសេចក្តីអធិប្បាយ កុំយកមកនិយាយនៅក្នុងសេចក្តីផ្តើម ដើម្បីចៀសវាងការជួនឥតប្រយោជន៍ ។

**៥.២. តួសេចក្តី**

- ជាផ្នែកមួយដែលទាមទារឱ្យមានការពន្យល់បកស្រាយ វែកញែកឱ្យបានក្បោះក្បាយ ។

- ក្នុងការបកស្រាយ យើងត្រូវពង្រីកគំនិតយល់ដឹងប្រកបដោយការត្រិះរិះពិចារណា ដើម្បីធ្វើអត្ថាធិប្បាយឱ្យបានទូលំទូលាយ មានរបៀបរៀបរយ ច្បាស់លាស់ មិនសរសេរច្រំដែល ។

- ការបកស្រាយពន្យល់ត្រូវឈរលើទស្សនៈសមហេតុផល ហើយត្រូវមានអំណះអំណាង ឬឧទាហរណ៍មកបញ្ជាក់ (ក្នុងសង្គម ក្នុងអក្សរសិល្ប៍ ក្នុងប្រវត្តិសាស្ត្រ...) ។

- អំណះអំណាង ឬឧទាហរណ៍បញ្ជាក់ត្រូវឱ្យស៊ីទៅនឹងខ្លឹមសារ

ប្រធាន ។ ចៀសវាងការលើកយកដំណើររឿងទាំងស្រុងមកធ្វើជាឧទាហរណ៍ ។

- ចំពោះសេចក្ដីដកស្រង់ដែលត្រូវយកមកប្រើ ត្រូវដាក់នៅក្នុងអញ្ញត្តរសញ្ញា ( "......" ) ដោយពុំកាត់សេចក្ដីដើមរបស់គេទេ តែបើយើងមិនចាំសម្ដីដើមច្បាស់លាស់ទេ យើងអាចសង្ខេបយកខ្លឹមសារមកបានហើយ តែមិនបាច់ដាក់ក្នុងអញ្ញត្តរសញ្ញាទេ ។

- ត្រូវចេះប្រើឃ្លាភ្ជាប់សេចក្ដីពីឃ្លាមួយទៅឃ្លាមួយ ចៀសវាងការប្រើពាក្យច្រំដែល ។ ឃ្លាភ្ជាប់សេចក្ដីមានដូចជា៖ ចំណែក ចំណែកឯ រីឯ មួយវិញទៀត ប៉ុន្ដែ ក៏ប៉ុន្ដែ ម្យ៉ាងវិញទៀត ផ្ទុយទៅវិញ យ៉ាងណាក៏ដោយ ជាងនេះទៅទៀត បន្ថែមលើនេះទៀត ដូចគ្នានេះដែរ មិនតែប៉ុណ្ណោះ អាស្រ័យហេតុនេះ រួមសេចក្ដីទៅ..... ។

- បញ្ចប់តួសេចក្ដី ត្រូវធ្វើសរុបមតិមួយដោយគ្រាន់តែស្រង់គំនិតសំខាន់ៗខាងលើមកដាក់តាមលំដាប់លំដោយ ។

## ៥.១. សេចក្ដីបញ្ចប់

- សេចក្ដីបញ្ចប់ពុំមែនជាសេចក្ដីសង្ខេបនៃតួសេចក្ដីទេ តែជាសេចក្ដីបញ្ចប់ ដែលឆ្លើយតបយ៉ាងដាច់ខាតទៅនឹងចំណោទបញ្ហា ដែលចោទឡើងនៅក្នុងសេចក្ដីផ្ដើម ។

- ត្រូវចៀសវាងការបញ្ចប់សេចក្ដីដោយលើកយកបញ្ហាថ្មីមួយទៀតមកចោទ ពីព្រោះនាំឱ្យខូចឯកភាពនៃកិច្ចការរបស់យើង ។

- យោបល់រួមត្រូវតែជាមតិគំនិតផ្ទាល់ខ្លួន ហើយជាការពោលអារកាត់ដាច់ខាត ច្បាស់លាស់ ពុំមែនជាការនិយាយស្ទាក់ស្ទើរមិនដាច់ស្រេចឡើយ ។



# ប្រធានអត្ថាធិប្បាយពន្យល់



## ១. និយមន័យ

តែងសេចក្តីបែបអត្ថាធិប្បាយពន្យល់ជាប្រធានមួយប្រភេទ ដែលតម្រូវឱ្យអ្នកតែងស្រាយបំភ្លឺ ពន្យល់យ៉ាងល្អិតល្អន់ ក្បោះក្បាយ ច្បាស់លាស់អស់សេចក្តី ។

ប្រធានពន្យល់មិនតម្រូវឱ្យអ្នកតែងរើកញែករកខុសត្រូវឡើយព្រោះវាមានលក្ខណៈត្រឹមត្រូវរួចស្រេចទៅហើយ ។

## ២. គន្លឹះដើម្បីស្គាល់ប្រធាន

គេដឹងនិងស្គាល់ប្រភេទនៃប្រធានតែងសេចក្តីបានតាមរយៈ៖

### ២.១. ពាក្យចោទសួរ

- ហេតុអ្វី........?
- .............យ៉ាងណាខ្លះ ?
-ហេតុដូចម្តេច..........?
- .............យ៉ាងដូចម្តេច ?
-...........មានប៉ុន្មានយ៉ាង?
- .............បែបណា ?

### ២.២. ពាក្យបង្គាប់

- ចូរពន្យល់ ។
- ចូរបង្ហាញ ។
- ចូរស្រាយបំភ្លឺ ។
- ចូរពណ៌នា ។
- ចូរគូសបញ្ជាក់ ។
- ចូរអធិប្បាយ ។
- ចូររៀបរាប់ ។
- ចូរលាតត្រដាង ។

## ៣. វិធីសាស្ត្រតែងប្រធានពន្យល់

## ៣.១. សេចក្តីផ្តើម

**-លំនាំបញ្ហា** : និយាយបញ្ហាទូទៅដែលទាក់ទងនឹងប្រធាន មិនវែងពេក មិនខ្លីពេក ។

**-ចំណូលបញ្ហា** : លើកទស្សនៈរបស់ប្រធានយកមកបង្ហាញ

**-ចំណោទបញ្ហា** : ចោទសួរទៅលើប្រធាន ( បែបពន្យល់ ) ។

-តើ...............មានខ្លឹមសារយ៉ាងណា?

-តើ...............មានខ្លឹមសារដូចម្តេច?

-តើ...............មានអត្ថន័យដូចម្តេច?

-តើ...............បង្កប់នូវតម្លៃអប់រំយ៉ាងណាខ្លះ?

-តើ...............បង្កប់អត្ថន័យដូចម្តេច?

-តើមានអំណះអំណាងយ៉ាងណាខ្លះបានជាគេបានថាដូចនេះ? .................................................. ។ល ។

## ៣.២. តួសេចក្តី

-ឃ្លាភ្ជាប់សេចក្តី

- ដើម្បីបកស្រាយពន្យល់នូវមតិរបស់ប្រធានខាងលើឱ្យបានក្បោះក្បាយ ជាបឋមយើងគប្បីយល់នូវពាក្យ "...." ជាមុនសិន ។
- ដើម្បីជាជំនួយដល់ការដោះស្រាយបញ្ហាខាងលើឱ្យបានអស់សេចក្តី ជាដំបូងយើងគប្បីស្គាល់ពាក្យគន្លឹះមួយចំនួនសិន ។
- មុននឹងអត្ថាធិប្បាយពំនោលខាងលើឱ្យបានស៊ីជម្រៅ យើងគប្បីយល់នូវឃ្លា "...." ជាមុនសិន ។
- ដើម្បីជាប្រទីបក្នុងការពន្យល់ន័យប្រធានឱ្យបានស៊ីជម្រៅ

និងគ្រប់ជ្រុងជ្រោយ ជាបឋមយើងគប្បីយល់នូវពាក្យ "...." និង "...." ជាមុនសិន។

-ពន្យល់ពាក្យពិបាក ឬពាក្យគន្លឹះរបស់ប្រធាន (មិនប្រើថ្នាក់ពាក្យទេ)

-ពន្យល់ន័យរបស់ប្រធាន( ប្រធាននេះចង់និយាយថា.......។ ប្រធាននេះចង់ឱ្យយើងបកស្រាយអំពី..............។)

**- បកស្រាយ**

+ បើកទូលាយគំនិតឱ្យក្បោះក្បាយ បកស្រាយប្រធានឱ្យបានគ្រប់ជ្រុងជ្រោយ និងអស់សេចក្ដី (គំនិតសំខាន់ + សេចក្ដីលម្អិតគាំទ្រ) ។

+ផ្ដល់ឧទាហរណ៏ឱ្យស៊ីនឹងប្រធាន (ក្នុងអក្សរសិល្ប៍ ក្នុងសង្គម ក្នុងប្រវត្តិសាស្ត្រ .......)

**-សរុបសេចក្ដី** : សរុបខ្លឹមសារដែលបានបកស្រាយខាងលើឱ្យសមល្មមដោយ ច្បិចយកតែគំនិតសំខាន់ៗតាមលំដាប់លំដោយ ហើយវាយតម្លៃតាមមតិរបស់អ្នកតែង ។

## ៣.៣. សេចក្ដីបញ្ចប់

**-វាយតម្លៃប្រធាន** : គឺជាចម្លើយនឹងចំណោទបញ្ហា ពោលគឺតម្លៃនៃការអប់រំសីលធម៌ឬវប្បធម៌ ។

**-ទស្សនៈផ្ទាល់ខ្លួន** : បង្ហាញជំហរទស្សនៈរបស់អ្នកតែង ផ្សារភ្ជាប់ក្នុងជីវភាពសង្គមជាក់ស្ដែង ។



# ប្រធានអត្ថាធិប្បាយពិភាក្សា



## ១. និយមន័យ

តែងសេចក្ដីបែបពិភាក្សា គឺជាតែងសេចក្ដីមួយប្រភេទ ដែលតម្រូវឱ្យអ្នកតែងលើកយកមតិរបស់ប្រធានមកពិចារណា រិះគន់រកខុសត្រូវ រកល្អអាក្រក់ សមឬពុំសមមានប្រយោជន៍ឬឥតប្រយោជន៍ជាគុណ ឬជាទោស ។ល។ ដើម្បីយកមតិទាំងអស់មកថ្លឹងថ្លែងមើល តើមតិណាសមរម្យជាង។

ជាទូទៅប្រធានពិភាក្សាគឺមានមតិពុំស្របគ្នា ហើយច្រើនស្ថិតនៅលើទ្រឹស្ដីបដិសំយោគដែលមាន៖

-មតិទី១ ឬ មតិស្រប

-មតិទី២ ឬ មតិផ្ទុយ

-មតិសំយោគ ឬ មតិពិភាក្សា

## ២. គន្លឹះដើម្បីស្គាល់ប្រធាន

### ២.១. ការបញ្ចេញមតិ

- គេពោលថា "..............."

- មតិមួយលើកឡើងថា "..........."

- មានទស្សនៈជាច្រើនយល់ថា ".............."

- មានទស្សនៈខ្លះយល់ថា "......." ឯអ្នកខ្លះទៀតថា "......." ទៅវិញ។ល។

### ២.២. ពាក្យចោទសួរ

- តើអ្នកយល់យ៉ាងណា ?

- តើអ្នកយល់ដូចម្ដេច ?
- តើមតិនេះត្រូវឬខុស ?
- តើមតិណាមួយត្រឹមត្រូវជាង ?
- តើមតិណាមួយសមរម្យជាង ?
- តើអ្នកមានយោបល់ដូចម្ដេចដែរ?
- តើមតិនេះគ្រប់គ្រាន់ហើយឬនៅ?
- តើតើទស្សនៈខាងលើ មួយណាត្រូវមួយណាខុស?
- ........................................................?

### ២.៣. ពាក្យបញ្ជាប់

- ចូរពិភាក្សា
- ចូរវែកញែករកខុស ត្រូវ
- ចូរពិចារណា
- ចូរវិនិច្ឆ័យ
- ចូររិះគន់ ។ល។

## ៣. វិធីសាស្ត្រតែងប្រធានពិភាក្សា

### ៣.១. សេចក្ដីផ្ដើម

- **លំនាំបញ្ហា** : ( ដូចប្រធានពន្យល់ )
- **ចំណូលបញ្ហា** : ( ដូចប្រធានពន្យល់ )
- **ចំណោទបញ្ហា** : ចោទសួរទៅលើប្រធាន ( បែបពិភាក្សា ) ។

* **បើប្រធានមានមតិតែមួយត្រូវចោទថា៖**

- តើ......................ត្រឹមត្រូវឬទេ?

- តើ......................សមស្របឬទេ?

- តើ........................ត្រូវឬខុស?

* **បើប្រធានមានមតិពីរខ្វែងគ្នា ឬផ្ទុយគ្នាក្នុងរឿងតែមួយ យើងគួរដឹងថាមតិទីមួយជាមតិស្រប ឯមតិពីរជាមតិផ្ទុយ។ យើងត្រូវចោទថា៖**

- តើមតិទាំងពីរខាងលើ មួយណាត្រឹមត្រូវជាង ?
- តើមតិទាំងពីរខាងលើ មួយណាខុស មួយណាត្រូវ?

* **បើប្រធានមានមតិពីរក្នុងរឿងពីរផ្សេងគ្នា យើងត្រូវចោទថា៖**

- តើមតិទាំងពីរខាងលើនេះ ត្រឹមត្រូវឬទេ?

## ៣.២. តួសេចក្តី

- ឃ្លាភ្ជាប់សេចក្តី
- ពន្យល់ពាក្យពិបាក ឬពាក្យគន្លឹះ
- ពន្យល់ន័យរបស់ប្រធាន

* **បកស្រាយ**

**+ មតិស្រប** : ពន្យល់បកស្រាយបង្ហាញគំនិតគាំទ្រដល់មតិរបស់ប្រធាន (ឬមតិទី១ ប្រសិនបើប្រធានមានមតិពីរ) ព្រមទាំងលើកភស្តុតាង ឬឧទាហរណ៍បញ្ជាក់ឱ្យបានច្បាស់លាស់ ។

- សរុបមតិស្រប (គឺពិតជាអ៊ីចឹងមែន)
- សំណួរភ្ជាប់មតិស្របទៅមតិផ្ទុយ (*តើ....ពិតជាអ៊ីចឹងមែនឬ? តើ........ ពិតមែនឬយ៉ាងណា?.....*)

+ **មតិផ្ទុយ** : លើកទស្សនៈពន្យល់ឱ្យលំអៀង ឬឱ្យផ្ទុយពីមតិស្រប (ឬគាំទ្រមតិទី២ ប្រសិនបើប្រធានមានមតិពីរ) និងលើកឧទាហរណ៍បញ្ជាក់ ។

- សរុបមតិផ្ទុយ (គឺពិតជាអ៊ីចឹងមែន)

+ **សំយោគមតិ** : គឺជាការផ្សំមតិគ្នា ឬបំពេញគ្នាទៅវិញទៅមករវាងមតិស្របនិងមតិផ្ទុយ ។ (មតិស្របនិងមតិផ្ទុយបំពេញឱ្យគ្នាទៅវិញទៅមក)

+ **មតិពិភាក្សា** : គឺជាការថ្លឹងថ្លែងវិនិច្ឆ័យរវាងមតិស្របនិងមតិផ្ទុយដើម្បីប្រមើលមើលរកមតិដែលត្រឹមត្រូវ ។

⇨ អ្នកតែងត្រូវពិចារណាដោយខ្លួនឯងថា តើប្រធាននោះជាសំយោគមតិ ឬជាមតិពិភាក្សា រួចវាយតម្លៃថា ៖

⇨ **បើជាសំយោគមតិ**

- ប្រធានមានមតិមួយ ត្រូវខ្លះ ខុសខ្លះ

- ប្រធានមានមតិពីរ ត្រូវខ្លះ ខុសខ្លះដូចគ្នា (មតិទី១+មតិទី២ ឬមតិទី១ +មតិទី២+មតិបន្ថែម)

⇨ **បើជាមតិពិភាក្សា**

- មតិមួយត្រូវ មតិមួយខុស

## ៣.៣. សេចក្ដីបញ្ចប់

- វាយតម្លៃប្រធាន : មតិប្រធានត្រឹមត្រូវឬទេ ? ត្រូវឬខុស?

-ទស្សនៈផ្ទាល់ខ្លួន : សំណូមពរ ឬមតិចូលរួមក្នុងការអភិវឌ្ឍ ។

 **ចំណាំ**

*តែងសេចក្ដីបែបពិភាក្សាចែកចេញជាពីរប្រភេទគឺ ៖*

- ប្រធានពិភាក្សាសុទ្ធ : ប្រធានមានមតិតែមួយ ។
- ប្រធានពិភាក្សាប្រៀបធៀប : ប្រធានមានមតិពីរ ។

*ប្រភេទទាំងពីរនេះ គេអាចចែកជាពីរទៀតគឺ ៖*

- ប្រធានពិភាក្សាពេញលេញ
  - ➢ ប្រធានមានមតិតែមួយ ខុសស្រឡះ
  - ➢ ប្រធានមានមតិមួយ ត្រូវខ្លះ ខុសខ្លះ
  - ➢ ប្រធានមានមតិពីរ ត្រូវមួយ ខុសមួយ
- ប្រធានពិភាក្សាមិនពេញលេញ
  - ➢ ប្រធានមានមតិពីរជានិច្ច ហើយមតិនីមួយៗសុទ្ធតែមានហេតុផលត្រឹមត្រូវរៀងៗខ្លួន ។

## ក) ប្រធានពិភាក្សាពេញលេញ

### ក១. ចំណោទបញ្ហា

- តើ.......ខាងលើនេះត្រឹមត្រូវដែរឬទេ? (ប្រធានមានមតិតែមួយ)
- តើ.......ទាំងពីរខាងលើនេះ មួយណាត្រូវមួយណាខុស? (ប្រធានមានមតិពីរ)

### ក២. មតិពិភាក្សា

- មតិប្រធានមានមួយខុសស្រឡះ
- មតិទាំងពីរ មួយត្រូវ មួយខុស

### ក៣. មតិសំយោគ

- មតិប្រធានមានមួយ ត្រូវខ្លះ ខុសខ្លះ

## ខ) ប្រធានពិភាក្សាមិនពេញលេញ

**ខ$_{១}$. ចំណោទបញ្ហា**

- តើ.......ទាំងពីរខាងលើនេះត្រឹមត្រូវគ្រប់ជ្រុងជ្រោយដែរឬទេ?

**ខ$_{២}$. មតិសំយោគ**

- លើកយកមតិទី១មកបញ្ជាក់ថាមានលក្ខណៈត្រឹមត្រូវម្យ៉ាង ព្រោះ....
- លើកយកមតិទី២មកបញ្ជាក់ថាមានលក្ខណៈត្រឹមត្រូវម្យ៉ាងដែរ ព្រោះ....
- ទោះបីជាមតិទាំងពីរមានលក្ខណៈត្រឹមត្រូវរៀងៗខ្លួនក៏ដោយ តែពុំទាន់ត្រឹមត្រូវពេញលេញដោយខ្លួនឯងឡើយ លុះត្រាតែ៖
  - មតិទី១ + មតិទី២
  - មតិទី១ + មតិទី២ + មតិបន្ថែម

# ប្រធានអត្ថាធិប្បាយប្រៀបធៀប



## ១. និយមន័យ

តែងសេចក្តីបែបអត្ថាធិប្បាយប្រៀបធៀប គឺជាប្រភេទតែងសេចក្តីមួយប្រភេទ ដែលតម្រូវឱ្យអ្នកតែងលើកយកកម្មវត្ថុ (ពាក្យសម្តី ឃ្លា ប្រយោគ មតិ យោបល់ តួអង្គ វត្ថុ ស្នាដៃ...) មកធ្វើការប្រៀបធៀប ថ្លឹងថ្លែង ស្វែងរកឱ្យឃើញលក្ខណៈដូចគ្នានិងលក្ខណៈខុសគ្នា និងរកឱ្យឃើញថាតើកម្មវត្ថុណាមួយមានលក្ខណៈប្រសើរជាង ។

## ២. គន្លឹះដើម្បីស្គាល់ប្រធាន

### ២.១. ពាក្យបញ្ជាប់

- ចូរប្រៀបធៀប
- ចូររកលក្ខណៈខុស និងលក្ខណៈដូច
- ចូររកលក្ខណៈរួម និងលក្ខណៈដោយឡែក

### ២.១. ពាក្យចោទសួរ

- តើមតិទាំងពីរដូចគ្នា ឬខុសគ្នា?
- តើមតិទាំងពីរមានលក្ខណៈរួម ឬលក្ខណៈដោយឡែកយ៉ាងដូចម្តេច?
- តើមតិទាំងពីរមានលក្ខណៈដូចគ្នា ឬខុសគ្នាយ៉ាងណា?

## ៣. វិធីសាស្ត្រតែងប្រធានប្រៀបធៀប

## ៣.១. សេចក្តីផ្តើម

- **លំនាំបញ្ហា** : លើកយករឿងរ៉ាវនៅក្នុងកម្មវត្ថុប្រៀបធៀបមកបង្ហាញ ។

- **ចំណូលបញ្ហា** : លើកយកកម្មវត្ថុប្រៀបធៀបមកបង្ហាញ ។

- **ចំណោទបញ្ហា** : (ចោទសួរបែបប្រៀបធៀប)

(តើ.......ទាំងពីរខាងលើនេះមានលក្ខណៈដូចគ្នា និងខុសគ្នាបែបណាខ្លះ? ហើយមួយណាប្រសើរជាង?)

## ៣.២. តួសេចក្តី

- ឃ្លាភ្ជាប់សេចក្តី
- ពន្យល់ពាក្យ (ប្រៀបធៀបតួអង្គមិនបាច់ពន្យល់ពាក្យទេ តែបើប្រៀបធៀបបញ្ហា ពន្យល់ពាក្យជាការចាំបាច់ )
- ពន្យល់ន័យ

* **បកស្រាយ**

+ ពន្យល់បកស្រាយលក្ខណៈដូចគ្នា ឬលក្ខណៈរួម
+ ពន្យល់បកស្រាយលក្ខណៈខុសគ្នា ឬលក្ខណៈដោយឡែក
+ សន្និដ្ឋានរួមរវាងទស្សនៈទាំងពីរ

## ៣.៣. សេចក្តីបញ្ចប់

- វាយតម្លៃប្រធាន (ឬកម្មវត្ថុប្រៀបធៀប)
- មតិចូលរួម

# ប្រធានទី១



**មុខងារអប់រំជាមុខងារពិសេសរបស់អក្សរ-សិល្ប៍ ហើយការអប់រំបណ្តុះបណ្តាលមនោ-សញ្ចេតនាស្នេហាជាតិ គឺជាកាតព្វកិច្ចដំបូង និងចាំបាច់បំផុត។ ចូរធ្វើការបកស្រាយ ព្រម ទាំងលើកឧទាហរណ៍បញ្ជាក់ផង។**

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : អក្សរសិល្ប៍មានតួនាទីសំខាន់ណាស់នៅក្នុងសង្គមជាតិនីមួយៗ។ អក្សរសិល្ប៍មិនគ្រាន់តែធ្វើឱ្យមនុស្សរកម្សាន្តសប្បាយបំបាត់ការអផ្សុកតែប៉ុណ្ណោះទេ វាថែមទាំងមានគុណសម្បត្តិជាច្រើនទៀត។
- <u>ចំណូលបញ្ហា</u> : មានមតិជាច្រើនលើកឡើងថា "មុខងារអប់រំជាមុខងារពិសេសរបស់អក្សរសិល្ប៍ ហើយការអប់រំបណ្តុះបណ្តាមនោសញ្ចេតនាស្នេហាជាតិគឺជាកាតព្វកិច្ចដំបូងនិងចាំបាច់បំផុត"។
- <u>ចំណោទបញ្ហា</u> : តើមតិខាងលើបង្កប់អត្ថន័យអប់រំយ៉ាងដូចម្តេច?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u> : ដើម្បីជាជំនួយដល់ការបកស្រាយបញ្ហានៅក្នុងប្រធានខាងលើឱ្យបានក្បោះក្បាយ ជាបឋមយើងគប្បីយល់ន័យនៃពាក្យគន្លឹះក្នុងប្រធានជាមុនសិន ។
- <u>ពន្យល់ពាក្យ</u>
  - មនោសញ្ចេតនា : សេចក្តីរិះគិតក្នុងចិត្ត ។
  - ស្នេហាជាតិ : ស្រលាញ់ទឹកដី ប្រជាជន ជំនឿសាសនា ប្រពៃណីទំនៀមទំលាប់... ។
  - កាតព្វកិច្ច : ករណីយកិច្ច, កិច្ចដែលត្រូវធ្វើ ។
- <u>ពន្យល់ឃ្លា</u> : ការអប់រំបណ្តុះមនោសញ្ចេតនាស្នេហាជាតិជាកាតព្វកិច្ចដំបូង មានន័យថា កវីនិពន្ធទាំងអស់ជាដំបូងត្រូវតែបញ្ជ្រាបនូវទឹកចិត្តស្នេហាទឹកដី ប្រជាជន និងអ្វីៗទាំអស់ដែលជារបស់ជាតិជាមុនសិន ។
- <u>ពន្យល់ន័យប្រធាន</u> : ប្រធានទាំងមូលចង់និយាយថា អក្សរសិល្ប៍មានបេសកម្មមួយ គឺបណ្តុះទឹកចិត្តស្នេហាជាតិឱ្យដល់ប្រជាជន អ្នកអាន អ្នកស្តាប់គ្រប់រូប ។
- **បកស្រាយ**

បើផ្អែកលើទ្រឹស្តីអក្សរសិល្ប៍ ដើម្បីនិយាយវិញនោះយើងឃើញថា អក្សរសិល្ប៍មានមុខងារបីសំខាន់ ។

- មុខងារទីមួយ **គឺមុខងារផ្តល់ ពុទ្ធិ ឬចំណេះដឹង :** អានអត្ថបទមួយយើងអាចដឹងពីប្រពៃណី ទំនៀម ទម្លាប់ ជំនឿសាសនា ផ្នត់គំនិត បែបបទនៃការរស់នៅរបស់មនុស្ស នៅក្នុងសម័យកាលណាមួយជាកំណត់ ។ ឧទាហរណ៍ នៅក្នុងរឿងទុំទាវ ព្រះសង្ឃអាចដើរលក់តោកបាន តែបច្ចុប្បន្នមិនអាច... ។

- មុខងារទីពីរគឺ **មុខងារសិល្បវិជ្ជាឬមុខងារបណ្តុះសោភ័ណ**។ សោភ័ណមានលក្ខណៈសម័យកាល តែក៏អាចមានលក្ខណៈអមតៈផងដែរ។ ជាធម្មតាកុមារតែងធ្វើត្រាប់តាមតួអង្គណាមួយដែលខ្លួនចូលចិត្ត អាចជាតួអង្គវិជ្ជមាន ឬជាតួអង្គអវិជ្ជមាន។ ដូចនេះការបណ្តុះសោភ័ណ ឬការកសាងលក្ខណៈតួអង្គត្រូវធ្វើឡើងយ៉ាងប្រុងប្រយ័ត្នបំផុត ដើម្បីចៀសវាងឥទ្ធិពលអាក្រក់ និងផលវិបាកទៅថ្ងៃមុខ។
- មុខងារទីបីគឺ **មុខងារអប់រំ** ៖ គ្មានតម្លៃអប់រំ អត្ថបទនោះនឹងបាត់បង់អក្សរសិល្ប៍ភាពរបស់ខ្លួនជាស្វ័យប្រវត្តិ។ គួរកត់សម្គាល់ថា ការអប់រំតាមបែបអក្សរសិល្ប៍មានលក្ខណៈខុសប្លែកពីការអប់រំបែបសីលធម៌។ អក្សរសិល្ប៍មិនអប់រំទូន្មានត្រង់ៗនោះទេ តែគឺតាមរយៈប្រព័ន្ធរូបារម្មណ៍មួយ។ ដើម្បីនិយាយពីសារប្រយោជន៍នៃការតស៊ូព្យាយាម អំណត់អត់ធ្មត់ គេត្រូវបង្កើតរូបារម្មណ៍តួអង្គចៅចិត្រមួយឡើងជាដើម ។ល។ ជាតិគឺជារឿងធំ។ ដូចនេះការបណ្តុះទឹកចិត្តស្នេហាជាតិគឺជាការចាំបាច់បំផុត។ ពេលណាជាតិបាត់បង់ទៅ សិល្បៈ វប្បធម៌ អក្សរសិល្ប៍ក៏បាត់បង់ទៅដែរ។ ជាតិនីមួយៗរមែងមានទឹកដី ភូមិសាស្ត្រ មានប្រជាជន មានប្រពៃណី ទំនៀមទម្លាប់ ជំនឿសាសនា មានផ្នត់គំនិត មានបែបបទរស់នៅផ្សេងពីជាតិដទៃ។ ដូចនេះស្នេហាជាតិ គឺស្នេហាទឹកដី ស្នេហាប្រជាជន ហ៊ានចេញមុខប្រឆាំងនឹងរាល់ខ្មាំងសត្រូវដែលជប៉ុនប៉ង់លេបទឹកដី សម្លាប់ប្រជាជាន បំបាត់សាសនា។ និយាយមកដល់ចំណុចនេះ បុព្វវីរជន

យើងច្រើនណាស់ដែលបានពលីដើម្បីបុព្វហេតុជាតិមាតុភូមិ។ អត្ថបទឯកសារប្រវត្តិសាស្ត្រក៏ដូចជាអត្ថបទអក្សរសិល្ប៍ដែរ សុទ្ធតែបានរួមចំណែកបណ្ដុះទឹកចិត្តស្នេហាជាតិនេះឱ្យដល់យុវជន យុវនារីខ្មែរ ដែលនៅក្នុងនោះរួមមានរឿងរ៉ាវរបស់អាចារ្យស្វា ពោធិកំបោរ ក្រឡាហោមគង់ និងលោកឧកញ៉ាឃ្លាំងមឿង ព្រមទាំងក្រុមគ្រួសារ។ ព្រះរាជា និងបុត្រា បុត្រី សុទ្ធតែជាមេបញ្ជាការប្រតិបត្តិការ ហ៊ានពលីលើរឿណរង្គ ជាអាទិ៍បុត្រាជ័យវរ្ម័នទី៧ជាដើម។ល។ ទាំងអស់នេះសុទ្ធតែជាមហាវីរបុរសស្នេហាទឹកដី ស្នេហាជាតិ ហ៊ានលះបង់ជីវិតដោយឥតស្ដាយស្រណោះឡើយ។ ក្នុងប្រភេទរឿងល្ខោនវិញ គេឃើញតេជោយ៉តដ៏ឈ្លាសវាងវៃជាអ្នកបន្តកេរស្នាដៃពីតេជោមាស អាចកំចាត់ខ្មាំងសត្រូវទាំងមុខនិងខាងក្រោយបានយ៉ាងជោគជ័យ។ ព្រឹត្តិការណ៍ ១៨ មេសា នៅភូមិក្រាំងលាវ នៃរឿងភូមិតិរច្ឆាន ប្រលោមលោកបែបប្រវត្តិសាស្ត្រក៏បានបញ្ជាក់បន្ថែមឱ្យឃើញថា ខ្មែរទាំងស្រីទាំងប្រុសមិនចុះញ៉មនឹងការឈ្លានពានពីសំណាក់បរទេស អាណានិគមនិយមឡើយ។ ការរៀបរាប់ពីទេសភាពធម្មជាតិក្នុងរឿងផ្កាស្រពោនក៏ជាការបណ្ដុះទឹកចិត្តស្នេហាជាតិមួយដែរ។

- <u>សរុបសេចក្ដី</u> : សរុបមក គេអាចបណ្ដុះមនោសញ្ចេតនាស្នេហាជាតិតាមរយៈប្រវត្តិសាស្ត្រផង និងតាមរយៈសិល្បៈអក្សរសិល្ប៍ផង ហើយអ្វីដែលស្ថិតស្ថេរបានយូរអង្វែងជាងគេ គឺអក្សរសិល្ប៍ ពីព្រោះបទចម្រៀង ឬឃ្លាប្រយោគល្អៗរបស់កវីនិពន្ធត្រូវគេចងចាំអស់មួយ

ជីវិត ។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ទស្សនៈប្រធានមានតម្លៃអប់រំ។
- <u>មតិផ្ទាល់ខ្លួន</u> : យុវជន យុវនារីគប្បីអានតែស្នាដៃសិល្បៈអក្សរសិល្ប៍ណាដែលល្អ ផ្ដល់ពុទ្ធិច្បាស់លាស់ បណ្ដុះសោភ័ណត្រឹមត្រូវ មិនមែនជារឿងអាសអាភាសពាលាអាវ៉ាសែនោះឡើយ ។



# ប្រធានទី២



**អ្នកនិពន្ធរឿងទុំទាវមានគំនិតជឿនលឿនខ្លាំងក្នុងការនិពន្ធ បើប្រៀបនឹងសាស្ត្រាល្បែងនានា។ ចូរស្រាយបំភ្លឺ។**

## គម្រោងតែង

## ក. សេចក្ដីផ្ដើម

- <u>លំនាំបញ្ហា</u> : លើកបញ្ហាទូទៅ ទាក់ទងនឹងរឿងទុំទាវ និងសាស្ត្រាល្បែងមកនិយាយ ។
- <u>ចំណូលបញ្ហា</u> : "អ្នកនិពន្ធរឿងទុំទាវមានគំនិតជឿនលឿនខ្លាំងក្នុងការនិពន្ធ បើប្រៀបនឹងសាស្ត្រាល្បែងនានា"។

- <u>ចំណោទបញ្ហា</u> : តើមានអំណះអំណាងដូចម្តេចខ្លះ ទើបគេបានអះអាងដូចនេះ?

## ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u> :
- <u>ពន្យល់ពាក្យ</u>
  - គំនិតជឿនលឿន : គំនិតរីកចម្រើន
  - សាស្ត្រាល្បែង : ជាប្រភេទអក្សរសិល្ប៍ដែលស្ថិតនៅក្រោមឥទ្ធិពលសាសនា និងមនោគមវិជ្ជារវើរវាយ។
- <u>ពន្យល់ន័យប្រធាន</u> : ដូច្នេះប្រធានខាងលើមានន័យថា រឿងសាស្ត្រតែងនិពន្ធរឿងទុំទាវមានលក្ខណៈវិទ្យាសាស្ត្រប្រសើរជាងស្នាដៃអក្សរសិល្ប៍នានាដែលស្ថិតនៅក្រោមឥទ្ធិពលសាសនា...។
- **បកស្រាយ**
  - រៀបរាប់ពីសាស្ត្រាល្បែង ដោយលើកយកឧទាហរណ៍ក្នុងសាស្ត្រាល្បែងណាមួយមកបង្ហាញ។ (ប្រាប់ពីតួអង្គ ទីកន្លែង ពេលវេលា...មិនមានបង្ហាញពីបញ្ហាសង្គមមនុស្សជាក់ស្តែង)។

    ឧ. រឿងស័ង្ខសិល្ប៍ជ័យ

    + តួអង្គ : សត្វដំរី ខ្យង យក្ស... (អច្ឆរិយ)
    + ទីកន្លែង : ភ្នំស្រួច ទិព្វបពិត ចតុបព្វតា...
    + ពេលវេលា : មិនពិតប្រាកដ...។
  - ចំណែករឿងទុំទាវជាប្រភេទអក្សរសិល្ប៍ខេមរនិយម សរសេរជាពាក្យកាព្យបទពាក្យ៧ ក្នុងស.វ. ទី២០ (រឿងទុំទាវរបស់ភិក្ខុសោម)។ អ្នកនិពន្ធមានគំនិតជឿនលឿន៖

- គេចផុតពីឥទ្ធិពលសាសនា មនោគមវិជ្ជារើរវាយ
- លើកយកបញ្ហាពិតៗរបស់មនុស្សក្នុងសង្គមមកចោទ និងដោះស្រាយ ដូចជា៖
  - ❖ បង្ហាញតួអង្គជាមនុស្សខ្មែរ (ទុំ ទាវ អរជូន...) ដែលមិនមែនជាអវតារ ពោធិសត្វ ទេវៈ យក្ស...។
  - ❖ ទីកន្លែង : ស្ថានមនុស្ស ស្រុកខ្មែរ (លង្វែក បាភ្នំ ត្បូងឃ្មុំ...) ពោលគឺគ្មានស្ថានសួគ៌ ស្ថាននរក ស្ថានបាតាល...។
  - ❖ ពេលវេលា : សម័យលង្វែក
  - ❖ ដំណើររឿង : ជារឿងមនុស្ស ពាក់ព័ន្ធនឹងសង្គម តាំងពីមនុស្សថ្នាក់ទាបរហូតដល់ថ្នាក់កំពូល (ស្ដេច) មាន៖
    - ➢ បញ្ហាស្នេហា : តស៊ូប្រឆាំងគ្រប់ឧបសគ្គ ដើម្បីសេរីភាពក្នុងការជ្រើសរើសគូស្រករ ឧទា. ទុំ ទាវទូលការពិតថ្វាយស្ដេចពីស្នេហារបស់ខ្លួន...។
    - ➢ ការគ្រប់គ្រង : ប្រឆាំងអំណាចផ្ដាច់ការ (ក្នុងគ្រួសារ ក្នុងសង្គម)។
    - ➢ តុលាការ : របៀបកាត់ទោសមានភាពអយុត្តិធម៌។
    - ➢ យុវជន : (ទុំ ទាវ) មានទឹកចិត្តក្លាហាន ហ៊ានទទួលការពិតចំពោះស្ដេច ដែលពី

មុនមិនធ្លាប់មាន។

- <u>សរុបមតិ</u> : រឿងទុំទាវនិយាយពីបញ្ហាមនុស្ស ដើម្បីមនុស្ស មានលក្ខណៈជឿនលឿនខុសពីសាស្ត្រាល្បែង តែស្ថិតនៅក្រោមឥទ្ធិពលសាសនា។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ប្រធានមានន័យល្អ។
- <u>មតិផ្ទាល់ខ្លួន</u>



# ប្រធានទី៣



ទស្សនៈមួយថែងថា “សង្គមបង្កើតសីលធម៌ ពុំមែនដើម្បីសីលធម៌ទេ តែដើម្បីសង្គមទៅវិញ”។ ចូរពន្យល់ទស្សនៈនេះដោយលើកឧទាហរណ៍ពីក្នុងអក្សរសិល្ប៍នានាដែលអ្នកបានសិក្សាមកបញ្ជាក់ផង។

## គម្រោងតែង

### ក. សេចក្ដីផ្ដើម

- លំនាំបញ្ហា : និយាយទាក់ទងនឹងប្រធាន
- ចំណូលបញ្ហា : ទស្សនៈមួយថែងថា “សង្គមបង្កើតសីលធម៌ ពុំមែនដើម្បីសីលធម៌ទេ តែដើម្បីសង្គមទៅវិញ”។
- ចំណោទបញ្ហា : តើទស្សនៈនេះមានន័យដូចម្ដេច?

### ខ. តួសេចក្ដី

- ឃ្លាភ្ជាប់សេចក្ដី :
- ពន្យល់ពាក្យ
  - សង្គម : ការប្រមូលផ្ដុំ
  - សីលធម៌ : ក្បួនច្បាប់អប់រំកាយ វាចា ចិត្តឲ្យបានល្អ។

- <u>ពន្យល់ន័យប្រធាន</u> : នៅក្នុងសង្គមរស់នៅរបស់មនុស្ស គេរមែងបង្កើតឲ្យមានក្បួនច្បាប់អប់រំកាយ វាចា ចិត្តរបស់មនុស្សឲ្យបានល្អ ពុំមែនគ្រាន់តែជាការល្អមើល ល្អស្តាប់ប៉ុណ្ណោះទេ គឺសម្រាប់អនុវត្តទាំងអស់គ្នាក្នុងសង្គម។
- **បកស្រាយ**

<u>ក. សង្គមបង្កើតសីលធម៌ពុំមែនដើម្បីសីលធម៌ទេ</u>

- សង្គមដែលមានវប្បធម៌មិនល្អ ដូចជាប្រើអំណាចផ្តាច់ការ ពុករលួយ បក្សពួកនិយម នយោបាយស្តាំហួស ឆ្វេងហួស គេតែងបង្កើតសីលធម៌ដែលមានចរិតមិនល្អ គឺដើម្បីបម្រើបក្សពួករបស់គេប៉ុណ្ណោះ។

ឧទា១. រឿងចៅកែចិត្តចោរ លោកចៅកែដែលផ្អែមដូចទឹកឃ្មុំតែខាងក្រៅសម្លាប់កូនចៅឯង(ចិត្តជាទេវទត្ត មាត់ជាទេវតា)។

ឧទា២. រឿងរាមកេរ្តិ៍ ក្រុងរាពណ៍ជាស្តេចចក្រពត្តិដើរឈ្លានពានលួចប្រពន្ធកូនគេ (ចាប់នាងសីតាពង្រាត់ពីព្រះរាម)។

ឧទា៣. សារជាតិអសីលធម៌របស់ពួកអាណានិគមបរទេសតែងប្រើអំណាចផ្តាច់ការ អសីលធម៌លើដែនដីអាណានិគមរបស់ខ្លួន។ (តាមរយៈរឿងភូមិតិរច្ឆាន, កម្ពុជាក្នុងដំណែងប្ញង្ខាំង)

<u>ខ. សង្គមបង្កើតសីលធម៌ដើម្បីសង្គម</u>

- មនុស្សជាអ្នកបង្កើតសីលធម៌ ហើយមនុស្សជាអ្នកអនុវត្តតាម

ឧទា១. រឿងព្រះវេស្សន្តរ ព្រះបាទស្រីសញ្ជ័យបានយល់ព្រមតាមសំណូមពររបស់ប្រជារាស្ត្រដែលសុំឲ្យព្រះវេស្សន្តរចេញពី

ព្រះនគរ។

ឧទា២. រឿងរាមកេរ្តិ៍ ព្រះបាទជនកបានសន្យាលើកនាងសីតាឲ្យជនណាដែលលើកធ្នូសិល្ប៍រួច ព្រះអង្គបានលើកនាងសីតាឲ្យព្រះរាមតាមពាក្យសន្យាមែន។

ឧទា៣. រឿងទុំទាវ ព្រះបាទរាមាមានទសពិធរាជធម៌ (រៀបការឲ្យទុំនិងទាវបានគ្នាជាប្ដីប្រពន្ធ)។

- <u>សរុបមតិ</u> : សង្គមបង្កើតសីលធម៌ពុំមែនដើម្បីសីលធម៌ទេ គឺដើម្បីឲ្យសង្គមមនុស្សធ្វើតាម។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ប្រធានខាងលើមានអត្ថន័យល្អប្រសើរដែលតម្រូវឲ្យយើងទាំងអស់គ្នាគោរព និងអនុវត្តតាម ទើបសង្គមមានស្ថិរភាព សន្តិភាព និងអភិវឌ្ឍ។
- <u>មតិផ្ទាល់ខ្លួន</u>



# ប្រធានទី៤



**ការបរិច្ចាគទានដោយសទ្ធាមិនមែនមានតែនៅក្នុង បញ្ញាសជាតកទេ សូម្បីតែក្នុងទសជាតកក៏មានលើក ឡើងពីបញ្ហានេះដែរ។ ចូរបង្ហាញពីប្រភេទនានានៃ ទាន ព្រមទាំងធ្វើការបកស្រាយទៅលើសត្តសតក-មហាទានផង។**

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : លើកពីសកម្មភាពបរិច្ចាគទាននៅក្នុងអក្សរសិល្ប៍ពុទ្ធនិយម។
- <u>ចំណូលបញ្ហា</u> : “..............................................”
- <u>ចំណោទបញ្ហា</u> : តើសកម្មភាពនៃការបរិច្ចាគទាននៅក្នុងបញ្ញាសជា-តក និងទសជាតកមានអ្វីខ្លះ?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>
- <u>ពន្យល់ពាក្យ</u>
  - ការបរិច្ចាគទាន : ការលះបង់ទ្រព្យ, ការចំណាយទ្រព្យធ្វើទាន។
  - សទ្ធា : ជំនឿ(ជឿបុណ្យ ជឿបាប ជឿកម្ម ជឿផល...)
  - បញ្ញាសជាតក : ហាសិបជាតិពីមុន, កន្លងទៅ។

- ទសជាតក : ជបជាតិចុងក្រោយរបស់តួអង្គពោធិសត្វ មុនការត្រាស់ដឹងជាព្រះពុទ្ធ។
- សត្តសតកមហាទាន : ទានធំដែលប្រារព្ធធ្វើឡើងក្នុងមួយមុខៗប្រាំពីររយ។

- <u>ពន្យល់ន័យឃ្លា</u> : មិនមែនមានតែនៅក្នុងបញ្ញាសជាតកទេ មានន័យក្រៅពីបញ្ញាសជាតក ទសជាតកក៏មាននិយាយពីការធ្វើទានដែរ។
- <u>ពន្យល់ន័យប្រធាន</u> : ប្រធានចង់និយាយថា ទោះបីក្នុងបញ្ញាសជាតកក្តី ក្នុងទសជាតកក្តី តួអង្គពោធិសត្វសុទ្ធតែបានបំពេញទានបារមីទាំងអស់។

- **បកស្រាយ**
  - ដើម្បីសម្រេចការត្រាស់ដឹងជាព្រះពុទ្ធលោកមិនដែលខកខាននឹងធ្វើនូវមហាបរិច្ចាគទាំងប្រាំប្រការគឺៈ ធនបរិច្ចាគ អង្គបរិច្ចាគ ជីវិតបរិច្ចាគ បុត្តបរិច្ចាគ និងភរិយាបរិច្ចាគ។ បើនិយាយឲ្យខ្លីស្រួលស្តាប់ជាងនេះតទៅទៀតគឺពាហិរទាន និងអជ្ឈត្តិកទាន។
  - ពាហិរទានគឺជាទានក្រៅខ្លួនរួមមានមាស ប្រាក់ទ្រព្យធន សំពត់អាវសារសៃ្ប គោក្របី សេះដំរី ប្រពន្ធ កូនទាសាទាសីជាដើម ។ល។
  - ចំណែកអជ្ឈត្តិកទានគឺទានខាងក្នុង រួមមានអង្គបរិច្ចាគ ជីវិតបរិច្ចាគ គឺសរីរាង្គកាយនិងជីវិតជាដើម។
  - ធនបរិច្ចាគដែលធំជុំជាងគេ គឺសត្តសតកមហាទាន ជាទានកម្រនឹងអាចធ្វើបាន ហើយដែលក្នុងនោះអ្វីៗសុទ្ធតែរាប់ឲ្យគ្រប់ប្រាំពីររយទាំងអស់។

- ក្នុងចំណោមពាហិរទានរបស់ព្រះវេស្សន្តរ យើងឃើញមានទានពីរយ៉ាងដែលកម្រនរកបុគ្គលដទៃឯណាមកប្រដូចបាន គឺការដាក់ទានប្រពន្ធ(មទ្រី) និងកូន(ជាលីក្រស្នា) ទៅឲ្យឥន្ទព្រាហ្មណ៍និងជូជកព្រាហ្មណ៍។
- ចំណែកអជ្ឈត្តិទាននៅក្នុងវេស្សន្តជាតក គេឃើញត្រឹមតែជាការប្រកាសប៉ុណ្ណោះ ពោលគឺព្រះវេស្សន្តរប្រកាសថានរណាសុំជីវិតឲ្យជីវិត សុំសរីរៈមានសួត ថ្លើម ប្រមាត់ បេះដូង ភ្នែកជាដើម នឹងបូជាជាទានភ្លាមដោយឥតស្តាយស្រណោះ។
- ចំពោះអង្គបរិច្ចាគ ជីវិតបរិច្ចាគ គេឃើញមាននៅក្នុងបញ្ញាសជាតកច្រើនជាងជាអាទិ៍៖ រឿងសិរីចូឌាមណី (បរិច្ចាគរាងកាយមួយចំហៀងឲ្យទៅព្រាហ្មណ៍មួយចំហៀងទៀតទៅចំណីយក្ខ)។ រីឯរឿងវិបុលរាជវិញ ឥន្ទព្រាហ្មណ៍បានសុំទាំងមហេសី សុំទាំងរាជបុត្រី រួមទាំងរាជបល័ង្កអំពីព្រះអង្គទៀតផង។

• <u>សរុបសេចក្តី</u> : សរុបមក តួអង្គពោធិសត្វទាំងអស់សុទ្ធតែបានឆ្លងកាត់វិញ្ញាសាការបរិច្ចាគទានទាំងខាងក្រៅ និងខាងក្នុងនេះដោយចៀសមិនផុត មុននឹងត្រាស់ជាព្រះពុទ្ធ។

## គ. សេចក្តីបញ្ចប់

• <u>វាយតម្លៃប្រធាន</u> : ប្រធានខាងលើមានអត្ថន័យល្អប្រសើរ....

• <u>មតិផ្ទាល់ខ្លួន</u> : បុគ្គលទាំងអស់គប្បីធ្វើនូវទាន ព្រោះអានិសង្សនៃទានគឺមានកម្លាំងខ្លាំងក្លាណាស់ បើមិនទាន់អាចបានត្រាស់ជាព្រះពុទ្ធក៏អាចញុាំងឲ្យមានមិត្តច្រើន ដូចយ៉ាងរឿងសិរីធរខាងលើបានបញ្ជាក់ស្រាប់។ បណ្ឌិតទាំងឡាយមិនដែលលើកសរសើរជនកំណាញ់ក្រៅ

តម្រាទេ ហើយបណ្ឌិតទាំងឡាយក៏មិនដែលស្វែងរកប្រយោជន៍សម្រាប់ខ្លួនឯងនោះដែរ។ យល់ច្បាស់ពីទាននិងសទ្ធា យើងម្នាក់ៗគប្បីចូលរួមវិភាគទានក្នុងការកសាងជាតិ ទាំងធនបរិច្ចាគនិងបញ្ញាបរិច្ចាគ៕



## ប្រធានទី៥



**តាមទំនៀមទម្លាប់តាំងពីបុរាណកាល "ជារៀងរាល់ឆ្នាំនៅថ្ងៃ៤រោចខែពិសាខ ព្រះមហាក្សត្រតែងប្រារព្ធពិធីច្រត់ព្រះនង្គ័ល"។ តើគេរៀបចំពិធីនេះយ៉ាងដូចម្ដេចខ្លះ? ហើយមានប្រយោជន៍អ្វីទើបគេរៀបចំពិធីនេះឡើង? ចូរពន្យល់។**

## គម្រោងតែង

### ក. សេចក្ដីផ្ដើម

- <u>លំនាំបញ្ហា</u> : ក្នុងប្រទេសកម្ពុជាតែងតែមានប្រារព្ធពិធីបុណ្យជាតិជាច្រើន...។
- <u>ចំណូលបញ្ហា</u> : "ព្រះមហាក្សត្រខ្មែរប្រារព្ធពិធីច្រត់ព្រះនង្គ័ល"
- <u>ចំណោទបញ្ហា</u> : តើគេរៀបចំពិធីនេះយ៉ាងដូចម្ដេចខ្លះ? ហើយមានផលប្រយោជន៍យ៉ាងណាដែរ?

### ខ. តួសេចក្ដី

- <u>ឃ្លាភ្ជាប់សេចក្ដី</u>
- <u>ពន្យល់ពាក្យ</u>
  - ច្រត់ព្រះនង្គ័ល : ជាការទឹមគោនង្គ័លដើម្បីដីស្រែចម្ការធ្វើដំណាំដាំដុះគ្រប់បែបយ៉ាង ពិសេសគឺស្រូវ។
  - ប្រារព្ធ : ចាប់ផ្ដើមធ្វើ ផ្ដួចផ្ដើម រៀបចំធ្វើឡើង។
- <u>ពន្យល់ន័យប្រធាន</u> : ទស្សនៈប្រធាន ចង់ឱ្យយើងបកស្រាយពន្យល់អំពីរបៀបដែលព្រះមហាក្សត្ររៀបចំផ្ដួចផ្ដើមធ្វើពិធីច្រត់ព្រះនង្គ័ល និងសារប្រយោជន៏នៃពិធីនេះ។
- **បកស្រាយ**

ទំនៀមស្ដេចច្រត់ព្រះនង្គ័លនៅកម្ពុជរដ្ឋមានមកអំពីបុរាណកាល ដោយមានភស្តុតាងក្នុងប្រវត្តិសាស្ត្រ អក្សរសិល្ប៍ និងច្បាប់ខ្មែរបុរាណជាគ្រឿងសំអាង។

ក. ការរៀបចំពិធី

+ ការកំណត់ពេលវេលា

  - នៅថ្ងៃ១រោច ២រោច ៣រោច ខែពិសាខ ចាត់ឲ្យព្រាហ្មណ៍ ៥នាក់ធ្វើហោមពិធីបូជាទេវតា ៥អន្លើនៅទីព្រះស្រែ។
  - ថ្ងៃ៤រោច ខែពិសាខ ចាប់ដង្ហែមន្ត្រីអ្នកច្រត់ព្រះនង្គ័លតំណាងព្រះអង្គ និងភរិយា ចេញពីព្រះបរមរាជវាំងទៅកាន់ទីព្រះស្រែ។ គោឧសភរាជ៣នឹម ទឹមច្រត់ព្រះនង្គ័លចាំនៅមុខរោងពីធី ពេលព្រឹកម៉ោងប្រាំពីរសាមសិបនាទី ចាប់ផ្ដើមច្រត់ព្រះនង្គ័លពីទិសនិរតីវិលស្ដាំរៀងគ្រប់បី ជុំឈប់ដោះព្រះគោផ្សងឲ្យបរិភោគអាហារ៧យ៉ាង។

- មុនថ្ងៃ១រោច ខែពិសាខ ក្រុមមេការត្រូវរៀបចំធ្វើរោងមណ្ឌលពិធីនៅព្រះស្រែ៥អន្លើ គឺនៅត្រង់ទិសបូព៌មួយ ទិសអាគ្នេយ៍មួយ ទិសនិរតីមួយ ទិសពាយ័ព្យមួយ និងទិសឦសានមួយ។
- ក្រៅពីនេះមានសង់ព្រះពន្លាមួយខ្នង សម្រាប់ព្រះមហាក្សត្រ មន្ត្រីរាជការអង្គុយទស្សនា។

+ ការសែនក្រុងពាលី

- នៅថ្ងៃ១រោច វេលារសៀលម៉ោង៥ មុនពេលធ្វើហោមពិធីព្រាហ្មណ៍ទាំងអម្បាលនោះប្រជុំគ្នារៀបសែនក្រុងពាលី "ព្រះភូមិ នាងគង្ហីង ព្រះធរណី" ដែលនិយមហៅថាម្ចាស់ទឹក ម្ចាស់ដី នៅកណ្ដាលទីព្រះស្រែ ដើម្បីសុំទឹកដីធ្វើការ

+ អំពីគោឧសភរាជ

- ក្នុងវេលាមុនច្រត់ព្រះនង្គ័លបីថ្ងៃ គឺក្នុងពេលដែលព្រាហ្មណ៍ធ្វើពិធី៣ថ្ងៃ ព្រះគោទាំងគូ និងនង្គ័លនោះយកទៅដាក់ក្នុងរោងសង់ថ្មីក្នុងទីព្រះស្រែដោយមានភ្នាក់ងារមើលថែរក្សា។ ក្នុងរវាងបីថ្ងៃនោះមិនឲ្យយកចេញពីទីព្រះស្រែ។
- គោមួយនឹមទឹមច្រត់ព្រះនង្គ័លនោះគេហៅថា "គោឧសភរាជ" តាមបែបបច្ចុប្បន្នគឺ សម្បុរខ្មៅ ស្នែងរាងច្រពាស់ឈ្នក់ ឬរាងខុបទៅមុខបន្តិច ហើយវាត់ចុងឡើងលើបន្តិច ឯពីរនឹមហែមុខនិងក្រោយច្រើនមានសម្បុរក្រហម។ ហើយព្រះគោនោះ វេលាទឹមច្រត់ព្រះនង្គ័ល គេប្រដាប់ដោយគ្រឿង គឺពាក់ស្រោមមុខស្រោមស្នែង និងពាក់សំពត់កម្រាលសម្បុរក្រហមលើខ្នងផង។ ឯនង្គ័លទាំង៣នោះគេលាបថ្នាំខ្មៅ កាត់ខ្សែក្រហមៗដោយ

អន្ទើ១ ឯចន្ទោលព្រះនង្គ័លធ្វើជារូបក្បាលនាគ លាបថ្នាំពណ៌មាសត្រង់កនាគ។

+ អ្នកតំណាងព្រះអង្គ : ក្នុងសម័យនេះគ្មានពិធីតែងតាំងទេ សម្រេចដោយព្រះរាជាកំណត់តែម្តង។ ក្នុងវេលាដែលបានទទួលតំណែងព្រះអង្គហើយ គេហៅថា "ស្តេចមាឃ" ភរិយានៃអ្នកតំណាងព្រះអង្គតាំងជាភរិយាស្តេចមាឃ មានមុខងារជាអ្នកព្រោះស្រូវ ហៅថា ព្រះមេហួ។

+ ក្បួនហែអ្នកតំណាងព្រះអង្គ : នៅថ្ងៃ៤រោច ខែពិសាខ ម៉ោង៧ព្រឹក ឧកញ៉ាពលទេព និងជំទាវ ព្រមទាំងបរិវារ ចូលទៅថ្វាយបង្គំព្រះករុណានៅក្នុងព្រះបរមរាជវាំង។ ព្រះករុណាត្រាសថា ថ្ងៃនេះជាថ្ងៃធ្វើពិធីវប្បមង្គលយើងសន្មតអ្នកឲ្យជាស្តេចពលទេពតំណាងយើង និងសន្មតលោកជំទាវជាទេវី តំណាងព្រះទេវីរបស់យើងក្នុងកិច្ចព្រះរាជពិធីច្រត់ព្រះនង្គ័ល ហើយទ្រង់យកម្សៅក្រអូបលាបត្រង់ថ្ងាសឲ្យឧកញ៉ាពលទេព និងលោកជំទាវក៏បានឈ្មោះថា "ស្តេចច្រត់ព្រះនង្គ័ល"។

+ ការច្រត់ព្រះនង្គ័ល : កាលជួបជុំ លំដាប់ក្បួនហែក៏ហែទៅដល់ទីព្រះស្រែក្នុងពេលបន្ទាប់ៗគ្នា។ ស្តេចមាឃ និងមេហួ ចូលទៅថ្វាយបង្គំព្រះទេវរូបនៅរោងពិធីទិសនិរតី ជាទីតាំងព្រះចន្ទទេវរូប បាគូផ្លុំស័ង្ខ៣បទរួចចេញច្រត់ព្រះនង្គ័ល មេហួដើរក្រោយនង្គ័លទី៣ ចាប់ស្រូវក្នុងកញ្ជើព្រោចសាចទៅឆ្វេងទៅស្តាំគម្រប់បីជុំទើបឈប់។

+ ការផ្សងគោឧសភរាជ : លំដាប់នោះព្រាហ្មណ៍ព្រះរាជគ្រូសូត្រពាក្យអធិស្ឋានផ្សងគោឧសភរាជដែលទឹមច្រត់ព្រះនង្គ័លនោះឲ្យស៊ីផឹកអាហារ៧យ៉ាង គឺគ្រាប់ស្រូវ១តុ គ្រាប់សណ្តែក១តុ គ្រាប់ពោត១តុ គ្រាប់ល្ង១តុ ស្មៅស្រស់១តុ ទឹក១តុ ស្រា១តុ។ បើគោឧសភរាជស៊ីអាហារណាមួយក៏

ទាយថា ក្នុងឆ្នាំនេះរបស់នោះសម្បូរ ប្លែកតែបើស៊ីស្មៅទាយថានឹងកើតជំងឺគោ បើផឹកស្រានឹងកើតមនុស្សពាល ចោរលួច ចោរប្លន់ជាដើម។

ខ. ប្រយោជន៍នៃពិធី

- បង្ហាញឲ្យឃើញនូវព្រះរាជហឫទ័យនៃព្រះមហាក្សត្រខ្មែរដែលតែងយកព្រះទ័យទុក្ខដាក់ជានិច្ចចំពោះការអភិវឌ្ឍនៃសង្គមជាតិ និងជីវភាពរស់នៅរបស់ប្រជាកសិករ ដោយមានព្រះរាជបំណងចង់ឲ្យវិស័យកសិកម្មដែលជាអាយុជីវិតសេដ្ឋកិច្ចជាតិ និងប្រជារាស្ត្រទទួលបានទិន្នផលខ្ពស់ និងសម្បូរសប្បាយ។
- ជួយជំរុញទឹកចិត្តរបស់ប្រជាកសិករឲ្យខិតខំធ្វើស្រែចម្ការស្របទៅតាមការទស្សន៍ទាយ។
- ពិធីនេះជាព្រះរាជបវេណីដ៏សំខាន់ ចាត់ទុកជាមង្គលមួយដ៏ប្រសើររបស់ប្រជារាស្ត្រខ្មែរ ហៅថា "វប្បមង្គល" ដែលព្រះមហាក្សត្រគ្រប់អង្គតែងដឹកនាំប្រជារាស្ត្រប្រារព្ធធ្វើពុំដែលខានតាំងពីបុរាណកាល។ ម្យ៉ាងទៀតជាមង្គលឧទ្ទិសដល់ការធ្វើស្រែចំការ។
- បង្កើនកិត្យានុភាពជាតិលើឆាកអន្តរជាតិ។
- រក្សាប្រពៃណីដ៏ល្អរបស់ជាតិឲ្យគង់វង្សស្ថិតស្ថេរ ទុកឲ្យកូនចៅជំនាន់ក្រោយៗទៀត។

- <u>សរុបមតិ</u> : សរុបមករាជពិធីច្រត់ព្រះនង្គ័លមានការរៀបចំចាត់ចែងបានយ៉ាងត្រឹមត្រូវទៅតាមប្រពៃណីទំនៀមទំលាប់តាំងពីបុរាណកាល ហើយពោរពេញទៅដោយអត្ថន័យខ្លឹមសារយ៉ាងជ្រាលជ្រៅ មានគុណប្រយោជន៍យ៉ាងធំធេងសម្រាប់ប្រជារាស្ត្រខ្មែរ។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ទស្សនៈពិធីច្រត់ព្រះនង្គ័លពិតជាពិធីដ៏មង្គលមួយសម្រាប់ប្រទេសកម្ពុជាយើង
- <u>មតិផ្ទាល់ខ្លួន</u> : យើងទាំងអស់គ្នាគួរតែយកចិត្តទុកដាក់ថែរក្សាប្រពៃណីទំនៀមទម្លាប់នេះឲ្យបានល្អតទៅថ្ងៃមុខ។



# ប្រធានទី៦



| |
|---|
| **មានទស្សនៈមួយពោលថា "ទានជាសកម្មភាពមនុស្សធម៌ អាចជួយប្រជាជនឱ្យរួចផុតពីទុក្ខវេទនា"។ តើពំនោលនេះមានន័យដូចម្តេច? ចូរពន្យល់ដោយលើកឧទាហរណ៍មកបញ្ជាក់។** |

## គម្រោងតែង

## ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : រស់នៅក្នុងសង្គម មនុស្សត្រូវចេះជួយគ្នា....។
- <u>ចំណូលបញ្ហា</u> : "................................................"
- <u>ចំណោទបញ្ហា</u> : តើពំនោលរបស់ប្រធានមានអត្ថន័យដូចម្តេច?

## ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u> :
- <u>ពន្យល់ពាក្យ</u>
  - ទាន : ការឲ្យ អំណោយ អ្វីៗដែលគួរឲ្យ។
  - សកម្មភាពមនុស្សធម៌ : ការជួយសង្គ្រោះគ្នាទៅវិញទៅមក
  - ទុក្ខវេទនា : សេចក្តីព្រួយ សេចក្តីលំបាក ទាំងផ្លូវកាយផ្លូវចិត្ត។
- <u>ពន្យល់ន័យប្រធាន</u> : ការផ្តល់ជាអំណោយគ្រប់យ៉ាងទាំងសម្ភារៈ ស្មារតី ពិតជាជួយសង្គ្រោះប្រជាជនឲ្យរួចផុតពីការលំបាកផ្លូវកាយ និងចិត្ត។
- **បកស្រាយ**

  + ទានផ្នែកសម្ភារៈមាន៖
    - ការផ្តល់ស្បៀងអាហារ
    - សម្លៀកបំពាក់
    - ប្រាក់កាស
    - ដើមទុនរកស៊ី
    - ដីស្រែ ចម្ការ
    - ប្រដាប់ប្រដាសិក្សា
    - ទីជម្រក

  + ផ្នែកស្មារតី៖
    - ការអប់រំ : ស្មារតីទទួលខុសត្រូវ(មនសិការ ចេះតស៊ូ ក្លាហាន និងរឹងមាំ....)។
    - បំណិនវិជ្ជាជីវៈ : បណ្តុះបណ្តាលការងារ មុខរបរ...។
    - បច្ចេកវិទ្យា : ជឿនលឿនតាមបែបវិទ្យាសាស្ត្រសម័យទំនើប...

- ការងារ : ការងារតាមសមត្ថភាព លទ្ធភាព...។

+ ប្រជាជនដែលត្រូវទទួលបាននូវទានចាំបាច់៖ អ្នកក្រីក្រតោកយ៉ាក អ្នករងគ្រោះ អ្នកមានគ្រោះធម្មជាតិ ខ្យល់ព្យុះ ចាស់ជរា ជនពិកា អ្នកកម្សត់ទុរគត ក្មេងកំព្រា អ្នកកើតជំងឺអេដស៍ ...ទាំងនេះនាំប្រជាជនទទួលបានជាប្រយោជន៍ច្រើន...ពោលគឺទទួលបានសុភមង្គល និងការអភិវឌ្ឍ...។

+ លក្ខណៈអ្នកឲ្យទាន៖

- ត្រូវមាន៖ ព្រហ្មវិហារធម៌ គុណធម៌ កុសលធម៌ សីលធម៌ មនសិការពិតៗ...។

ឧទាហរណ៍៖

* តាមតថភាពសង្គមបច្ចុប្បន្ន

- កាកបាទក្រហម
- សប្បុរសជននានា(ជាតិ និងអន្តរជាតិ)...

* ប្រវត្តិសាស្ត្រ

- ខ្មែរសម័យអង្គរ តាមរយៈស្តេចជ័យវរ្ម័នទី៧
- សម័យសង្គមរាស្ត្រនិយម(សម្តេចនរោត្តមសីហនុ)...។

* អក្សរសិល្ប៍

- រឿងមហាវេស្សន្តរ៖ សកម្មភាពព្រះវេស្សន្តរជួយប្រជាជនទូទៅ...
- រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់៖
    - លោករដ្ឋមន្ត្រីក្មេងជួយសមឲ្យរួចផុតពីទុរគតភាព។
    - សម្តេចសីហនុ ព្រះប្រមុខរដ្ឋ ជួយសង្គ្រោះប្រជាជនខ្មែរឲ្យមានជីវភាពធូរធារ និងជាតិរីកចម្រើន...។

- រឿងកូលាបប៉ៃលិន៖
    - លោកហ្លួងរតនសម្បត្តិជួយសង្គ្រោះចៅចិត្ររហូតក្លាយជាអ្នកមាន។
    - ពេទ្យស្អាតជួយចៅចិត្រឲ្យមានការងារធ្វើ។

- <u>សរុបមតិ</u> : សរុបសេចក្តីមក ការផ្តល់អំណោយជាសម្ភារៈ និងស្មារតីដល់ប្រជាជនដែលរងការលំបាកក្នុងជីវភាព ពិតជាជួយធ្វើឲ្យចាកផុតពីទុក្ខវេទនា។ ពិសេសការធ្វើទានត្រូវឈរលើលក្ខណៈល្អ គ្មានគំនិតកេងប្រវ័ញ្ច ដើម្បីប្រយោជន៍ផ្ទាល់ខ្លួន និងមានលក្ខណៈប្រជាភិថុតបោកប្រាស។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ទស្សនៈប្រធានមានអត្ថន័យល្អជ្រាលជ្រៅ ព្រោះផ្តល់ជាគតិបណ្ឌិតសម្រាប់មនុស្សទូទៅចេះធ្វើទានជួយសង្គ្រោះគ្នា។...
- <u>មតិផ្ទាល់ខ្លួន</u>



# ប្រធានទី៧



ក្រោយពីបានសិក្សារឿងទុំទាវ អ្នកសិក្សាវាយតម្លៃថា “របៀបគ្រប់គ្រងក្នុងសម័យនោះប្រើអំណាចផ្ដាច់ការគ្រប់លំដាប់ថ្នាក់”។ ប្រសិនបើអ្នកដឹកនាំប្រើអំណាចបែបបនេះ តើអ្នកក្រោមបង្គាប់ទទួលបានលទ្ធផលយ៉ាងណាខ្លះ? ចូរពន្យល់ដោយលើកយកអំណះអំ-អំណាងមកបញ្ជាក់។

## គម្រោងតែង

### ក. សេចក្ដីផ្ដើម

- លំនាំបញ្ហា : លើកពីសកម្មភាពនៃរបៀបដឹកនាំនៅក្នុងសង្គមសម័យរឿងទុំទាវមកបង្ហាញ។
- ចំណូលបញ្ហា : “..........................................................”
- ចំណោទបញ្ហា : តើ........................................................?

### ខ. តួសេចក្ដី

- ឃ្លាភ្ជាប់សេចក្ដី :
- ពន្យល់ពាក្យ
  - របៀបគ្រប់គ្រង : របៀបដឹកនាំការងារ។

- អំណាចផ្ដាច់ការ : អំណាចដែលគិតសម្រេចដោយខ្លួនឯង គ្មានការប្រឹក្សា។

• <u>ពន្យល់ន័យប្រធាន</u> : រឿងទុំទាវបង្ហាញការដឹកនាំដែលយកអំណាចគិតសម្រេចអ្វីៗតែខ្លួនឯង គ្មានការប្រឹក្សាយោបល់ពីមន្ត្រីដទៃ។

• **បកស្រាយ**

ក. របៀបគ្រប់គ្រងប្រើអំណាចផ្ដាច់ការគ្រប់លំដាប់ថ្នាក់តាមរយៈរឿងទុំទាវ៖

១. <u>អំណាចស្ដេចផែនដី</u>

- បង្គាប់បញ្ជាលើគ្រប់ស្ថាប័នរដ្ឋ (និតិបញ្ញត្តិ និតិប្រតិបត្តិ តុលាការ យោធា សន្តិសុខ...)
- ប្រើអំណាចផ្ដាច់ការ អយុត្តិធម៌
- អំណាចបែបនេះផ្ដល់ផលអាក្រក់៖
  - ➢ អ្នកកាន់អំណាចក្រោមៗប្រតិបត្តិតាមតៗគ្នា
  - ➢ រាស្ត្រតូចតាចគ្មានសិទ្ធិតវ៉ា រស់គ្មានភាពសុខសាន្ត
  - ➢ បាត់បង់តម្លៃជាមនុស្ស

ឧទាហរណ៍

- ➢ គំរាមកំហែងទុំ ពេលយកនាងទាវមកធ្វើជាស្នំឯកក្នុងរាជវាំង។ “*មានព្រះតម្រាស់នឹងមន្ត្រី ឲ្យយកទាវស្រីមកសួរវា បើឆ្លើយទៅហើយត្រូវពាក្យគ្នា យើងលើកលែងវាតាមចម្លើយ*”។
- ➢ ប្រើអំណាចរៀបការទុំទាវ ដោយគ្មានឯកភាពពីម្ដាយទាវ

- បង្ខំចិត្តស្រីបម្រើតណ្ហាខ្លួន ករណីជម្រើសស្នំឯក (នាងទាវ)
- បញ្ជាពួកមន្ត្រី កងទ័ព មានកាំភ្លើងធំ ចេញទៅកាត់ទោសអរជូន បក្សពួក និងម្តាយទាវ
- ការកាត់ទោសអ្នកស្រុកត្បូងឃ្មុំ (ពោធិជើងខាល) ទៅជាអ្នកងារ (អ្នកទោសសង្គម)

២. អំណាចស្តេចត្រាញ់ (ឧកញ៉ាអរជូន)

- កាន់អំណាចធំបន្ទាប់ពីស្តេចផែនដី
- មានសិទ្ធិអំណាចគ្រប់គ្រង បង្គាប់បញ្ជាគ្រប់យ៉ាងលើវិស័យសំខាន់ៗដូចស្តេចផែនដីដែរ ប៉ុន្តែសម្រាប់តំបន់ខ្លួនកាន់កាប់ប៉ុណ្ណោះ។
- ផលចេញពីអំណាចនេះមានលក្ខណៈអាក្រក់ ពោលគឺរងគ្រោះដល់អ្នកទន់ខ្សោយតូចតាច។

ឧទាហរណ៍

- បង្ខំនាងទាវជាប្រពន្ធទុំមករៀបការជាមួយកូនខ្លួន ហើយកាប់សម្លាប់យ៉ាងព្រៃផ្សៃមកលើរូបទុំពេលយកនាងទាវមកវិញ។
- មានមោទនភាពនឹងអំណាចខ្លួន ជាក់ស្តែងស្រែបស្រាលនឹងសម្តីម្តាយទាវថា៖ *"ឧកញ៉ាអរជូនមាំមួនពេក ធម្មតាក្រោមមេឃទាបជាងភ្នំ មានឫទ្ធិអំណាចឥតជំនុំ កាប់ចាក់វាយដំពុំប្រណី"* ។

៣. អំណាចគ្រួសារ (ម្តាយទាវ)

- ផ្តាច់ការ
- បំបិទសិទ្ធិ គំរាមកំហែងកូនដោយបង្ខំឲ្យធ្វើតាមបំណងខ្លួន។
- ឲ្យតម្លៃលើអំណាច ទ្រព្យសម្បត្តិ បុណ្យសក្តិ...ដោយយល់ថាជាប្រភពនៃសុភមង្គល។
- ប្រកាន់ទស្សនៈអភិរក្សនិយមជ្រុល ផលទទួលបានគឺច្រើនមានលក្ខណៈអាក្រក់ (ទំនាស់គ្រប់យ៉ាង)។

ឧទាហរណ៍

- សម្តីគាត់ថា "*មិនដែលសោះឡើយទាវអើយនំ ច្រឡើសបើសធំម្តេចជាងនាឡិ...*"
- ម្តាយទាវប្រើអំពើហិង្សាបង្ខំកូន ដូចជាថា "*ម្តាយទាវកើតទុក្ខចិត្តអល់ឯក ជេរថាមីចោររឹងដូចដែក អញចាប់អញហែកបែកឥឡូវ*" ។

ខ. ប្រសិនបើអ្នកដឹកនាំប្រើអំណាចបែបនេះ អ្នកក្រោមបង្គាប់ទទួលផលអវិជ្ជមាន ដូចជា៖ គ្មានសិទ្ធិសេរីភាពក្នុងការរស់នៅ បញ្ចេញមតិ ជ្រើសរើស ប្រឆាំងតបត អយុត្តិធម៌ មើលងាយ មើលថោកសំឡុត គំរាម បំភិតបំភ័យ ជិះជាន់កេងប្រវ័ញ្ច គេកាប់សម្លាប់ គេដាក់ទណ្ឌកម្ម...។

ឧទាហរណ៍៖

- តថភាពសង្គមបច្ចុប្បន្ន មានបណ្តាប្រទេសមួយចំនួនលើលោកដូចជានៅប្រទេសអាស៊ី អាហ្វ្រិក អារ៉ាប់ សំបូរការគ្រប់គ្រងផ្តាច់ការ បណ្តាលឲ្យពលរដ្ឋរងគ្រោះធ្ងន់ធ្ងរ។

- តាមប្រវត្តិសាស្ត្រ៖ ពួកអង្គការប៉ុលពត ប្រើរបបគ្រប់គ្រងផ្តាច់ការបណ្តាលឲ្យប្រជាជនខ្មែររស់នៅយ៉ាងវេទនា...។
- ក្នុងអក្សរសិល្ប៍៖ រឿងភូមិតិរច្ឆាន ព្រឹត្តិការណ៍ឆ្នាំ១៩២៥ គឺជារបបអាណានិគមបារាំងត្រួតត្រាបែបផ្តាច់ការ ធ្វើឲ្យរាស្ត្រខ្មែរជួបទុក្ខវេទនា ដូចករណីអ្នកភូមិក្រាំងលាវក្លាយជាអ្នកភូមិតិរច្ឆាន។ រឿងគូលីកំណែន ពួកមេឃុំផាន់ លោកចៅហ្វាយបង្កទុក្ខវេទនាឲ្យប្រជារាស្ត្រនៅស្រុកកណ្តាលស្ទឹង ពិសេសគ្រួសារលឹម និងនាងហេង...។

- សរុបសេចក្តី : រឿងទុំទាវបង្ហាញអំណាចផ្តាច់ការចាប់ពីស្តេចផែនដី ស្តេចត្រាញ់ និងគ្រួសារ។ អំណាចបែបនេះអ្នករស់ក្រោមបង្គាប់ពិតជាទទួលផលអាក្រក់គ្រប់សម័យកាល។

## គ. សេចក្តីបញ្ចប់

- វាយតម្លៃប្រធាន : ប្រធានមានខ្លឹមសារល្អជ្រាលជ្រៅ ព្រោះបង្ហាញឲ្យឃើញពីឥទ្ធិពលអាក្រក់ដែលកើតចេញពីរបៀបគ្រប់គ្រងផ្តាច់ការ។ម្យ៉ាង វាផ្តល់គតិអប់រំដាស់តឿនឲ្យចូលរួមលុបបំបាត់ ឬបោះបង់អំណាចបែបនេះផងដែរ។
- មតិផ្ទាល់ខ្លួន

# ប្រធានទី៨



អ្នកប្រតិបត្តិពុទ្ធសាសនាទាំងឡាយតែងមានទស្សនៈ ថា “ព្រះពុទ្ធសាសនានាំមកនូវសុខៈនិងការអភិវឌ្ឍ សង្គម”។ ចូរបកស្រាយ។

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : និយាយទាក់ទងនឹងព្រះពុទ្ធសាសនា។
- <u>ចំណូលបញ្ហា</u> : “ព្រះពុទ្ធសាសនានាំមកនូវសុខៈនិងការអភិវឌ្ឍ សង្គម”។
- <u>ចំណោទបញ្ហា</u> : តើព្រះពុទ្ធសាសនានាំមកនូវសុខៈនិងការអភិវឌ្ឍ សង្គមដូចម្តេចខ្លះ?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u> :
- <u>ពន្យល់ពាក្យ</u>
  - ព្រះពុទ្ធសាសនា : ពាក្យប្រៀនប្រដៅរបស់ព្រះសម្មាសម្ពុទ្ធ។
  - សុខៈ : សេចក្តីសុខកាយ សប្បាយចិត្ត។
  - ការអភិវឌ្ឍ : ការរីកចម្រើនល្អលាស់។
- <u>ពន្យល់ន័យប្រធាន</u> : ការអប់រំទូន្មានប្រៀនប្រដៅរបស់ព្រះពុទ្ធបាន

នាំមកនូវសេចក្ដីសុខកាយ សប្បាយចិត្ត និងការរីកចម្រើនលូតលាស់របស់សង្គមជាតិ។

- **បកស្រាយ** : ពុទ្ធសាសនាពិតជានាំមកនូវសុខៈ និងការអភិវឌ្ឍសង្គមជាតិព្រោះ៖
  - ❖ ព្រះពុទ្ធសាសនាបានអប់រំពុទ្ធបរិស័ទទាំងអស់ឲ្យចេះជួយសង្គ្រោះគ្នាទៅវិញទៅមកនៅពេលមានគ្រោះអាសន្ន។

ឧទាហរណ៍ក្នុងអក្សរសិល្ប៍៖

- រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់ (លោករដ្ឋមន្ត្រីជួយសង្គ្រោះសម...)។
- រឿងកុលាបប៉ៃលិន (លោកគ្រូពេទ្យស្អាតជួយសង្គ្រោះចៅចិត្រតាមរយៈសរសេរសំបុត្រឲ្យចៅចិត្រកាន់ទៅរកលោកហ្លួងរតនសម្បត្តិ)។

ឧទាហរណ៍ក្នុងប្រវត្តិ៖

- គ្រប់សម័យកាល ព្រះពុទ្ធសាសនាបានចូលរួមក្នុងការអប់រំពុទ្ធបរិស័ទឲ្យចេះជួយគ្នា។

ឧទាហរណ៍ក្នុងសង្គម៖

- គ្រោះទឹកជំនន់ អគ្គិសភ័យ បុណ្យទាន....

❖ ពុទ្ធបរិស័ទនៅក្នុងសង្គមខ្មែរតែងនិយមបំពេញកិច្ចការជាប្រយោជន៍រួម។

ឧ. ការកសាងស្ពាន ថ្នល់ សាលា មន្ទីរពេទ្យ...។

❖ ជួយអប់រំចិត្តមនុស្សឲ្យមានសេចក្ដីស្ងប់ សន្តិភាព...។

ឧ. ទៅវត្ត សុំសីល សម្មាធិ...។

❖ ជាកន្លែងជ្រកកោនរបស់អ្នកកម្សត់ សិស្ស និស្សិត...។

❖ ព្រះពុទ្ធសាសនាបានអប់រំមនុស្សឲ្យប្រព្រឹត្តល្អដោយកាយ វាចា ចិត្ត វៀរចាកអំពើអាក្រក់គ្រប់យ៉ាង។

❖ ប្រកាន់មាគ៌ាអហិង្សា ⇨ បានសុខ ⇨ អភិវឌ្ឍ

- <u>សរុបសេចក្តី</u> : ព្រះពុទ្ធសាសនាពិតជានាំមកនូវសុខៈនិងការអភិវឌ្ឍសង្គម។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ខ្លឹមសាររបស់ព្រះពុទ្ធសាសនាមានអត្ថន័យល្អប្រសើរបង្កប់ទៅដោយការអប់រំ។
- <u>មតិផ្ទាល់ខ្លួន</u>

# ប្រធានទី៩



**ទស្សនៈមួយពោលថា “តណ្ហាជាប្រភពនៃសេចក្តីទុក្ខផង និងសេចក្តីសុខផង”។ ចូរពន្យល់ដោយរកឧទាហរណ៍ក្នុងសង្គម ប្រវត្តិសាស្ត្រ និងអក្សរសិល្ប៍មកបញ្ជាក់ផង។**

## គម្រោងតែង

### ក. សេចក្តីផ្តើម

- លំនាំបញ្ហា : មនុស្សម្នាក់ៗរស់នៅក្នុងសង្គមសុទ្ធតែតម្កល់សេចក្តីលោភ...។
- ចំណូលបញ្ហា : ហេតុនេះហើយទើបមានទស្សនៈមួយពោលថា “តណ្ហាជាប្រភពនៃសេចក្តីទុក្ខផង និងសេចក្តីសុខ”។
- ចំណោទបញ្ហា : តើទស្សនៈខាងលើមានន័យដូចម្តេចខ្លះ?

### ខ. តួសេចក្តី

- ឃ្លាភ្ជាប់សេចក្តី :
- ពន្យល់ពាក្យ
  - តណ្ហា : ចំណង់ សេចក្តីប្រាថ្នា
  - សេចក្តីទុក្ខ : ការលំបាកវេទនាផ្សេងៗ
  - សេចក្តីសុខ : ភាពសុខកាយ សប្បាយចិត្ត

- ប្រភព : ដើមហេតុ ហេតុដែលនាំឲ្យកើត

- <u>ពន្យល់ន័យប្រធាន</u> : ចំណង់ជាដើមហេតុនៃសេចក្ដីលំបាកផង និងសេចក្ដីសុខកាយសប្បាយចិត្តផង។

- **បកស្រាយ**

ក. ប្រភពតណ្ហា

- កើតពីចំណង់ សេចក្ដីត្រេកត្រអាល
- ឧបនិស្ស័យ
- បរិស្ថានសង្គម...

ខ. ផលនៃតណ្ហាមានពីរគឺ៖

- <u>លក្ខណៈអាក្រក់នាំឲ្យជួបទុក្ខ</u>
  - ឃោរឃៅ កាចសាហាវ
  - ចង់បានខុសបែបបទ
  - ប្រព្រឹត្តអំពើទុច្ចរិត
  - ក្លាយជាឃាតករ
  - ជាជនផ្ដាច់ការ
  - ជាជនបំពានច្បាប់
  - ហ៊ានធ្វើអំពើពុករលួយ
  - ..............................

<u>ឧទាហរណ៍</u> + តថភាពសង្គម៖ មនុស្សចង់មានចង់បាន ហ៊ានឆក់លួច ប្លន់ កាប់សម្លាប់....។

+ ប្រវត្តិសាស្ត្រ៖ ផាស៊ីស(អន្តរជាតិ) ពួកប៉ុលពតព្រះយ្សូរវត្តី និងព្រះរាជាសម្ភារ...។

+អក្សរសិល្ប៍៖

- រឿងទុំទាវ : តួអង្គទុំ ទាវ ម្តាយទាវ...
- រឿងរាមកេរ្តិ៍ : នាងកៃកេសី ក្រុងរាពណ៍...
- រឿងថៅកែចិត្តចោរ : ពូហំ ថៅកែ...
- រឿងតេជោយ៉ត : ស្តេចសំរ៉ែ ម៉ឺនចៃចុងរ៉ាក់..

- <u>លក្ខណៈល្អនាំឲ្យសុខ</u>
  - រីកចម្រើន
  - បង្កើនសមត្ថភាព
  - ចេះគោរពច្បាប់
  - អភិវឌ្ឍមនុស្សទូទៅ...

<u>ឧទាហរណ៍</u> + តថភាពសង្គម៖ គេបានចំណាយទ្រព្យដើម្បីអភិវឌ្ឍប្រទេស ដូចជា កសាងសាលារៀន មន្ទីរពេទ្យ ផ្លូវថ្នល់...

+ ប្រវត្តិសាស្រ្ត៖ ព្រះបាទជ័យវរ្ម័នទី៧ ព្រះបាទនរោត្តមសីហនុ...

+ អក្សរសិល្ប៍៖ ព្រះតេមិយ ជនក វេស្សន្តរ សមធនញ្ជ័យ...

- <u>សរុបសេចក្តី</u> : ចំណង់ពិតជាហេតុនាំឲ្យកើតជាផលលំបាកផង និងផលល្អផង...។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ប្រធានមានខ្លឹមសារល្អ ព្រោះលើកបង្ហាញឲ្យឃើញពីផលវិបាករបស់តណ្ហាកើតពីទង្វើខ្វះការពិចារណា និងផលល្អដែលកើតពីទង្វើចេះពិចារណា...។

- <u>មតិផ្ទាល់ខ្លួន</u> : មនុស្សគ្រប់រូបត្រូវកំណាត់ចិត្តរបស់ខ្លួនឲ្យស្ងប់ ទើបចៀសវាងចំណង់ក្នុងផ្លូវខុសបាន។

# ប្រធានទី១០



**ទ្រឹស្តីអក្សរសិល្ប៍បានពោលថា "អក្សរសិល្ប៍ជាកញ្ចក់ឆ្លុះបញ្ចាំងតថភាពសង្គមក្នុងសម័យកាលនីមួយៗ ហើយក៏ជាមធ្យោបាយយ៉ាងសំខាន់សម្រាប់ផ្សាយវប្បធម៌ជាតិដែរ"។ ចូរពន្យល់ដោយលើកឧទាហរណ៍ពីក្នុងអក្សរ-សិល្ប៍តាមសម័យ កាលនីមួយៗមកបញ្ជាក់ផង។**

## គម្រោងតែង

## ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : សង្គមមានការវិវត្តឥតឈប់ឈរ.......យើងអាចដឹងពីព្រឹត្តិការណ៍ទាំងនោះបានតាមរយៈអក្សរសិល្ប៍ផងដែរ។
- <u>ចំណូលបញ្ហា</u> : "អក្សរសិល្ប៍ជាកញ្ចក់ឆ្លុះបញ្ចាំងតថភាពសង្គមក្នុងសម័យកាលនីមួយៗ ហើយក៏ជាមធ្យោបាយយ៉ាងសំខាន់សម្រាប់ផ្សាយវប្បធម៌ជាតិដែរ"។
- <u>ចំណោទបញ្ហា</u> : តើអក្សរសិល្ប៍បានឆ្លុះបញ្ចាំងឲ្យឃើញពីតថភាព

សង្គមយ៉ាងដូចម្តេចខ្លះ?

## ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>
- <u>ពន្យល់ពាក្យ</u>
  - អក្សរសិល្ប៍ : កម្រងអត្ថបទដែលតុបតែងឡើងដោយអក្សរប្រ-កបដោយសិល្ប៍ និងលើកយកបញ្ហាមនុស្សមកចោទនិងដោះស្រាយ។
  - តថភាព : ការពិត។
  - មធ្យោបាយ : ដំណើរទំនងដ៏ល្អសមគួរសម្រាប់ធ្វើកិច្ចការឲ្យបានសមស្របតាមបំណង។
  - ផ្សាយ : ធ្វើឲ្យសាយចេញទៅ ចេញសាយទូទៅ។
  - វប្បធម៌ : ការផ្សាំបណ្តុះចំណេះវិជ្ជា និងប្រាជ្ញាស្មារតីឲ្យល្អូតលាស់ចម្រើនដោយវិទ្យាសាស្ត្រឬដោយសិល្បៈផ្សេងៗជាដើម។
- <u>ពន្យល់ន័យប្រធាន</u> : អក្សរសិល្ប៍គឺជាសមិទ្ធផលពិសេសម្យ៉ាងដែលបានលើកយកបញ្ហាមនុស្សនិងសង្គមមនុស្សមកចោទនិងដោះស្រាយទៅតាមសម័យកាលនីមួយៗនៃប្រវត្តិសាស្ត្រ និងផ្សព្វផ្សាយពីវប្បធម៌របស់ខ្លួនទៅលើឆាកជាតិនិងអន្តរជាតិ។
- **បកស្រាយ**

ក. <u>អក្សរសិល្ប៍ឆ្លុះបញ្ចាំងតថភាពសង្គមគ្រប់សម័យកាល</u>

➢ របបគ្រប់គ្រងសង្គម

- រាជាធិបតេយ្យ និងអាណានិគម : មានលក្ខណៈផ្តាច់ការប្រកាន់វណ្ណៈ ស្វ័នត្តនិយម។

- រាជាធិបតេយ្យអាស្រ័យរដ្ឋធម្មនុញ្ញ(ប្រជាធិបតេយ្យ)

➢ ជីវភាពរស់នៅ ឬរបៀបរស់នៅ

- ប្រកបរបរបែបប្រជាជន សាមញ្ញ(កសិកម្ម ពាណិជ្ជកម្ម សិប្បកម្ម...)
- ទំនាក់ទំនងនិងសាមគ្គីភាពក្នុងជីវភាព (ប្រវាស់ដៃ ការតស៊ូរបស់មហាជន ឬប្រជាពលករ...)
- ទាមទារតម្លៃជីវិតមនុស្ស
- ទាមទារសិទ្ធិសេរីភាព យុត្តិធម៌ មនុស្សធម៌
- ប្រឆាំងការជិះជាន់ ឈ្នានីស កេងប្រវ័ញ្ច
- ការតស៊ូប្រឆាំងនឹងវណ្ណៈនិងរបបសង្គម
- ការតស៊ូចំពោះធម្មជាតិ(គ្រោះរាំងស្ងួត ខ្យល់ព្យុះ ផ្គរ រន្ទះ...)
- ផ្លាស់ប្ដូររបប គឺឯករាជ្យអធិបតេយ្យ...

➢ វប្បធម៌

- ប្រពៃណី ទំនៀមទម្លាប់ (ពេលកើត ពេលការ ពេលស្លាប់...)
- ជំនឿសាសនា(អព្ភូតហេតុចេញពីធម្មជាតិ ហោរាសស្ត្រ បន់ស្រន់ ព្រះពុទ្ធសាសនា ព្រហ្មញ្ញសាសនា...)
- សិល្បៈ របាំចម្លាក់ ការតុបតែងលម្អ សម្លៀកបំពាក់...
- កីឡាបែបខ្មែរ គុនដាវ បោកចំបាប់...
- ល្បែងប្រជាប្រិយ ចោលឈូង បោះអង្គុញ ទាញព្រ័ត្រ...
- ការសិក្សាអប់រំ បណ្ដុះបណ្ដាលឲ្យមានពុទ្ធិជ្រៅជ្រះ គឺក្លាយជាបណ្ឌិត (អន្ទិត)

➢ ឧទាហរណ៍ក្នុងអក្សរសិល្ប៍

- រឿងទុំទាវ...
- រឿងគូលីកំណែន...
- រឿងភូមិតិរច្ឆាន...

ខ. <u>អក្សរសិល្ប៍ផ្សាយវប្បធម៌</u>

- លើកស្ទួយវប្បធម៌ជាតិ ឲ្យមានកិត្យានុភាពជាតិ
- បង្ហាញនូវអត្តសញ្ញាណជាតិ និងលក្ខណៈពិសេសជាតិមិនឲ្យច្រឡំជាតិដទៃ
- ថែរក្សា ការពារព្រលឹងជាតិ
- ដាស់តឿន បំផុសឲ្យប្រជាជនទាំងអស់ស្រឡាញ់ កសាង និងការពារមរតកនេះ និងចេះឲ្យតម្លៃលើវប្បធម៌ជាតិ...

➢ លើកឧទាហរណ៍ (ក្នុងអក្សរសិល្ប៍ពីរ បីរឿង មកបង្ហាញ...)

- <u>សរុបសេចក្ដី</u> : អក្សរសិល្ប៍ពិតជាកញ្ចក់ឆ្លុះបញ្ចាំងតថភាពសង្គមក្នុងសម័យកាលនីមួយៗ......។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : មានអត្ថន័យជ្រាលជ្រៅ ព្រោះបានលើកបង្ហាញពីតួនាទីអក្សរសិល្ប៍....និងអប់រំមនុស្សឲ្យស្រឡាញ់...។
- <u>មតិផ្ទាល់ខ្លួន</u> : មោទនភាពចំពោះមរតកដូនតា....ថែរក្សាការពារ...។

# ប្រធានទី១១



**មតិភាគច្រើនយល់ឃើញថា "បុគ្គលមានទ្រព្យសម្បត្តិច្រើនក្តី ចំណេះវិជ្ជាច្រើនក្តី មិនសុទ្ធតែជាគុណសម្បត្តិនោះឡើយ កាលណាបុគ្គលនោះប្រាសចាកនូវសីលធម៌"។ ចូរបកស្រាយ ព្រមទាំងលើកឧទាហរណ៍ពីប្រវត្តិសាស្ត្រ អក្សរសិល្ប៍ខ្មែរ និងជីវភាពរស់នៅប្រចាំថ្ងៃមកបញ្ជាក់។**

## គម្រោងតែង

## ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : ទ្រព្យសម្បត្តិនិងចំណេះវិជ្ជាជាសំណូមពរចាំបាច់ក្នុងជីវភាពមនុស្ស...ពេលបានទ្រព្យសម្បត្តិ និងចំណេះវិជ្ជា គេមិនបានប្រើប្រាស់ឲ្យត្រូវចំគោលដៅ និងប្រព្រឹត្តអំពើខុសឆ្គង...។
- <u>ចំណូលបញ្ហា</u> : ដោយហេតុនេះហើយទើប "................"
- <u>ចំណោទបញ្ហា</u> : តើមតិខាងលើមានអត្ថន័យដូចម្តេច?

## ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>
- <u>ពន្យល់ពាក្យ</u>
  - ទ្រព្យសម្បត្តិ : ទ្រព្យផ្សេងៗ ទ្រព្យសម្រាប់ប្រើប្រាស់។
  - ចំណេះវិជ្ជា : សេចក្តីដឹងច្បាស់ ការចេះដឹង។

- គុណសម្បត្តិ : សេចក្តីព្រមដល់ដោយគុណ ការបរិបូរដោយសេចក្តីល្អ សេចក្តីបរិសុទ្ធ។
- ប្រាសចាក : ឃ្លាតចាក ផុតចាក គ្មាន ឥត។
- សីលធម៌ : កិរិយា មារយាទ សណ្តាប់ធ្នាប់ ដំបូន្មានដែលនាំឲ្យចៀសវាងអំពើអាក្រក់ ហើយឲ្យប្រព្រឹត្តតែអំពើល្អ។

- <u>ពន្យល់ន័យប្រធាន</u> : បុគ្គលដែលមានទ្រព្យសម្បត្តិនិងចំណេះដឹង មានគុណសម្បត្តិ តែបើខ្វះសីលធម៌វិញ វានាំមកនូវគុណវិបត្តិទៅវិញ។
- **បកស្រាយ**

ក. <u>គុណសម្បត្តិនៃទ្រព្យដែលកើតពីចំណេះវិជ្ជា</u>

❖ គុណសម្បត្តិនៃទ្រព្យសម្បត្តិ

- ជាជម្រកដ៏សុខដុម
- ហូបឆ្ងាញ់
- សម្ភារៈប្រើប្រាស់ទាន់សម័យ
- មានកិត្តិយស កេរ្តិ៍ឈ្មោះ
- ឧទា. អ្នកខ្លះមានវិទ្យាស្តុកស្តម្ភ ឡានទំនើបៗ ចូលហាងធំៗ ចង់បានអ្វីក៏បានដូចចិត្ត...។

❖ គុណសម្បត្តិនៃចំណេះវិជ្ជា

- គំនិតខ្ពង់ខ្ពស់
- ប្រាជ្ញាឈ្លាសវៃ
- ស្វែងរកការងារបានល្អ
- មានកិត្តិយសថ្លៃថ្នូរ ល្បីល្បាញ
- ឧទា. កវី រាជបណ្ឌិតដែលបន្សល់កេរ្តិ៍ឈ្មោះដល់សព្វថ្ងៃ

ដូចជាក្រមង៉ុយ ព្រះរាជសម្ភារ ព្រះសង្ឃរាជជួនណាត។ បច្ចុប្បន្ន អ្នកមានចំណេះវិជ្ជា ធ្វើជាគ្រូបង្រៀន ពេទ្យ មន្ត្រីរាជការ...។

ខ. ទ្រព្យសម្បត្តិ ចំណេះវិជ្ជាផ្តល់គុណវិបត្តិ ពេលប្រាសចាកសីលធម៌

❖ បុគ្គលមានទ្រព្យសម្បត្តិផ្តល់គុណវិបត្តិច្រើនដូចជា៖

- យកទៅប្រើក្នុងផ្លូវមិនល្អ ទិញដូរគ្រឿងញៀនយកមកសេព ទិញដូរស្រីញី កើតរោគ...។
- មានទ្រព្យសម្បត្តិច្រើនក៏មិនស្កប់ស្កល់ ចង់មានចង់បានមិនឈប់ កើតអំពើពុករលួយក៏កាន់តែខ្លាំង...។
- មានទ្រព្យច្រើន ខ្លះមើលងាយអ្នកទន់ខ្សោយ។
- បំផ្លាញសម្បត្តិជាតិសាធារណៈ។
  ឧទា. មានអ្នកកើតអេដស៍ រោគផ្សេងៗ។
- អ្នកពុករលួយត្រូវបានវែកមុខ និងបញ្ជូនចូលគុកក៏ច្រើន។
  ឧទា. លោកឧកញ៉ាសម្បូរសម្បត្តិមិនអនុគ្រោះដល់សមដែលមានការភ្ញាក់រលឹក...។

❖ បុគ្គលប្រសើរដោយចំណេះវិជ្ជាក៏ផ្តល់គុណវិបត្តិដោយសារ៖

- គ្មានសីលធម៌វិជ្ជាជីវៈ មិនស្រឡាញ់អំពើល្អ។
- យកចំណេះប្រើក្នុងផ្លូវខុសឆ្គង យកចំណេះវិជ្ជាទៅបំពានអ្នកទន់ខ្សោយជាង។
- បំផ្លាញជាតិ មនុស្សជាតិ។
- មានចំណេះវិជ្ជា ហើយប្រមាថមាក់ងាយអ្នកល្ងង់ខ្លៅ។
- .................................

ឧទា. គ្រូពេទ្យនរា អមនុស្សធម៌ ឃើញស្លាប់នៅចំពោះមុខហើយមិនជួយ ទុកឲ្យនាងសយស្លាប់...។

- ក្រុមខ្មែរក្រហមសុទ្ធតែជាអ្នកចេះដឹង រៀនដល់បរទេស មានសញ្ញាបត្រថ្នាក់បណ្ឌិត សាស្រ្តាចារ្យ តែសម្លាប់មនុស្ស ហើយជាជាតិឯងទៀត។
- អ្នកមានចំណេះ ផលិតគ្រឿងអាវុធទំនើបៗដែលបាញ់មួយគ្រាប់អាចសម្លាប់មនុស្សមួយឬពីរប្រទេសបាន...។

- <u>សរុបសេចក្តី</u> : ទ្រព្យសម្បត្តិសម្បូរក្តី ឬចំណេះវិជ្ជាក្តី បើអំពើអាក្រក់ចូលសណ្ឋិតក្នុងខន្ធសន្តានចិត្តហើយនោះ ធ្វើឲ្យទ្រព្យសម្បត្តិ និងចំណេះទាំងនោះវាអាសារឥតការទាំងអស់។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : មានអត្ថន័យល្អ ព្រោះបានអប់រំមនុស្សចេះប្រើទ្រព្យសម្បត្តិនិងចំណេះវិជ្ជាឲ្យបានត្រឹមត្រូវប្រកបដោយគុណធម៌...។
- <u>មតិផ្ទាល់ខ្លួន</u> : ទោះបីមានទ្រព្យសម្បត្តិស្តុកស្តម្ភក្តី ឬចំណេះវិជ្ជាក្តី ត្រូវយកទៅប្រើប្រាស់ឲ្យចំគោលដៅ និងប្រកបទៅដោយសីលធម៌។

# ប្រធានទី១២



ទស្សនៈមួយចែងថា "សុជីវធម៌ជាអលង្ការរបស់មនុស្សជាតិរាល់រូប ជាស្នេហ៍មុខរបស់នារីទូទៅ"។ ចូរអធិប្បាយ។

## គម្រោងតែង

## ក. សេចក្តីផ្តើម

- លំនាំបញ្ហា : ក្នុងដំណើរការរស់នៅនៃជីវិតរបស់មនុស្ស ត្រូវមានសេចក្តីថ្លៃថ្នូរ មានកិត្តិយស មានគេគោរពស្រឡាញ់ ។ល។ ដើម្បីបានរបស់ទាំងអស់នេះ មនុស្សត្រូវចេះស្វែងរកវាដោយការប្រព្រឹត្តកាយវាចាចិត្តឱ្យបានល្អប្រសើរ គួរជាទីរាប់អាននៃអ្នកផងទាំងពួង ។
- ចំណូលបញ្ហា : ជាពិសេសមនុស្សត្រូវមានសុជីវធម៌ជាប្រចាំ ដូចមានទស្សនៈមួយឃ្លាថា "សុជីវធម៌ជាអលង្ការរបស់មនុស្ស ជាស្នេហ៍មុខរបស់នារីទូទៅ" ។
- ចំណោទបញ្ហា : តើទស្សនៈខាងលើមានអត្ថន័យដូចម្តេច?

## ខ. តួសេចក្តី

- ឃ្លាភ្ជាប់សេចក្តី
- ពន្យល់ពាក្យ
  - សុជីវធម៌ : ការរស់នៅដោយល្អ ប្រកបដោយសណ្តាប់ធ្នាប់ របៀបរៀបរយ ការចេះដឹងប្រមាណ គួរសមក្នុងកិច្ចការប្រា-ស្រ័យជាមួយអ្នកដទៃ ។

- អលង្ការ : សំដៅលើគ្រឿងប្រដាប់តុបតែងខ្លួន មានខ្សែដៃ ចិញ្ចៀន ក្រវិល ខ្សែក នាឡិកា ។ល ។

- <u>ពន្យល់ន័យប្រធាន</u> : ការរស់នៅដោយការប្រព្រឹត្តទង្វើល្អ ចេះគួរសម ចេះប្រមាណក្នុងកិច្ចការប្រាស្រ័យជាមួយអ្នកដទៃ គឺជាគ្រឿងលំអរបស់មនុស្សសម្រាប់លើកតម្លៃមនុស្សឱ្យមានសោភ័ណ និងជាមន្តស្នេហ៍ដ៏ពូកែសម្រាប់នារីថែមទៀតផង ។
- **បកស្រាយ**
  - សុជីវធម៌ជាអលង្ការរបស់មនុស្សពិតប្រាកដណាស់ហើយៗមនុស្សនឹងមានតម្លៃពេញលេញក៏ដោយការបរិបូណ៌ដោយសុជីវធម៌នេះឯង ។
  - ឧបករណ៍សម្រាប់តាក់តែងរូបកាយរបស់មនុស្ស ហើយដែលមនុស្សតែងនិយម គឺសម្លៀកបំពាក់ មាសប្រាក់ជាដើម ជាវត្ថុដែលបានមកដោយការទិញដូរ ។
  - គ្រឿងតាក់តែងកាយដែលជាសម្ភារៈសម្រាប់មនុស្សដែលកើតឡើងដោយការទិញដូរនេះមិនប្រសើរវិសេសវិសាលស្មើនឹងអ្នកមានសុជីវធម៌នៅក្នុងខ្លួនទេ ។
  - គ្រឿងអលង្ការ អាចត្រូវវិនាសសូន្យទៅវិញ មិនមែនជាគ្រឿងសរសើរ លើកកម្ពស់នៃជនទូទៅទាំងអស់ផង ។
  - ចំពោះស៊ីវធម៌ដែលមនុស្សត្រូវប្រព្រឹត្តនោះមានដូចជា៖
    - ការចេះលើកដៃសំពះជម្រាបសួរចាស់ព្រឹទ្ធាចារ្យ ចេះឱនលំទោន មិនធ្វើឫកពើងឡូងអាងខ្លួនមានអំណាច មានទ្រព្យ

សម្បត្តិលើសគេ ។ល ។

- ត្រូវមានទឹកមុខញញឹមញញែមទៅកាន់ញាតិមិត្ត បងប្អូន លោកគ្រូអ្នកគ្រូ អាណាព្យាបាល ឬដៃគូសន្ទនាជាមួយ ។
- ប្រសិនបើនៅលើក្បាលមានពាក់មួកឬទទួរឆ័ត្រត្រូវដោះមួក ឬឆ័ត្រចេញនៅពេលជួបចាស់ទុំឬនៅពេលចូលវត្តអារាម ដើម្បីសម្តែងការគោរពដ៏ស្មោះស្ម័គ្រ ។
- នៅកន្លែងសាធារណៈដែលមានមនុស្សច្រើនគ្នានៅជុំវិញខ្លួន នៅហាងម្ហូបអាហារ នៅលើរថយន្ត រថភ្លើង ឬយានជំនិះណាមួយ អ្នកមានសុជីវធម៌តែងនិយាយសំដីណាដែលគេចង់ស្តាប់ ហើយមានប្រយោជន៍ ។
- គេតែងលះបង់នូវគ្រឿងអាក្រក់ រឿងស្រីញី ឬរឿងសម្ងាត់ណាមួយចោលឱ្យស្រឡះ ។
- អ្នកជាកំលោះក្រមុំ គេមិនងាកមុខ ចោលភ្នែកក្រឡេកមើលក្រមុំកំលោះណាដែលចម្លែកមិនធ្លាប់ស្គាល់ដោយអឹមអៀន លីបល ចុងភ្នែក ចុងច្រមុះនោះទេ ។
- មិនធ្វើកាយច្រងេងច្រងាង និយាយដោយវាចាលាន់ឮទ្រហឹងអឹងអាប់ ។
- មិនទទួលទានស្លាបារី ខាក ស្តោះ ព្រួសទឹកមាត់ឱ្យរំខាន ឱ្យប្រឡាក់ខ្ទាតទៅលើអ្នកជិតខាងនោះដែរ ។
- នៅតាមសួនសាធារណៈ ឬក្នុងទីប្រជុំជន គេមិនត្រូវចោលវត្ថុផ្សេងៗឱ្យរាត់រាយពាសពេញលើទីវាល ឬលើស្មៅ ដើមផ្កា

ដែលជាហេតុនាំឱ្យសៅហ្មងដល់សាធារណជននោះ ។

- ការបើកបរយានជំនិះផ្សេងៗ ត្រូវបន្ថយល្បឿនគោរពច្បាប់ចរាចរណ៍ បើកបរដោយការយោគយល់គ្នា ។

ឧទាហរណ៍ក្នុងអក្សរសិល្ប៍

- រឿងកុលាបប៉ៃលិន ចៅចិត្រជាមនុស្សដែលមានសុជីវធម៌ក្នុងការរស់នៅជាមួយគ្រួសារលោកហ្លួងរតនសម្បត្តិ ចេះដឹងការងារ ស្គាល់ខុសត្រូវ មានឫកពាសំដីសំដៅសមសួនទៅកាន់ចៅហ្វាយក៏ដូចជាកម្មករ ដែលទង្វើនេះចៅចិត្រត្រូវបានចៅហ្វាយនាយ ព្រមទាំងក្រុមកម្មករស្រឡាញ់ រាប់អានគ្រប់ៗគ្នា ។
- លោកបាល័ដ្ឋ និងចៅកែផាន់ ជាអ្នកមានអំណាច និងមានទ្រព្យសម្បត្តិស្តុកស្តម្ភ តែជាមនុស្សគ្មានសុជីវធម៌ ប្រព្រឹត្តអំពើថោកទាបទៅលើគ្រួសារលោកហ្លួង ទីបំផុតក៏ត្រូវអាម៉ាស់មុខ និងទទួលការព្រមានយ៉ាងចាស់ដៃ ។

- <u>សរុបសេចក្តី</u> : ដោយហេតុផលខាងលើនេះហើយបានជាគេចាត់ទុកថាសុជីវធម៌ជាគ្រឿងអលង្ការដ៏វិសេសវិសាល ជាស្នេហ៍មុខនៃមនុស្សជាតិ ។ អ្នកមានសុជីវធម៌ ទោះបីជាខ្លួនក្រខ្សត់ ជាកូននៃត្រកូលអត់ធនក៏ដោយ ក៏តែងបានការឧបត្ថម្ភគាំពារ ការយកចិត្តទុកដាក់ពីអ្នកផង ធ្វើឱ្យជីវិតមានកិត្តិយសថ្កើងថ្កានដែរ ។

## **គ. សេចក្តីបញ្ចប់**

- <u>វាយតម្លៃប្រធាន</u> : ទស្សនៈប្រធានខាងលើពិតជាមានតម្លៃដ៏ល្អ

វិសេសវិសាលសម្រាប់ឱ្យមនុស្សគ្រប់រូបយកគំរូតាម ។

- <u>មតិផ្ទាល់ខ្លួន</u>: កុំភ្លើតភ្លើននឹងវប្បធម៌បរទេសហួសហេតុពេក ត្រូវនាំគ្នាប្រព្រឹត្តកិរិយាមារយាទឱ្យមានសុជីវធម៌ ដើម្បីលើកតម្លៃកិត្យានុភាពខ្លួនឯងក៏ដូចជាសង្គមជាតិផងដែរ ។

## ប្រធានទី១៣



> ចូរបង្ហាញឱ្យឃើញថា "ក្នុងកាលៈទេសៈណាក៏ដោយ ការងារជាការចាំបាច់សម្រាប់សេចក្ដីថ្លៃថ្នូររបស់មនុស្ស សម្រាប់ពង្រីកអត្តបុគ្គលិកភាពរបស់គេ សម្រាប់សន្តិសុខនៃអនាគតរបស់គេ និងសម្រាប់បូរណភាពនៃប្រទេស"។

### គម្រោងតែង

### ក. សេចក្ដីផ្ដើម

- <u>លំនាំបញ្ហា</u> : ក្នុងការរស់នៅរបស់មនុស្សជាតិរាល់អង្គប្រាណ មនុស្សត្រូវមានការងារជាចាំបាច់ដើម្បីកសាងខ្លួន ក្រុមគ្រួសារ សង្គមជាតិរបស់ខ្លួន និងសាងអ្វីៗផ្សេងទៀតដែលមនុស្សត្រូវការយកមកធ្វើជាឧបករណ៍សម្រាប់ជីវិតរស់នៅបានសុខស្រួល ។
- <u>ចំណូលបញ្ហា</u> : "ក្នុងកាលៈទេសៈណាក៏ដោយ ការងារជាការចាំបាច់

សម្រាប់សេចក្ដីថ្លៃថ្នូររបស់មនុស្ស សម្រាប់ពង្រីកអត្តបុគ្គលិកភាពរបស់គេ សម្រាប់សន្តិសុខនៃអនាគតរបស់គេ និងសម្រាប់បូរណភាពនៃប្រទេស" ។

- <u>ចំណោទបញ្ហា</u> : តើការងារមានសារៈសំខាន់យ៉ាងណាខ្លះសម្រាប់មនុស្ស?

## ខ. តួសេចក្ដី

- <u>ឃ្លាភ្ជាប់សេចក្ដី</u>
- <u>ពន្យល់ពាក្យ</u>
  - ការងារ : កិច្ចការផ្សេងៗដែលមនុស្សត្រូវបំពេញឱ្យបានជាប្រចាំដើម្បីចិញ្ចឹមជីវិត ។
  - អត្តបុគ្គលិកភាព : ភាពជាបុគ្គលផ្ទាល់ខ្លួនម្នាក់ៗ ។
  - សន្តិសុខ : សុខដែលកើតអំពីសេចក្ដីស្ងប់ ។
  - បូរណភាព : ភាពពេញគ្រប់គ្រាន់ ឥតមានខ្វះចន្លោះ ។
- <u>ពន្យល់ន័យប្រធាន</u> : ការងារមានតម្លៃគ្រប់ពេលវេលា និងគ្រប់ទីកន្លែងក្នុងការលើកកម្ពស់សេចក្ដីសេចក្ដីថ្លៃថ្នូរ ភាពជាបុគ្គល សេចក្ដីសុខស្ងប់ និងភាពពេញលក្ខណៈរបស់មនុស្ស ។
- **បកស្រាយ**
  - ការងារជាគ្រឿងសម្រាប់សេចក្ដីថ្លៃថ្នូររបស់មនុស្ស..... មនុស្សបានសេចក្ដីថ្លៃថ្នូរព្រោះមានការងារធ្វើ ។
    - បុព្វបុរសខ្មែរបានប្រាសាទដ៏ធំៗនៅពាសពេញផែនដីក្នុងព្រះរាជាណាចក្រកម្ពុជាយើង ។ នេះហើយជាការងាររបស់ខ្មែរក្នុងអតីតកាល ហើយបានឱ្យតម្លៃភាពថ្លៃថ្នូរ និងការសរ-

សើរមិនដាច់ពីមាត់ពីជនបរទេសរហូតមកដល់បច្ចុប្បន្ន។

- នៅបច្ចុប្បន្នកាល ជនណាក៏ដោយដែលមានការងារ មានហត្ថកម្ម ពាណិជ្ជកម្មជាដើម ហើយបានសាងខ្លួន សាងទ្រព្យសម្បត្តិឱ្យបានច្រើន មានសល់ទុកដាក់ចែកចាយជាផលទាន សាងវត្ថុនានាទុកសម្រាប់សាធារណជនប្រើប្រាស់ សាងសាលារៀន មន្ទីរពេទ្យទុកសម្រាប់បម្រើយុវជនយុវនារី និងឧបត្ថម្ភអ្នកជំងឺគ្រប់ប្រភេទ ជននោះនឹងមានសុភមង្គល មិនបានទទួលការប្រមាថពីអ្នកដទៃ មិនថោកទាប អ្នកផងតែងពោលសរសើរតែងខ្លបខ្លាចជានិច្ច ជាពិសេស កេរ្តិ៍ឈ្មោះនឹងបានខ្ពស់ត្រដើតត្រដឹម មានក្លិនក្រអូបច្រាសខ្យល់ផ្សាយគ្រប់ទិសទី។
- ភាពថ្លៃថ្នូរនេះក៏ដោយសារតែខ្លួនបានបូជាកម្លាំងកាយដំណក់ញើសចំពោះធម្មជាតិប្តូរយកទ្រព្យសម្បត្តិ គឺខ្លួនធ្វើការងារដោយប្រឹងប្រែង មិនខ្ជិលច្រអូស....។

- ការងារជាគ្រឿងសម្រាប់ពង្រីកអត្តបុគ្គលិកភាពរបស់ខ្លួន៖ មានន័យថាមនុស្សមានបុគ្គលិកភាពរបស់ខ្លួន គឺលក្ខណៈបែបភាពសមរម្យ អវៈយវៈធាត់ធំមាំមួន រាងកាយស្អាតស្អំជាមនុស្សមានជាតិរសរបស់ខ្លួនល្អដោយសារការងារ។ អត្តបុគ្គលិកភាពនៃមនុស្សរាល់រូបដែលធម្មជាតិបានចែក បានតាក់តែងឱ្យមកមិនទាន់គ្រប់គ្រាន់នៅឡើយ ហើយនឹងមិនបានប្រែប្រួលរីកសាយទៅទៀតទេ បើមនុស្សយើងមិនបានផ្សំប្រមូលដោយធ្វើការងារ

ឱ្យចេញញើសអាក្រក់មេរោគចម្រៃពីខ្លួន ។

- ផ្ទុយទៅវិញ បើគេបានបញ្ចេញវត្ថុមិនស្អាតឱ្យអស់ពីសាច់ឈាម ដោយធ្វើការងារឱ្យសរសៃយឺត ខ្យល់ដើរស្រួល ឈាមរត់ល្អ គ្រានោះគេនឹងបានសុខកាយ មានមាឌនិងរូបសណ្ឋានសក្ដិសម ហើយនោះហើយដែលអត្តបុគ្គលិកភាពរីកចម្រើន កើតប្រាជ្ញាស្មារតីនិងគំនិតច្រើនយ៉ាងរឹងប៉ឹង អាចយកទៅអនុវត្តលើអ្វីៗដែលខ្លួនត្រូវការបានតាមប្រាថ្នាតទៅទៀត ។
- ការងារជាគ្រឿងសម្រាប់បង្កើតសន្តិសុខនៃអនាគតរបស់ខ្លួនជាលទ្ធផលដ៏ប្រសើរដែលបានកើតចេញមកពីការងារដែលមនុស្សបានធ្វើហើយនោះតែងផ្ដល់នូវភាពសុខស្រួលដល់មនុស្សវិញយ៉ាងពិតប្រាកដ ព្រោះថាទ្រព្យសម្បត្តិដែលគេបានសន្សំដោយការងារជាកម្លាំងកាយផ្ទាល់ រុក្ខផលដែលគេបានដាំផ្សាំភ្ញាស់រួចហើយ ស្រូវ ពោត សណ្ដែក...ដែលផ្លែផ្កាទុំពេញស្រែចំការគ្រឿងប្រើប្រាស់ក្នុងផ្ទះសម្លៀងមានគ្រប់គ្រាន់ គេនឹងបានសុខស្រួល មិនភ័យនឹងជនណាមកជិះជាន់ឬសង្កត់សង្កិន ព្រោះទ្រព្យនិងផលទាំងនោះគេបានមកដោយការងារផ្ទាល់ខ្លួន គឺដោយកម្លាំងកាយ ដោយញើសឈាមរបស់ខ្លួនយ៉ាងពិតប្រាកដ គេនឹងបានមានជីវភាពភ្លឺស្វាងក្នុងអនាគតកាល ព្រោះគេដេកសង្ឃឹមញញឹមទុកដោយនឹកឃើញជានិច្ចដល់ផលិតផលរបស់គេ នឹងផ្ដល់សុខសួស្ដីឱ្យគេយ៉ាងពិតប្រាកដ ។

- ដូចគ្នានេះដែរ ការងារជាគ្រឿងសម្រាប់បូរណភាពនៃប្រទេសទៀតផង ។
- ប្រសិនបើពលរដ្ឋក្នុងប្រទេសនីមួយៗមានការងារគ្រប់ៗគ្នាដើម្បីបង្កើនផលិតផលផ្សេងៗហើយ ប្រទេសនោះនឹងមានបូរណភាព គឺការពេញបរិបូណ៌ហូរហៀរ ដោយគ្រឿងប្រើប្រាស់ គ្រឿងស៊ីចុកគ្រប់យ៉ាង ។
- ប្រទេសណាក៏ដោយ បើមានបូរណភាពខាងគ្រឿងឧបភោគបរិភោគ ដែលជាសម្បត្តិ ដ៏វិសេសសម្រាប់ចិញ្ចឹមជីវិតខ្លួនហើយ ប្រទេសនោះនឹងប្រែពីអនារ្យប្រទេសទៅជាអារ្យប្រទេសយ៉ាងឆាប់រហ័ស ។ សេដ្ឋកិច្ចសម្បូណ៌ ពលរដ្ឋសប្បាយ តែសេដ្ឋកិច្ចនេះមិនមែនកើតមកពីអ្វីក្រៅពីការងារនោះឡើយ ។ ប្រទេសមានបូរណភាព ពលរដ្ឋមានមុខមាត់ក្នុងឆាកអន្តរជាតិយ៉ាងខ្ពស់ត្រដែតត្រដ្ឋូច ។

- <u>សរុបមតិ</u> : ការងារជាការចាំបាច់សម្រាប់មនុស្សរាល់រូប បើមានមនុស្សមានការងារធ្វើ គឺមនុស្សបានសុខសប្បាយ បានសុភមង្គលក្នុងការរស់នៅយ៉ាងពិតប្រាកដ ។ បើមនុស្សគ្មានការងារទេ នោះមនុស្សភាពនឹងប្រែក្លាយទៅជាភាពនៃសត្វតិរច្ឆានណាមួយដែលគ្មានការងារដែរនោះជាមិនខាន ។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ទស្សនៈរបស់ប្រធានពិតជាមានគុណតម្លៃវិសេសវិសាលណាស់សម្រាប់ឱ្យមនុស្សអនុវត្តតាម... ។

- មតិផ្ទាល់ខ្លួន : គប្បីខិតខំសិក្សារៀនសូត្រ និងធ្វើការងារជាប្រចាំទើបអាចដឹកនាំខ្លួននិងសង្គមឱ្យមានភាពថ្លៃថ្នូរនិងអភិវឌ្ឍ



## ប្រធានទី១៤



**តាមការសិក្សាអក្សរសិល្ប៍ខ្មែរគេចាត់ទុកថា “រឿងទុំទាវស្ថិតក្នុងចលនាអក្សរសិល្ប៍ខេមរនិយម”។ តើមានលក្ខណៈសម្គាល់ត្រង់ណាខ្លះដែលអាចបញ្ជាក់បាន? ចូរពន្យល់ឱ្យបានក្បោះក្បាយ។**

## គម្រោងតែង

### ក. សេចក្ដីផ្ដើម

- លំនាំបញ្ហា : លើកទិដ្ឋភាពរឿងទុំទាវមកបង្ហាញ។
- ចំណូលបញ្ហា : “រឿងទុំទាវស្ថិតក្នុងចលនាអក្សរសិល្ប៍ខេមរនិយម”។
- ចំណោទបញ្ហា : តើមានអំណះអំណាងយ៉ាងណាខ្លះ....?

### ខ. តួសេចក្ដី

- ឃ្លាភ្ជាប់សេចក្ដី
- ពន្យល់ពាក្យ

- ចលនាអក្សរសិល្ប៍ : ដំណើរ ឬចង្វាក់ ឬបែបផែនរបស់អក្សរ-សិល្ប៍។
- ខេមរនិយម : ការនិយមចូលចិត្ត ឬពេញចិត្តតាមបែបអ្វីៗជារបស់ខ្មែរ។

- <u>ពន្យល់ន័យប្រធាន</u> : រឿងទុំទាវស្ថិតក្នុងបែបផែន ឬដំណើរតាមបែបអ្វីៗជារបស់ខ្មែរ។
- **បកស្រាយ**

រឿងទុំទាវស្ថិតក្នុងចលនាខេមរនិយមនៅត្រង់ រឿងនេះបានបង្ហាញពី៖

- ផ្នត់គំនិត...
- ប្រពៃណី ទំនៀមទម្លាប់...
- ជីវភាពរស់នៅ...
- ប្រវត្តិសាស្ត្រ...
- អត្តសញ្ញាណ...

ឧទាហរណ៍៖

- ប្រវត្តិសាស្ត្រ៖ ការគ្រប់គ្រងសម័យលង្វែកជារបបរាជានិយមបុរាណ និយមអំណាចផ្តាច់ការ ទទួលបានសន្តិភាព និងភាពសុខសាន្ត។
- ភូមិសាស្ត្រ៖ បានបង្ហាញពីទីតាំងនិងឈ្មោះទីកន្លែង៖
    - រាជធានី : លង្វែក
    - ភូមិ ស្រុក ខេត្ត : បាភ្នំ ត្បូងឃ្មុំ ភូមិពោធិ៍ជើងខាល...

- ធម្មជាតិ : ព្រៃ មច្ឆា បក្សាបក្សី...

- ប្រពៃណី ទំនៀមទម្លាប់
  - ស្រី : ចូលម្លប់
  - ប្រុស : បួសរៀន
  - ការទុកដាក់កូនចៅ
  - ពិធីចែចូវ ស្តីដណ្តឹង រៀបអាពាហ៍ពិពាហ៍
  - រៀបការនៅផ្ទះខាងស្រី
  - មហាក្សត្រជ្រើសរើសស្នំឯក
- សិល្បៈ
  - ស្មូត្រ (ទុំ)
  - ផ្គុំប៉ី (ពេជ្រ)
  - សិប្បកម្ម : ធ្វើតោក ត្បាញរវៃ
  - ភ្លេងប្រពៃណី ភ្លេងការ
- ជំនឿ សាសនា
  - ព្រះពុទ្ធសាសនា : លោកសង្ឃទេសនា
  - ព្រាហ្មណ៍សាសនា : ប្រើមន្តអាគម គាថា (ទុំសូត្រមន្ត សារិកាលិនថោង)
  - ការបន់ស្រន់ : សច្ចា (នាងទាវ...)
- ការសិក្សាអប់រំ
  - កូនប្រុស : ត្រូវទៅរៀននៅវត្តអារាម

- កូនស្រី : ត្រូវរៀនវិជ្ជាមេផ្ទះ អប់រំចរិយាសម្បត្តិ (ចូលម្លប់)

- ផ្នត់គំនិត
  - ឱ្យតម្លៃកូនប្រុសលើចំណេះវិជ្ជា
  - គ្រួសារឱ្យតម្លៃទៅលើទ្រព្យសម្បត្តិ អំណាច បុណ្យសក្ដិ
  - ទស្សនៈអភិរក្សនិយមជ្រុល
- ជីវភាព
  - ប្រជាជនប្រកបមុខរបរទូទៅ មាន កសិកម្ម សិប្បកម្ម ពាណិជ្ជកម្ម
  - ព្រះសង្ឃ អ្នកជំនួញ សិល្បករ សិប្បកម្ម គ្រូ...
- គមនាគមន៍
  - ផ្លូវគោក : ប្រើរទេះគោ សេះ ថ្មើរជើង
  - ផ្លូវទឹក : ប្រើទូក...

- <u>សរុបមតិ</u> : ........រឿងទុំទាវស្ថិតនៅក្នុងចលនាអក្សរសិល្ប៍ខេមរនិយម។

## **គ. សេចក្ដីបញ្ចប់**

- <u>វាយតម្លៃប្រធាន</u> : ពិតជាមានតម្លៃ និងអត្ថន័យដ៏ជ្រាលជ្រៅ៖
  - បង្ហាញឱ្យឃើញពីតម្លៃរបស់រឿងទុំទាវ ដែលបានលើកយកមកបង្ហាញឱ្យឃើញពីវប្បធម៌ សង្គមធម៌ល្អ។
  - អប់រំដាស់តឿនឱ្យកូនខ្មែរទាំងអស់នាំគ្នាសិក្សាស្រាវជ្រាវ ស្វែង

យល់ពីអត្តសញ្ញាណជាតិខ្លួនច្បាស់លាស់។

- <u>មតិផ្ទាល់ខ្លួន</u>:

## ប្រធានទី១៥



**គេថា “រាជសម្បត្តិជាបំណងប្រាថ្នារបស់ព្រះមហាក្សត្រទូទៅ”។ ហេតុអ្វីបានជាតួអង្គក្នុងអក្សរសិល្ប៍ខ្មែរ ព្រះរាមក៏ដូចជាព្រះវេស្សន្តរ សុខចិត្តលះបង់រាជសម្បត្តិ ហើយចាកចេញពីនគរ? ចូរបកស្រាយឱ្យបានក្បោះក្បាយ។**

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : និយាយពីបំណងរបស់មនុស្សទូទៅ
- <u>ចំណូលបញ្ហា</u> : បញ្ចូលមតិប្រធាន
- <u>ចំណោទបញ្ហា</u> : តើ.........*(ចោទបែបពន្យល់)*...................?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>

- <u>ពន្យល់ពាក្យ</u>
  - រាជសម្បត្តិ : សម្បត្តិសម្រាប់ផែនដី សម្បត្តិរបស់ស្ដេច។
  - បំណងប្រាថ្នា : អ្វីៗដែលមនុស្សប៉ងចង់បាន។
- <u>ពន្យល់ន័យប្រធាន</u> : អំណាចគ្រប់គ្រងជាការចង់បានរបស់ស្ដេចគ្រប់អង្គ ក៏ប៉ុន្ដែព្រះរាមនិងព្រះវេស្សន្ដរបែរជាលះបង់អំណាចបែបនេះចោលទៅវិញ។
- **បកស្រាយ**

ក. រូបភាពអំណាចជាបំណងប្រាថ្នារបស់ស្ដេច

- មានអំណាចត្រួតត្រា
- ឥទ្ធិពលមហាសាល
- មានទ្រព្យសម្បត្តិស្ដុកស្ដម្ភ (មិនបាច់ខំប្រឹងរក)
- មានកិត្តិយស គេគោរព កោតខ្លាច
- មានសុភមង្គល

ខ. មូលហេតុ

\+ ព្រះរាម ព្រះវេស្សន្ដរ បែរជាយាងចូលព្រៃមិនទទួលយកអំណាចរាជសម្បត្តិ៖

១. <u>មូលហេតុព្រះរាមយាងចូលព្រៃ</u>

- គោរពមាតាបិតា
- ឲ្យតម្លៃទៅលើពាក្យសត្យជាងប្រពៃណីក្សត្រ
- បញ្ចៀសទំនាស់រវាងរាជវង្ស
- ឲ្យនគរទទួលបានសុខសាន្ដ មានវឌ្ឍនភាព

- ព្រះអង្គមានពុទ្ធិជ្រៅជ្រះ ពិសេស មានមនសិការជាតិ និង ការពិចារណាខ្ពស់

ឧទាហរណ៍៖

- ព្រះរាមបានធ្វើដំណើរចាកចេញពីព្រះនគរយាងចូលទៅក្នុងព្រៃ ដើម្បីបួសជាឥសីរយៈពេល១៤ឆ្នាំតាមការបណ្តេញរបស់ព្រះនាងកៃកេសី ដែលជំទាស់ដោយលើកយកពាក្យសត្យរបស់ព្រះបាទទសរថ កំណត់សន្យាលើករាជសម្បត្តិឲ្យរាជបុត្ររបស់ព្រះនាងកៃកេសីឡើងសោយរាជ្យមុនគេ ល្អិកណាច្បាំងឈ្នះព្រះអាទិត្យ។

២. <u>មូលហេតុព្រះវេស្សន្តរយាងចូលព្រៃ</u>

- ឲ្យតម្លៃលើលទ្ធិប្រជាធិបតេយ្យ
- គោរពឆន្ទៈរបស់ប្រជារាស្ត្រ
- មិនស្រឡាញ់អំណាច ព្រោះអំណាចជាប្រភពនៃអំពើបាប
- មិនបោះបង់ឧត្តមគតិក្នុងការធ្វើទាន
- បញ្ចៀសទំនាស់ក្នុងព្រះនគរ ចង់ឲ្យនគរទទួលបានសន្តិភាព
- ស្រោចស្រង់សត្វលោកឲ្យចាកផុតគ្រោះអវិជ្ជា និងទុក្ខវេទនាទាំងឡាយ។

ឧទាហរណ៍

- ព្រះវេស្សន្តរបានធ្វើដំណើរចាកចេញពីនគរចេតុត្តរចូលទៅព្រៃភ្នំគិរីវង្កត បួសជាឥសីតាមការបណ្តេញរបស់បណ្តារាស្ត្រអ្នកស្រី

ពិរាស្ត្រ មកពីព្រះអង្គបរិច្ចាគដំរីមង្គលឲ្យទៅនគរកល្និង្គរាស្ត្រ។ ម្យ៉ាងទៀតព្រះវេស្សន្តរមិនព្រមទទួលអំណាចពីមាតុលនគរ កាលព្រះអង្គស្នាក់នៅមួយរយៈ...។

- <u>សរុបមតិ</u> : អំណាចឬរាជសម្បត្តិជាបំណងរបស់ព្រះមហាក្សត្រ។ ប៉ុន្តែព្រះរាមនិងព្រះវេស្សន្តរស្ថិតនៅក្នុងត្រកូលស្ដេច តែបែរជាបោះបង់អំណាច ទ្រព្យសម្បត្តិ ដោយចង់ឲ្យព្រះនគរទទួលបានសន្តិភាពសុភមង្គល...។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : មតិរបស់ពិតជាមានតម្លៃ អត្ថន័យដ៏ជ្រាលជ្រៅ ដោយបានបង្ហាញឲ្យឃើញពីវីរភាពរបស់ព្រះរាមនិងព្រះវេស្សន្តរ ក៏ដូចជាអ្នកដឹកនាំដទៃទៀត។ ហើយម្យ៉ាងទៀតបានដាស់តឿនដល់អ្នកគ្រប់គ្រងទាំងអស់ឲ្យប្រកាន់នូវវីរភាពបែបនេះ។
- <u>មតិផ្ទាល់ខ្លួន</u>:

# ប្រធានទី១៦



**ទស្សនៈមួយបានថែងថា "ស្រី ស្រា ល្បែង និងបាបមិត្ត គឺជាអបាយមុខដែលនាំទៅរកការបាត់បង់នូវសុភមង្គល"។ ចូរពន្យល់ ដោយលើកឧទាហរណ៍ក្នុងសង្គមជាក់ស្ដែង និងក្នុងអក្សរសិល្ប៍មកបញ្ជាក់ឱ្យបានច្បាស់លាស់។**

## គម្រោងតែង

### ក. សេចក្ដីផ្ដើម

- <u>លំនាំបញ្ហា</u> : ...មនុស្សទូទៅសុទ្ធតែប្រាថ្នាចង់រស់នៅមានសុភមង្គល ....។
- <u>ចំណូលបញ្ហា</u> : "ស្រី ស្រា ល្បែង និងបាបមិត្ត គឺជាអបាយមុខដែលនាំទៅរកការបាត់បង់នូវសុភមង្គល"។
- <u>ចំណោទបញ្ហា</u> : តើការប្រព្រឹត្តអំពើអបាយមុខនាំឲ្យបាត់បង់នូវសុភមង្គលដូចម្ដេចខ្លះ?

### ខ. តួសេចក្ដី

- <u>ឃ្លាភ្ជាប់សេចក្ដី</u>
- <u>ពន្យល់ពាក្យ</u>

- បាបមិត្ត : មិត្តអាក្រក់
- អបាយមុខ : ហេតុដែលនាំមកនូវក្តីវិនាស
- សុភមង្គល :សេចក្តីសុខដ៏ប្រសើរទាំងផ្លូវកាយ និងផ្លូវចិត្ត

• <u>ពន្យល់ន័យប្រធាន</u> : ការនិយមស្រី ស្រា ល្បែង និងការមានមិត្តអាក្រក់ គឺជាប្រភពដែលនាំឲ្យវិនាសបាត់បង់នូវសេចក្តីសុខទាំងផ្លូវកាយ និងផ្លូវចិត្ត។

• **បកស្រាយ**

ក. ការលេងស្រី

- នាំឲ្យមានជំនក់ចិត្ត គិតចង់តែដើរលេង
- គ្មានទំនួលខុសត្រូវចំពោះភារកិច្ចជាប្តី ជាឪពុក
- គ្រួសារខ្វះភាពកក់ក្តៅ
- បង្កើតនូវអំពើហិង្សាក្នុងគ្រួសារ
- ចម្លងរោគដល់ប្រពន្ធកូន

ខ. ការសេពសុរា

- នាំឲ្យខាតបង់ទ្រព្យសម្បត្តិ
- ខូចចរិយាមាយាទ សណ្តាប់ធ្នាប់ បាត់បង់ស្មារតី
- ខាតបង់ពេលវេលាធ្វើការងារ
- បាត់បង់កិត្តិយស កេរ្តិ៍
- ខ្សោយប្រាជ្ញា ខូចសុខភាព អាយុខ្លី

ឧទាហរណ៍៖ រឿងតេជោយ៉ត ស្តេចសំរែសេពសុរាដែលបង្អកដោយជំទាវស្រែន្យ នាំឲ្យវង្វេងស្មារតី ត្រូវតេជោមាស

ចាប់យកទៅសម្លាប់...។

ខ. ការលេងល្បែង

- នាំឲ្យខាតបង់ទ្រព្យសម្បត្តិ
- បាត់បង់ភាពថ្លៃថ្នូរ
- មានជម្លោះវាយតប់គ្នា
- ក្លាយខ្លួនជាចោរ...

ខ. ការសេពគប់មិត្តអាក្រក់

- ក្លាយខ្លួនទៅជាមនុស្សញៀននឹងល្បែងស្រីស្រា ឆបោក លួចប្លន់ ញៀនថ្នាំ...
- ទទួលរងទុក្ខទោស (ជាប់គុក មានរបួស...)
- មានចិត្តកាចសាហាវ ច្រឡើសបើស
- មានគ្រោះថ្នាក់គ្រប់ពេល...

ឧទា. រឿងកុលាបប៉ៃលិន លោកហ្លួងរតនសម្បត្តិសេពគប់លោកបាឡាត់ជាមនុស្សអាក្រក់ នាំថៅកែផាន់ជាចោរមកប្លន់ផ្ទះ...។

- <u>សរុបមតិ</u> : បុគ្គលណាក៏ដោយ ឲ្យតែបានប្រព្រឹត្តនូវអំពើពាលាទាំង៤យ៉ាងនេះ មានស្រី ស្រា ល្បែង និងសេពគប់មិត្តអាក្រក់ រមែងនាំមកនូវក្ដីវិនាសអន្តរាយ ខូចកិត្តិយសកេរ្តិ៍ឈ្មោះ ពិសេសធ្វើឲ្យបាត់បង់នូវភាពថ្លៃថ្នូរ....។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : មតិរបស់ពិតជាមានតម្លៃ អត្ថន័យល្អសម្រាប់អប់រំ ..............................។
- <u>មតិផ្ទាល់ខ្លួន</u>

# ប្រធានទី១៧



**ពិភពលោករីកចម្រើន និងមានសន្តិភាពទៅបាន គឺអាស្រ័យវិទ្យាសាស្ត្រ និងសាសនាដើរទន្ទឹមគ្នាជានិច្ច។ ចូរបំភ្លឺដោយលើកយកឧទាហរណ៍នៅក្នុងអក្សរសិល្ប៍ និងសង្គមជាក់ស្តែងមកបញ្ជាក់។**

## គម្រោងតែង

## ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : វិទ្យាសាស្ត្រនិងសាសនាគឺជាផ្នែកដ៏សំខាន់របស់ពិភពលោក ដែលនាំឲ្យមនុស្សរស់នៅមានសេចក្តីសុខ...។
- <u>ចំណូលបញ្ហា</u> : .... "ពិភពលោករីកចម្រើន និងមានសន្តិភាពទៅបាន គឺអាស្រ័យវិទ្យាសាស្ត្រ និងសាសនាដើរទន្ទឹមគ្នាជានិច្ច"។
- <u>ចំណោទបញ្ហា</u> : តើវិទ្យាសាស្ត្រនិងសាសនាមានសារៈសំខាន់ដូចម្តេចខ្លះចំពោះពិភពលោក?

## ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>
- <u>ពន្យល់ពាក្យ</u>
    - សន្តិភាព : ភាពមានសេចក្តីសុខ គ្មានសង្គ្រាម។
    - វិទ្យាសាស្ត្រ : វិជ្ជាមួយប្រភេទ ដែលគេរកឃើញដោយការលៃ

ផ្សំ មានការផ្សំធាតុជាដើម ។

- សាសនា : ពាក្យបណ្ដាំ, ពាក្យផ្ដាំផ្ញើ, ពាក្យប្រៀនប្រដៅ, ការប្រៀនប្រដៅ។

- <u>ពន្យល់ន័យប្រធាន</u> : ការរីកចម្រើនរុងរឿង ហើយដែលពោរពេញទៅដោយសុខសន្តិភាពនោះ គឺអាស្រ័យទៅលើភាពរីកចម្រើននៃវិទ្យាសាស្ត្រ និងប្រតិបត្តិយ៉ាងត្រឹមត្រូវតាមផ្លូវសាសនា...។
- **បកស្រាយ**

ជាការពិតណាស់ តថភាពនៃពិភពលោកដែលមានលក្ខណៈរីកចម្រើនលូតលាស់គ្រប់ផ្នែកគ្រប់វិស័យទៅបាន គឺអាស្រ័យដោយសារតែកត្តាធំៗសំខាន់ៗពីរយ៉ាងគឺ៖

\+ <u>កត្តាជឿនលឿននៃវិទ្យាសាស្ត្រ</u>

- ជួយធ្វើឲ្យពិភពលោកមានសម្ភារៈប្រើប្រាស់សំបូរបែប...
- បានធ្វើឲ្យពិភពលោកមានការផ្លាស់ប្ដូរមុខមាត់ថ្មីជានិច្ច...
- បានធ្វើឲ្យការរស់នៅរបស់មនុស្សលោកកាន់តែមានលក្ខណៈល្អប្រសើរ តាមរយៈរបកគំហើញថ្មីៗនៃវិទ្យាសាស្ត្រដូចជា ការរកឃើញនូវឱសថសម្រាប់ព្យាបាលជំងឺ.... បច្ចេកវិទ្យា សម្ភារៈប្រើប្រាស់... សកលភាវូបនីយកម្ម មធ្យោបាយធ្វើដំណើរ... មធ្យោបាយទំនាក់ទំនង...។

ឧទាហរណ៍៖ សមិទ្ធផលនៃវិទ្យាសាស្ត្រទំនើបក្នុងសម័យបច្ចុប្បន្ន...

\+ <u>កត្តាសាសនា</u>

- បានអប់រំដុសខាត់ចិត្តគំនិតរបស់មនុស្សឲ្យប្រព្រឹត្តអំពើល្អដោយ កាយ វាចា ចិត្ត...
- ចេះយោគយល់អធ្យាស្រ័យគ្នា ស្រឡាញ់រាប់អាន មានមេត្តាករុណា ចំពោះគ្នាទៅមក...
- ស្រឡាញ់សន្តិភាព សេចក្តីសុខរបស់មនុស្សជាតិ មនុស្សធម៌
- ដោះស្រាយបញ្ហាដោយសន្តិវិធី អហិង្សា...
- ចូលរួមកសាងនូវសមិទ្ធផលរួម ប្រយោជន៍រួម...
- ចូលរួមកសាងនូវវប្បធម៌សន្តិភាព...

- <u>សរុបមតិ</u> : សរុបមក តាមការបកស្រាយខាងលើឃើញថាវិទ្យាសាស្ត្រ និងសាសនាត្រូវតែដើរទន្ទឹមគ្នាជានិច្ច មិនអាចមានមួយ ឬខ្វះមួយណាឡើយ។ ប្រសិនបើពិភពលោកមានតែវិទ្យាសាស្ត្រដែលរីកចម្រើន តែខ្វះនូវសាសនាដែលជាកត្តាបណ្តុះសីលធម៌រស់នៅរបស់មនុស្សក្នុងសង្គម នោះពិភពលោកនឹងទទួលរងនូវក្តីវិនាសអន្តរាយ។ ព្រោះវិទ្យាសាស្ត្រជាអាវុធមុខពីរ កាលណាបើគេគ្មានសីលធម៌ គ្មានការអប់រំ និងគ្មានសាសនា...។ បើមានតែសាសនា ហើយខ្វះវិទ្យា-សាស្ត្រ មនុស្សជាតិក៏ពិបាករស់នៅដែរ ព្រោះគ្មានសម្ភារៈសម្រាប់ប្រើប្រាស់.....។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ប្រធានប្រកបដោយខ្លឹមសារអប់រំ...
- <u>មតិផ្ទាល់ខ្លួន</u> : ដូច្នេះក្នុងនាមយើងជាមនុស្សថ្មី ជំនាន់បច្ចេកវិទ្យាជឿនលឿន...។

# ប្រធានទី១៨



**ទស្សនៈមួយពោលថា “អក្សរសិល្ប៍បានរួមវិភាគទានយ៉ាងសំខាន់សម្រាប់អប់រំបណ្តុះអ្នកអានឱ្យក្លាយទៅជាធនធានមនុស្ស”។ ចូរពន្យល់ឱ្យបានក្បោះក្បាយដោយលើកយកអក្សរសិល្ប៍នានាដែលបានសិក្សារួចមកបញ្ជាក់។**

## គម្រោងតែង

## ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : ក្នុងការអប់រំបណ្តុះបណ្តាលធនធានមនុស្ស គេមានមធ្យោបាយច្រើនយ៉ាង............។
- <u>ចំណូលបញ្ហា</u> : “អក្សរសិល្ប៍បានរួមវិភាគទាន យ៉ាងសំខាន់សម្រាប់អប់រំបណ្តុះអ្នកអានឲ្យក្លាយទៅជាធនធានមនុស្ស”។
- <u>ចំណោទបញ្ហា</u> : តើអក្សរសិល្ប៍បានរួមវិភាគទានបណ្តុះបណ្តាលធនធានមនុស្សយ៉ាងដូចម្តេចខ្លះ?

## ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>
- <u>ពន្យល់ពាក្យ</u>
  - រួមវិភាគទាន : រួមចំណែក

- ធនធានមនុស្ស : សំដៅយកមនុស្សមានលក្ខណៈល្អ សមជាពលរដ្ឋល្អ មានប្រយោជន៍សម្រាប់សង្គម និងជាទីសង្ឃឹមរបស់ប្រទេសជាតិ។

- <u>ពន្យល់ន័យប្រធាន</u> : អក្សរសិល្ប៍បានរួមចំណែកយ៉ាងសំខាន់ក្នុងការទូន្មានប្រៀនប្រដៅ ណែនាំមនុស្សឲ្យចេះកសាងខ្លួនឲ្យក្លាយជាមនុស្សមានលក្ខណសម្បត្តិល្អ ប្រកបដោយចំណេះដឹង សមត្ថភាព មានប្រាជ្ញាស្មារតី មានសីលធម៌ ជាគ្រឹះរឹងមាំរបស់ប្រទេសជាតិ។
- **បកស្រាយ**

អក្សរសិល្ប៍បានរួមចំណែកយ៉ាងសំខាន់សម្រាប់អប់រំបណ្ដុះអ្នកអានឲ្យក្លាយជាធនធានមនុស្សបានយ៉ាងប្រសើរ៖

- បណ្ដុះឲ្យមានមនសិការស្នេហាជាតិ ចេះស្រឡាញ់ជាតិ ឈឺចាប់ពីរឿងជាតិ មើលឃើញការជិះជាន់គ្រប់រូបភាព បង្កើតបានជាកំហឹងជាតិ រហូតហ៊ានតម្កល់ប្រយោជន៍ជាតិជាធំ។

  ឧទា. រឿងភូមិតិរច្ឆាន ជួន នៅ និងបក្សពួករួមអាវុធ ហ៊ានពលីជីវិតដើម្បីរើបម្រះចេញពីការគាបសង្កត់របស់បារាំង។
- បណ្ដុះឲ្យចេះធ្វើការវិភាគ មើលឃើញសង្គមនៅអន់ថយ មិនរីកចម្រើន ហ៊ានធ្វើការកែប្រែសង្គមពីអន់ថយឲ្យឈានទៅរកការរីកចម្រើន។

  ឧទា. រឿងគ្រូបង្រៀនស្រុកស្រែ គម្រោងការកែប្រែសង្គមលើវិស័យទាំងបួន មានសេដ្ឋកិច្ច សង្គមកិច្ច នយោបាយ និងវប្បធម៌
- បណ្ដុះឲ្យមានសីលធម៌ស្អាតស្អំ ស្រឡាញ់តែអំពើសុចរិត យុត្តិ-ធម៌។

ឧទា. រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់ សមសុខចិត្តក្រលំបាកវេទនា តែមិនធ្វើតាមអូសទាញរបស់សៅ។ សមស្រឡាញ់យុត្តិ-ធម៌ មិនបណ្ដេញកម្មករខ្មែរចេញពីរោងចក្រសាប៊ូ ហើយទទួលកម្មករចិន យួន ជំនួសឡើយ។

- បណ្ដុះឆន្ទៈប្រយុទ្ធក្នុងការរស់នៅ ចេះតស៊ូក្នុងជីវិត
ឧទា. រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់ សមខិតខំជំនះរាល់ឧបសគ្គ ដើម្បីរស់នៅ....

- បណ្ដុះសមត្ថភាពយល់ដឹងខ្ពស់ ចេះវិភាគបញ្ហាសង្គម
ឧទា. រឿងគូលីកំណែន លឹមមើលឃើញពីប្រភពនៃទុក្ខវេទនារបស់រាស្ដ្រ គឺបណ្ដាលមកពីការជិះជាន់ ការល្ងង់ខ្លៅ និងខ្សោយ។ ម៉ឹងមើលឃើញសង្គមពុករលួយ អយុត្តិធម៌ សុខចិត្តលះបង់តំណែងការងារម្ដាយ និងសង្សារចេញទៅតស៊ូក្នុងព្រៃ។

- បណ្ដុះឲ្យមានគំនិតជឿនលឿន និងមានទំនួលខុសត្រូវចំពោះទង្វើរបស់ខ្លួន។
ឧទា. រឿងចៅកែចិត្តចោរ ពូហំមានគំនិតជឿនលឿន ហ៊ានទទួលកំហុស សុខចិត្តជាប់គុក។

- បណ្ដុះឲ្យមានការរួមកម្លាំងគ្នា ចេះជួយគ្នានៅពេលមានធុរៈ
ឧទា. រឿងចៅកែចិត្តចោរ ផានីត សុខ មាន គង់ ទ្រី ចេះរួមកម្លាំងគ្នា ទាត់ចោលសំណូកចៅកែ និងស្វែងរកយុត្តិធម៌ឲ្យពូហំ, រឿងភូមិតិរច្ឆាន ទោះជាមានជីវភាពក្រីក្រ ក៏ប្រជាជនខ្មែរចេះចេញលុយកាក់ជួយចាប់មគ្គផលតាមកម្លាំងសទ្ធាចូលបុណ្យនាងតុំ ប្រពន្ធសុវណ្ណដែលបានលាចាកលោក។

- បណ្ដុះគំនិតមើលឃើញពីតម្លៃនៃគុណធម៌របស់មនុស្ស និងមិនឲ្យតម្លៃលើបុណ្យសក្ដិ ទ្រព្យសម្បត្តិ អំណាច។

ឧទា. រឿងគូលីកំណែន នាងហេង ពូស្វាយ មីងពត បាននាំគ្នាឲ្យតម្លៃលើគុណសម្បត្តិរបស់លឹម ហើយទាត់ចោលលោកចៅហ្វាយ។

- សរុបមតិ : អក្សរសិល្ប៍ពិតជាបានរួមចំណែកយ៉ាងសំខាន់ក្នុការអប់រំបណ្ដុះគំនិតអ្នកអាន និងអ្នកសិក្សាឲ្យមានមនសិការជាតិ ចេះស្រឡាញ់អំពើល្អរបស់មនុស្ស ស្អប់ខ្ពើមអំពើពុករលួយ ចេះតស៊ូក្នុងជីវិត ស្គាល់តម្លៃមនុស្ស......។

## គ. សេចក្ដីបញ្ចប់

- វាយតម្លៃប្រធាន : ប្រធានប្រកបដោយខ្លឹមសារអប់រំ...
- មតិផ្ទាល់ខ្លួន :

# ប្រធានទី១៩



មានទស្សនៈជាច្រើនបានលើកឡើងថា "ខ្មែរជាជនជាតិឥណ្ឌាទី២" តើទស្សនៈនេះត្រឹមត្រូវដែរឬទេ?

## គម្រោងតែង

## ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : ការសិក្សាប្រវត្តិសាស្ត្របង្ហាញថាប្រទេសកម្ពុជាធ្លាប់មានទំនាក់ទំនងជាមួយឥណ្ឌាតាំងពីសតវត្សទីមួយមកម្ល៉េះ គឺតាមរយៈព្រះបាទហ៊ុនទៀនដែលបានរៀបអភិសេកជាមួយព្រះនាងលីវយី បឋមក្សត្រខ្មែរ ។
- <u>ចំណូលបញ្ហា</u> : ទំនាក់ទំនងនេះធ្វើឱ្យខ្មែរទទួលអរិយធម៌ពីឥណ្ឌាមកជាច្រើន ដែលជាហេតុធ្វើឱ្យលេចចេញជាទស្សនៈថា "ខ្មែរជាឥណ្ឌាទីពីរ" ។
- <u>ចំណោទបញ្ហា</u> : តើទស្សនៈបែបនេះត្រឹមត្រូវឬទេ?

## ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u> : ជាបឋម មុននឹងវែកញែករកខុសត្រូវទៅលើទស្សនៈរបស់ប្រធាន យើងគប្បីស្វែងយល់ន័យនៃពាក្យថា "ឥណ្ឌាទីពីរ" ជាមុនសិន ។
- <u>ពន្យល់ពាក្យ</u>

- ឥណ្ឌាទី២ : ជាជនជាតិដែលបានកើតចេញពីជាតិឥណ្ឌាដើម។

- <u>ពន្យល់ន័យប្រធាន</u> : ទស្សនៈប្រធានមានន័យថា ជនជាតិខ្មែរជាជនជាតិដែលកើតចេញមកពីជនជាតិឥណ្ឌា។

- **បកស្រាយ**

ក. <u>មតិស្រប៖ ខ្មែរពិតជាឥណ្ឌាទី២មែន ព្រោះ៖</u>

- ខ្មែរកាន់សាសនារបស់ឥណ្ឌា (ព្រាហ្មណ៍សាសនា និងពុទ្ធ-សាសនា)
- ខ្មែរកាន់ទំនៀមទម្លាប់របស់ឥណ្ឌា (ទំនៀមទម្លាប់ប្រពៃណីរបបរាជានិយម បូជាសព កោរជុក...)
- ខ្មែរប្រើអក្សរសិល្ប៍ឥណ្ឌា (រឿងរាមាយណៈ រាមកេរ្តិ៍...)
- ខ្មែរប្រើភាសាឥណ្ឌា (ភាសាបាលី និងសំស្ក្រឹត)
- សំណង់ស្ថាបត្យកម្មបែបឥណ្ឌា (សំណង់ប្រាសាទលើភ្នំ លើខឿនខ្ពស់ៗ)
- ខ្មែរបានរត់ចេញពីឥណ្ឌា (ខ្មែរជាជនជាតិកាសេមៀរ)

❖ <u>សរុបមតិស្រប</u>៖ ខ្មែរពិតជាឥណ្ឌាទី២មែន។

❖ <u>សំណួរភ្ជាប់មតិផ្ទុយ៖</u> តើខ្មែរពិតជាឥណ្ឌាទី២ដូចគេថាមែនឬទេ?

ខ. <u>មតិផ្ទុយ៖ ខ្មែរមិនមែនជាឥណ្ឌាទី២ទេ ព្រោះ៖</u>

- កំណត់ហេតុរបស់លោក ជីវតាក្វាន់ ថាឥណ្ឌាចូលមកស្រុកខ្មែរក្នុងស.វ.ទី១ នៃគ.ស.។
- ខ្មែរនិងឥណ្ឌាធ្វើសង្គ្រាមនឹងគ្នាក្នុងស.វ.ទី១
- ខ្មែរមានទឹកដី មានអ្នកដឹកនាំច្បាស់លាស់ (ព្រះនាងសោមា ឬ

លីវយី ឬនាងនាគ ជាមេដឹកនាំនគរខ្មែរ)

- ឥណ្ឌាកាន់របបបិតាធិបតេយ្យ ឯខ្មែរកាន់របបមាតាធិបតេយ្យ
- ភាសាខ្មែរមានក្បួនច្បាប់ខុសពីឥណ្ឌា
- ភាសាខ្មែរស្ថិតក្នុងអំបូរខ្មែរមន ឯភាសាឥណ្ឌាស្ថិតក្នុងអំបូរឥណ្ឌូអឺរ៉ុប។
- តាមទស្សនៈរបស់លោក ជក អូលីវីយេ ថាជនជាតិខ្មែរមិនមែនជាជនជាតិចិន យួន ឬឥណ្ឌាទេ គឺជនជាតិខ្មែរបានកើតឡើងនិងរស់នៅលើជ្រោយឥណ្ឌូចិននេះតែម្តង...អំបូរមនខ្មែរកើតពីការផ្សំកាត់រវាងពួកមេឡានេស៊ីយាង និងពួកឥណ្ឌូនេស៊ីយាងដែលរស់នៅពាសពេញលើសុវណ្ណភូមិ...។
- អ្វីដែលមាន ខ្មែរគ្រាន់តែទទួលឥទ្ធិពលពីឥណ្ឌាតែប៉ុណ្ណោះ។

❖ <u>សរុបមតិផ្ទុយ</u>៖ ខ្មែរពិតជាមិនមែនឥណ្ឌាទី២ទេ។

គ. <u>មតិពិភាក្សា</u>

- មតិទី១ : មិនសមហេតុផល ជាទស្សនៈភាន់ច្រឡំ យល់ឃើញខុស។
- មតិទី២ : សមហេតុផល ព្រោះមានមូលដ្ឋានច្បាស់លាស់។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ទស្សនៈប្រធានមិនត្រឹមត្រូវទេ។
- <u>មតិផ្ទាល់ខ្លួន</u>



# ប្រធានទី២០



**មនុស្សមួយចំនួនគេឱ្យតម្លៃលើលុយ គេថា "មានលុយ គឺមានអ្វីៗមានទាំងអស់"។ តើមតិនេះត្រឹមត្រូវដែរឬទេ? ចូរពិភាក្សាដោយលើកយកអំណះអំណាងមកបញ្ជាក់។**

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : និយាយទាក់ទងនឹងតម្រូវការរបស់មនុស្សទូទៅ។
- <u>ចំណូលបញ្ហា</u> : " មានលុយគឺមានអ្វីទាំងអស់"។
- <u>ចំណោទបញ្ហា</u> : តើមតិខាងលើត្រឹមត្រូវដែរឬទេ?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>
- <u>ពន្យល់ពាក្យ</u>
  - លុយ : ជាក្រដាសប្រាក់សម្រាប់ចាយវាយផ្តោះប្តូរទំនិញសព្វសារពើ។
  - អ្វីៗទាំងអស់ : សំដៅលើវត្ថុប្រើប្រាស់សព្វបែបយ៉ាង។
- <u>ពន្យល់ន័យប្រធាន</u> : បានសេចក្តីថា មានក្រដាសប្រាក់សម្រាប់ចាយវាយ គឺមានវត្ថុប្រើប្រាស់សព្វសារពើ។

- **បកស្រាយ**
  - ❖ មតិស្រប : “<u>មានលុយគឺមានអ្វីៗទាំងអស់</u>”
    - ▪ លុយមានសារៈសំខាន់ណាស់ទាំងក្នុង៖

- ជីវភាពរស់នៅសមរម្យមានបាយម្ហូបហូបគ្រប់គ្រាន់ សម្លៀកបំពាក់ មានសម្ភារៈប្រើប្រាស់ទាន់សម័យ រថយន្ត ម៉ូតូ ម៉ាស៊ីនត្រជាក់... មានឱកាសដើរលេងកម្សាន្ត សប្បាយនានា
- ទីជម្រកតាមចំណង់ចំណូលចិត្តតាមធនធានដែលគេមាន (ផ្ទះ វីឡា...)
- ចំណេះដឹង មានលុយអាចរៀនសូត្របានវែងឆ្ងាយ
- ស្នេហា អាចរកនារីណាដែលគេពេញចិត្តធ្វើជាភរិយា ធ្វើជាស្រីកំណាន់...
- កិត្តិយស អាចឲ្យគេចូលប្រឡូកក្នុងការងារសង្គម រួមចំណែកសង់សាលារៀន មន្ទីរពេទ្យ ស្ពានថ្នល់ ធ្វើបុណ្យទាន អ្នកផងសរសើរគោរពស្រឡាញ់...។
- អំណាច អាចបញ្ជាបោកបញ្ឆោតប្រើប្រាស់មនុស្សឲ្យធ្វើអំពើល្អ អាក្រក់ ថោកទាប បានតាមតម្រូវការ...។

ឧទាហរណ៍ក្នុងសង្គម៖

- កសិករ កម្មករ ខិតខំធ្វើស្រែចម្ការ
- មន្ត្រីរាជការ យោធា
- ពាណិជ្ជករ ឧស្សាហករ អាជីវករ

ឧទាហរណ៍ក្នុងអក្សរសិល្ប៍៖

- រឿងចៅកែចិត្តចោរ : ចៅកែចិត្តចោរ ប៉ូលីស...
- រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់ : នាយសៅ ចៅកែ ហុក សេដ្ឋីនីកាន ម្ចាស់ស៊ីក្លូ...។
- រឿងកុលាបប៉ៃលិន : លោកហ្លួងរតនសម្បត្តិ

<u>សរុបមតិ</u> : ពិតដូចគេថា..........។

❖ មតិផ្ទុយ : <u>"មានលុយគឺមិនមែនមានអ្វីៗទាំងអស់ទេ"</u>

- លុយមិនមានសារៈសំខាន់អ្វីទេចំពោះ៖
  - សេចក្ដីស្លាប់ ដោយសារការស្លាប់មិនអាចតវ៉ាបាន។
  - សេចក្ដីស្នេហាបរិសុទ្ធមិនអាចប្ដូរនឹងលុយបានទេ។
  - ឧត្ដមគតិស្នេហាជាតិទោះដឹងថាស្លាប់ក៏មិនខ្លាច។
  - សេចក្ដីយុត្តិធម៌មិនក្បត់នឹងការពិត។
  - ចំណេះវិជ្ជាមិនអាចយកលុយទៅទិញបានទេនាំឲ្យសង្គម មិនរីកចម្រើន។
  - ច្បាប់ ដោយសារច្បាប់តំណាងឧត្ដមគតិរបស់មនុស្ស
  - សិទ្ធិសេរីភាព
  - សុភមង្គល
  - ប្រវត្តិសាស្ត្រ ព្រោះមិនអាចច្នៃការពិតបាន។

ឧទាហរណ៍ក្នុងសង្គម៖

- កសិករ កម្មករ រក្សាអត្តិភាពរបស់ខ្លួនបានយ៉ាងល្អ។
- មន្ត្រីរាជការ ប៉ូលីស យោធា គោរពតួនាទីរបស់ពួកគេបាន ប្រសើរណាស់
- ពាណិជ្ជករ ឧស្សាហករ អាជីវករ ក៏រក្សាតម្លៃរបស់ខ្លួន

បាន។

ឧទាហរណ៍ក្នុងអក្សរសិល្ប៍៖

- រឿងចៅកែចិត្តចោរ : ផានិត សុខ ទ្រី មាន គង់
- រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់ : សមមិនចូលដៃជាមួយសៅធ្វើចោរ
- រឿងផ្ការស្រពោន : នាងវិធារី
- រឿងគូលីកំណែន : ពូស្វាយ នាងហេង

<u>សរុបមតិផ្ទុយ</u> : ពិតដូចគេថា.......។

❖ <u>សំយោគមតិ</u> : មតិទាំងពីរសមរម្យដូចគ្នាព្រោះ៖

- លុយអាចកសាងសង្គមគ្រួសារ បុគ្គលឲ្យអភិវឌ្ឍន៍
- លុយអាចជះឥទ្ធិពលអាក្រក់ដល់សង្គម គ្រួសារ បុគ្គល បើគេឲ្យតម្លៃលុយខ្លាំងពេក។

ដូចនេះគេត្រូវប្រើប្រាស់លុយឲ្យសមស្របតាមច្បាប់ និងសីលធម៌សង្គម។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : មតិខាងលើមិនទាន់ត្រឹមត្រូវទេ ព្រោះការកសាងសង្គមត្រូវការលក្ខណៈសម្បត្តិ ឆន្ទៈ ការភ្ញាក់រឭកចំពោះឧត្តមគតិយុត្តិធម៌។
- <u>មតិផ្ទាល់ខ្លួន</u> : ត្រូវធ្វើជាពលរដ្ឋល្អដោយយកឧត្តមគតិយុត្តិធម៌ និងច្បាប់ជាធំ។

# ប្រធានទី២១



| |
|---|
| **បន្ទាប់ពីបានសិក្សារឿងចៅកែចិត្តចោរ មានមតិខ្លះយល់ថា "អ្នកនិពន្ធបញ្ចប់រឿងដោយឱ្យពូហំជាប់គុកតែម្នាក់ឯងដូច្នេះជាការត្រឹមត្រូវ"។ តើមតិនេះសមហេតុផលឬទេ? ចូរពិភាក្សាដោយលើកឧទាហរណ៍មកបញ្ជាក់។** |

## គម្រោងតែង

### ក. សេចក្ដីផ្ដើម

- <u>លំនាំបញ្ហា</u> : រឿងចៅកែចិត្តចោរ................ហំត្រូវជាប់គុក...។
- <u>ចំណូលបញ្ហា</u> : "................................................"
- <u>ចំណោទបញ្ហា</u> : តើមតិខាងលើត្រឹមត្រូវដែរឬទេ?

### ខ. តួសេចក្ដី

- <u>ឃ្លាភ្ជាប់សេចក្ដី</u> :
- <u>ពន្យល់ពាក្យ</u>
  - គុក : កន្លែងឃុំឃាំងអ្នកមានទោស។
- <u>ពន្យល់ន័យប្រធាន</u> : ពូហំជាប់គុកម្នាក់ឯងជាការត្រឹមត្រូវ។
- **បកស្រាយ**
  - ❖ មតិស្រប : <u>"បញ្ចប់រឿងឱ្យពូហំជាប់គុកតែម្នាក់ឯងជាការត្រឹម</u>

<u>ត្រូវ” ព្រោះ</u>៖

+ ប្រព្រឹត្តខុសច្បាប់

- សង្គមមានច្បាប់ដូចជា ច្បាប់ចរាចរ ច្បាប់ព្រហ្មទណ្ឌ...
- សីលធម៌ទូទៅដូចជា អមនុស្សធម៌...
- សីលធម៌ សាសនាដូចជា ធ្វើអំពើបាបកម្ម សម្លាប់ជីវិតអ្នកដទៃ លោភលន់ គ្មានការអភិវឌ្ឍ....

+ គិតប្រយោជន៍ស្វនតួ(ផ្ទាល់ខ្លួន និងគ្រួសារ)

+ បំផ្លាញទ្រព្យ... ជីវិតអ្នកដទៃ

+ បង្កឲ្យសង្គមជួបភាពអនាធិបតេយ្យ អសន្តិសុខ អត្ថិរភាព និងគ្មានការអភិវឌ្ឍ...

+ លួង់ខ្លោចាញ់បោកអ្នកដទៃ

+ លក់ឧត្តគតិដើម្បីប្រាក់ គឺធ្វើអំពើអាក្រក់ដោយចេតនា

+ ស្រាយបញ្ហាគ្រួសារក្នុងក្ដីលោភលន់ និងគ្មានការពិភាក្សាក្នុងគ្រួសារ។

ឧទាហរណ៍តាមដំណើររឿង៖

- ពូហំបើកឡានទៅបុកឡានថៅកែហុងលី នាំឲ្យមានអ្នករងរបួស និងស្លាប់ចំនួនបីនាក់ រួមទាំងខូតខាតរថយន្តផងដែរ។
- គាត់បានទម្លាក់កំហុសទៅលើពួកអ្នករងគ្រោះដូចជាថា៖ “ពួកវាស៊ិយ”។
- ពូហំធ្វើអំពើនេះដោយមិនបានពិភាក្សាជាមួយប្រពន្ធកូន និងម្ដាយ ព្រោះពេលប៉ូលីសមករកចាប់ មីងយ៉ានថា “រឿអ្វីគេរកចាប់...”។

- ពូហាំធ្វើការងាររកប្រាក់តាមបញ្ជាថៅកែដែលថាឲ្យមួយម៉ឺនរៀលដើម្បីយកទៅស្រាយបញ្ហាលំបាកក្នុងគ្រួសារដូចជា៖
  * ប្រពន្ធឈឺត្រូវការលុយទិញថ្នាំ
  * កូនត្រូវការលុយចូលរៀន
  * ម្តាយចាស់ជរាត្រូវការធ្វើបុណ្យ...
- ពោលគឺពូហាំធ្វើតាមបញ្ជាថៅកែដោយគ្មានការពិចារណា។....

• <u>សរុបមតិស្រប</u> : ការជាប់គុករបស់ពូហាំជាការត្រឹមត្រូវមែន។

❖ មតិផ្ទុយ : <u>“ការឲ្យពូហាំជាប់គុកតែឯងមិនត្រឹមត្រូវឡើយ ក្នុងនោះ ថៅកែក៏ត្រូវជាប់គុកដែរព្រោះ</u>៖
- មេក្លោងបង្កើតគំនិត និងឧបាយកលនេះ
- អ្នកបញ្ជា
- និយមអំពើអសកម្ម កេងប្រវ័ញ្ច ពុករលួយ មិនគោរពច្បាប់ ឲ្យតម្លៃលើប្រាក់(ឬលុយ)
- និយមអំពើអយុត្តិធម៌
- និយមអំពើប្រជាភិថុត បោកប្រាស
- បង្កការលំបាកដល់សង្គម និងប្រជាពលករតូចតាចដូចជា៖ មានភាពអនាធិបតេយ្យ អសន្តិសុខ អស្ថិរភាព គ្មានសុវត្ថិភាព និងគ្មានការអភិវឌ្ឍ...
- ពោលគឺគិតតែប្រយោជន៍ផ្ទាល់ខ្លួនជាធំ។

+ ឧទាហរណ៍តាមដំណើររឿងថៅកែចិត្តចោរ៖
- ថៅកែបានបង្គាប់ពូហាំឲ្យបើកឡានទៅបុកឡានថៅកែហុងលីដែលមានរបរដូចគ្នា ក្នុងខណៈដែលពូហាំត្រូវការប្រាក់សង្គ្រោះ

គ្រួសារ។

- ថៅកែបានឲ្យតម្លៃទៅលើអំពើអយុត្តិធម៌ និងលុយដូចគាត់ថា៖ "លើលោកនេះគ្មាននរណាប្រតិបត្តិយុត្តិធម៌បានឡើយ...។" "...លុយជាអាជ្ញាកណ្តាលកាត់សេចក្តីរវាងយុត្តិធម៌ ឬអយុត្តិ-ធម៌..."
- ថៅកែបានអួតប្រាប់គេពីគុណសម្បត្តិគាត់ដែលជួយជាតិដូចជា "នាយផានីតនោះជួយឲ្យមានការងារធ្វើ..." "រឿងអ្វីដែលរាជ-ការឲ្យជួយ មិនដែលខានទេ..."
- តាមសំដីផានីតចោទថៅកែថា៖ "ជាចោរប្លន់ជាតិមិនខ្លាចចូលដៃជាមួយបរទេសលក់ជាតិខ្មែរដើម្បីខ្លួនបានចំណេញឡើយ..."

• <u>សរុបមតិផ្ទុយ</u> : សរុបមក ថៅកែត្រូវជាប់គុកដែរ។

❖ <u>សំយោគមតិ</u>

- មតិស្របត្រឹមត្រូវម្យ៉ាង ព្រោះពូហំធ្វើខុសច្បាប់។
- មតិផ្ទុយត្រឹមត្រូវម្យ៉ាងដែរ ព្រោះថៅកែជាមេខ្លោង នាំឲ្យខុសច្បាប់។
- ជាការពិត ពូហំនិងថៅកែជាជនមានទោសត្រូវជាប់គុកដូចគ្នា ព្រោះបង្កវិបត្តិដល់សង្គម។

## គ. សេចក្តីបញ្ចប់

• <u>វាយតម្លៃប្រធាន</u> : ទស្សនៈប្រធានលើកឡើងខាងលើមានលក្ខណៈត្រឹមត្រូវ តែមិនទាន់គ្រប់ជ្រុងជ្រោយ ព្រោះបង្ហាញកំហុសតែអ្នកប្រព្រឹត្ត ឯអ្នកបញ្ជាហាក់ដូចលាក់លៀម។

• <u>មតិផ្ទាល់ខ្លួន</u> : ត្រូវនាំគ្នាគោរពច្បាប់។

# ប្រធានទី២២



**មានមតិខ្លះយល់ថា “ទស្សនៈនំមិនធំជាងនាឡិហួសសម័យសម័យហើយក្នុងសង្គមបច្ចុប្បន្ន”។ តើមតិនេះត្រឹមត្រូវដែរឬទេ? ចូរពិភាក្សាដោយលើកយកអំណះអំណាងមកបញ្ជាក់។**

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : ........................................................។
- <u>ចំណូលបញ្ហា</u> : “..................................................”
- <u>ចំណោទបញ្ហា</u> : តើមតិនេះត្រឹមត្រូវដែរឬទេ?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u> :
- <u>ពន្យល់ពាក្យ</u>
  - ទស្សនៈ : ការយល់ឃើញ។
  - នាឡិ : គ្រឿងសម្រាប់រង្វាស់រង្វាល់។
  - ហួសសម័យ : អ្វីៗដែលមិនជឿនលឿន ឬហួសកាលសម័យ។
- <u>ពន្យល់ន័យប្រធាន</u> : ការយល់និងឲ្យតម្លៃលើទស្សនៈនំមិនធំជាងនាឡិក្នុងសង្គមបច្ចុប្បន្ននេះគ្មានភាពជឿនលឿន និងការនិយមឡើយ។

- **បកស្រាយ**

❖ មតិស្រប : (សម្របតាមប្រធាន) ព្រោះ ទស្សនៈនំមិនធំជាងនាឡិ មានលក្ខណៈអវិជ្ជមានដូចជា៖

- បំបិទសិទ្ធិសេរីភាពបុគ្គល
- បង្កឲ្យមានទំនាស់វិបត្តិផ្សេងៗ
- ទុទិដ្ឋិនិយមច្រើន
- គ្មានការវិវត្ត និងរីកចម្រើន
- គ្មានសុភមង្គល

សម័យបច្ចុប្បន្នត្រូវការ៖ សម័យថ្មីបានផ្ដល់សិទ្ធិសេរីភាពគ្រប់គ្រាន់ពិសេសដល់យុវជន៖

- ជ្រើសរើសគូស្រករ
- បញ្ចេញមតិយោបល់
- ដើរហើរ
- សម្រេចចិត្ត៖ សិក្សា សុភមង្គល

\+ ឧទាហរណ៍

- តាមតថភាពសង្គមបច្ចុប្បន្ន
- ផ្ដល់ឲ្យយុវជនមានសិទ្ធិគ្រប់គ្រាន់ក្នុងការសម្រេចចិត្តដោយខ្លួនឯងក្នុងការជ្រើសរើសគូស្រករ
- ឪពុកម្ដាយ ឬអាណាព្យាបាលបានផ្ដល់សិទ្ធិសេរីភាពដល់កូនចៅ
- ច្បាប់ក៏បានចែងពីសិទ្ធិអាពាហ៍ពិពាហ៍
- ទំនៀមទម្លាប់ប្រពៃណីមានការបន្ធូរបន្ថយ ដោយសារមាន

ឥទ្ធិពលពីបរទេស

- សាសនាក៏ចូលរួមចំណែកកាត់បន្ថយមិនឲ្យមាតាបិតាប្រើអំណាចផ្តាច់ការបង្ខិតបង្ខំដល់កូនចៅ
- សង្គមទាំងមូលក៏បានផ្តល់សិទ្ធិដល់យុវជន
- បទពិសោធមិនល្អជាច្រើនជាមេរៀនជីវិតដល់អាណាព្យាបាល
- ស្នាដៃប្រលោមលោកជាច្រើនក៏បានបង្ហាញពីផលវិបាកនៃការអនុវត្តទ្រឹស្តីនំមិនធំជាងនាឡិដូចជារឿងទុំទាវ រឿងផ្កាស្រពោន

• តាមអក្សរសិល្ប៍

- រឿងទុំ ទាវ៖ ម្តាយទាវត្រូវបាត់បង់នាងទាវជាកូន ព្រោះតែគាត់មានះបំបែកនាងទាវពីទុំឲ្យទៅការជាមួយម៉ឺនងួន។
- រឿងផ្កាស្រពោន៖ យាយនួនជាម្តាយត្រូវព្រាត់នាងវិធាវីដោយនាងស្លាប់បាត់បង់ជីវិត ព្រោះនាងមិនស្រឡាញ់ចៅណៃស៊ិត។

• <u>សរុបមតិស្រប</u> : សរុបសេចក្តីមកទស្សនៈ "នំមិនធំជាងនាឡិ" ពិតជាមានលក្ខណៈហួសសម័យប្រាកដមែន។

❖ មតិផ្ទុយ

• គំនិតសំខាន់

មានមតិខ្លះជំទាស់ថា៖ ទស្សនៈ "នំមិនធំជាងនាឡិ" មិនទាន់ហួសសម័យនៅឡើយទេ ព្រោះ៖

- និយមយកមកប្រើប្រាស់ក្នុងគ្រួសារ
- តួនាទីក្នុងការគ្រប់គ្រងសុភមង្គល ឬអនាគតកូនចៅ
- វាមានឥទ្ធិពលធ្វើឲ្យទទួលផលវិជ្ជមាន៖
    - ▪ កិត្តិយស កេរ្តិ៍ឈ្មោះ

- ទ្រព្យសម្បត្តិ
- សុភមង្គល

- ពង្រឹងវិស័យសីលធម៌ក្នុងគ្រួសារ
- ឪពុកម្តាយ ឬអាណាព្យាបាលមានបទពិសោធន៍ច្រើន និងក៏ជាទីប្រឹក្សាដល់កូនចៅ។

ឧទាហរណ៍

- តាមតថភាពសង្គមឃើញមានបុគ្គល ឬយុវជន នារីមួយចំនួនដែលទទួលយកតាមដំបូន្មានឪពុកម្តាយ នាំឲ្យពួកគេមានអនាគត និងសុភមង្គល។
- ប៉ុន្តែមានយុវជន នារីខ្លះបែរជាទទួលផលអាក្រក់មកពីមិនស្តាប់ដំបូន្មានឪពុកម្តាយ។

- <u>សរុបមតិផ្ទុយ</u> : សរុបមកទស្សនៈ “មិនធំជាងនាឡិ” មិនទាន់ហួសសម័យទេ។

❖ សំយោគមតិ

- មតិទី១៖ ត្រឹមត្រូវម្យ៉ាង ព្រោះទស្សនៈនំមិនធំជាងនាឡិមានលក្ខណៈអភិរក្សជ្រុលបង្កផលអាក្រក់ច្រើន មិនស្របតាមគោលលទ្ធិប្រជាធិបតេយ្យ។
- មតិទី២៖ សមហេតុផលម្យ៉ាងដែរ ព្រោះទស្សនៈនេះជួយពង្រឹងប្រពៃណីរបស់ជាតិ ពិសេសខ្មែរយើង។

* ជាការពិតទស្សនៈបំបិទសិទ្ធិបុគ្គល ប៉ុន្តែវាជួយរក្សាការពារសីលធម៌ក្នុងគ្រួសារ ឬឈានទៅដល់ការបង្ហាញពីលក្ខណៈពិសេសនៃជាតិមួយដែរ។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ទស្សនៈប្រធានលើកឡើងខាងលើមានលក្ខណៈត្រឹមត្រូវម្យ៉ាង ព្រោះលើកបង្ហាញឲ្យឃើញពីតម្លៃនៃទស្សនៈបុរាណខ្មែរយើងសម្រាប់លើកយកមកពិចារណា និងអនុវត្តក្នុងជីវភាពដើម្បីទទួលបានជោគជ័យ។
- <u>មតិផ្ទាល់ខ្លួន</u>

# ប្រធានទី២៣



**មតិជាច្រើនយល់ថា “ពិភេកខឹងក្រុងរាពណ៍ជាបង រត់ទៅចុះចូលជាមួយព្រះរាម ជាអំពើក្បត់ជាតិ ឬអាចថាជាជនបំផ្លាញជាតិសាសន៍ខ្លួនឯង”។ តើមតិនេះត្រឹមត្រូវដែរឬទេ? ចូរពិភាក្សាដោយលើកឧទាហរណ៍ក្នុងរឿងមកបញ្ជាក់។**

## គម្រោងតែង

### ក. សេចក្ដីផ្ដើម

- លំនាំបញ្ហា : លើកពីសកម្មភាពពិភេកក្នុងរឿងរាមកេរ្ដិ៍មកបង្ហាញ។
- ចំណូលបញ្ហា : “ពិភេកខឹងក្រុងរាពណ៍ជាបង រត់ទៅចុះចូលជាមួយព្រះរាម ជាអំពើក្បត់ជាតិ ឬអាចថាជាជនបំផ្លាញជាតិសាសន៍ខ្លួនឯង”
- ចំណោទបញ្ហា : តើមតិខាងលើត្រឹមត្រូវឬទេ?

### ខ. តួសេចក្ដី

- ឃ្លាភ្ជាប់សេចក្ដី
- ពន្យល់ពាក្យ
  - ក្បត់ជាតិ : គឺប្រឆាំង និងបំផ្លាញជាតិ
  - ជាតិសាសន៍ : សំដៅលើអ្នកមានពូជអំបូរ កំណើតជាមួយគ្នា
- ពន្យល់ន័យប្រធាន : ទស្សនៈប្រធានលើកឡើងថា តាមរឿងរាមកេរ្ដិ៍បង្ហាញពីការដែលពិភេកទៅចុះចូលជាមួយព្រះរាម ចាត់ទុកជា

អ្នកប្រឆាំង និងបំផ្លាញអ្នកមានអំបូរពូជជាមួយគ្នានឹងជាតិខ្លួនឯង។

- **បកស្រាយ**

❖ មតិស្រប : ពិភេកបំផ្លាញជាតិសាសន៍ខ្លួនឯងជាអំពើក្បត់ជាតិ និងសាសន៍ឯង ព្រោះ៖

- គាត់ជាហោរាសាស្ត្រដ៏ពូកែ អាចដឹងអ្វីៗគ្រប់យ៉ាង បែរជាចូលមករួមជាមួយព្រះរាម
- ជាកម្លាំងមួយសំខាន់ធ្វើឲ្យព្រះរាមទទួលបានជោគជ័យ
- ជាអ្នកដឹង និងយកកិច្ចការផ្ទៃក្នុងជាតិជាអាថ៌កំបាំងបងប្អូនឯងប្រាប់ដល់ព្រះរាមដែលជាសត្រូវជាតិរបស់ខ្លួន។
- ប្រឹងប្រែងយកអស់កម្លាំងកាយ ចិត្ត បញ្ញា បម្រើព្រះរាមជាសត្រូវជាតិ ពោលគឺមានភក្តីជាតិខ្ពស់។
- គិតពីប្រយោជន៍ផ្ទាល់ខ្លួនជាធំ មិនគិតពីជាតិ និងប្រជាជនខ្លួន។
- ស្រឡាញ់អំណាច បុណ្យសក្តិ គឺចង់សោយរាជ្យជំនួសក្រុងរាពណ៍ពេលព្រះរាមច្បាំងឈ្នះ។
- ពោលគឺលក់ឧត្តមគតិ និងបំផ្លាញជាតិ ពូជសាសន៍ឯងគ្មានស្តាយស្រណោះ។
- ........(លើកឧទាហរណ៍ក្នុងរឿងបង្ហាញបន្ថែមទៀត)......

• <u>សរុបមតិស្រប</u> : សរុបមក...ដូចនេះពិតមែន។

❖ មតិផ្ទុយ : ការទៅចុះចូលជាមួយព្រះរាមរបស់ពិភេក ពុំមែនចាត់ទុកជាជនក្បត់បំផ្លាញជាតិ ពូជសាសន៍ឯងឡើយ គាត់ធ្វើដើម្បីសង្គ្រោះជីវិតខ្លួនឯងប៉ុណ្ណោះព្រោះ៖

- ត្រូវទទួលរងការមើលងាយនៅកណ្តាលជំនុំ និងរងការធ្វើទណ្ឌកម្ម។
- បណ្តេញពីនគរ ពេលស្រុកកំពុងកើតកលិយុគ។
- មើលឃើញពីសកម្មភាពបង ឬអ្នកដឹកនាំ(ក្រុងរាពណ៍) ប្រព្រឹត្តមិនត្រឹមត្រូវ៖ លួចប្រពន្ធគេ និយមសង្គ្រាម អត្តនោម័តផ្តាច់ការ។
- ចង់ផ្លាស់ការគ្រប់គ្រងថ្មី ពិសេសក្រោយពេលដែលព្រះរាមទទួលបានជោគជ័យ។
- ប្រសិនបើពិភេកមិនចុះចូលជាមួយព្រះរាម ក៏នគរលង្កាត្រូវវិនាសអន្តរាយដែរ ព្រោះព្រះរាមមកច្បាំងដណ្តើមយកនាងសីតា។
- ....(ឧទាហរណ៍ក្នុងរឿងរាមកេរ្តិ៍មកបង្ហាញបន្ថែមទៀត)...

• <u>សរុបមតិផ្ទុយ</u> : សរុបមក...ដូចនេះពិតមែន។

❖ សំយោគមតិ

- មតិទី១ ត្រឹមត្រូវម្យ៉ាង ព្រោះជាអំពើក្បត់ជាតិ
- មតិទី២ មិនទាន់ត្រឹមត្រូវ ព្រោះគិតពីប្រយោជន៍ខ្លួនឯងជាធំ។

ជាការពិតទោះបីមានទំនាស់ផ្ទៃក្នុងយ៉ាងណាក៏ដោយ ក៏មិនត្រូវចូលជាមួយសត្រូវរបស់ជាតិ និងបំផ្លាញជាតិឯងឡើយ។

## គ. សេចក្តីបញ្ចប់

• <u>វាយតម្លៃប្រធាន</u> : ទស្សនៈប្រធានមានលក្ខណៈត្រឹមត្រូវ ព្រោះជាអំពើក្បត់ជាតិ។

• <u>មតិផ្ទាល់ខ្លួន</u>

# ប្រធានទី២៤



ក្រោយពីបានសិក្សាអក្សរសិល្ប៍ខ្មែរ មានមតិខ្លះយល់ថា "ភក្តីភាពមានតម្លៃជាងជីវិត" ឯមតិមួយទៀតយល់ថា "ជីវិតមានតម្លៃជាងភក្តីភាព"។ តើមតិទាំងពីរនេះមួយណាត្រឹមត្រូវជាង? ចូរពិភាក្សាដោយលើកឧទាហរណ៍ក្នុងអក្សរសិល្ប៍មកបញ្ជាក់។

## គម្រោងតែង

### ក. សេចក្តីផ្តើម

- លំនាំបញ្ហា : លើកយកបញ្ហាជីវិត និងភក្តីភាពមកបង្ហាញ។
- ចំណូលបញ្ហា : យកមតិប្រធានមកបង្ហាញ។
- ចំណោទបញ្ហា : តើមតិណាមួយត្រឹមត្រូវជាង?

### ខ. តួសេចក្តី

- ឃ្លាភ្ជាប់សេចក្តី :
- ពន្យល់ពាក្យ
  - ភក្តីភាព : ភាពស្មោះត្រង់។
  - ជីវិត : ដំណើររស់នៅ។
- ពន្យល់ន័យប្រធាន : ទស្សនៈប្រធានលើកបង្ហាញនូវមតិពីរយល់ខុសគ្នា ដោយមតិទីមួយថា "ភាពស្មោះត្រង់មានតម្លៃជាងជីវិតមនុស្សម្នាក់ៗ" ឯមតិទី២ថា "ជីវិតមនុស្សម្នាក់មានតម្លៃមានតម្លៃជាងភាព

ស្មោះត្រង់”។

- **បកស្រាយ**

❖ មតិទី១ “ភាពស្មោះត្រង់មានតម្លៃជាងជីវិតមនុស្សម្នាក់ៗ”ព្រោះភក្ដីភាពជាប្រទីបនាំឲ្យជីវិតមានតម្លៃដូចជា៖

- គេស្រឡាញ់រាប់អាន
- គេគាំទ្រ គោរពជារៀងរហូត
- មានកិត្តិយស ឋានៈ បុណ្យសក្តិ...
- មានជីវភាពរីកចម្រើន
- សុខសាន្ត និងសុភមង្គល
- រឹងមាំ និងគង់វង្ស
- ដោយសារភក្ដីភាព គេអាចសុខចិត្តបូជាកម្លាំងកាយ ចិត្ត និងជីវិត។
- ប្រសិនបើគ្មានភក្ដីភាព គឺបណ្ដាលឲ្យជីវិតបាត់បង់តម្លៃ ពោលគឺត្រូវគេមើលងាយ ស្អប់ខ្ពើម...។

ឧទាហរណ៍៖

- រឿងរាមកេរ្តិ៍ ៖ ព្រះនាងសីតាមានភក្ដីភាពចំពោះព្រះរាមត្រូវបានគេជួយយកអាសារ (ដើរលុយភ្លើយមិនរលាក, ឥសីវិជ្ជប្រិតមុនីជួយចិញ្ចឹមបីបាច់...)
- រឿងទុំទាវ៖ ទុំ និងទាវស្មោះត្រង់ចំពោះគ្នា ប៉ុានសារភាពចំពោះព្រះភក្ត្រព្រះរាជាៗទ្រង់មានក្ដីមេត្តារៀបការឲ្យ។ នាងទាវស្មោះត្រង់នឹងទុំ ដោយសុខចិត្តធ្វើអត្តឃាតតាមទុំ បណ្ដាលឲ្យស្ដេចរាមាជួយរកយុត្តិធម៌...។

- រឿងគូលីកំណែន៖ នាងហេងស្មោះត្រង់ចំពោះលឹមជាគូដណ្ដឹង សុខចិត្តគេចមកភ្នំពេញ រហូតទទួលរងគ្រោះដល់ជីវិត។
- រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់៖ សមស្មោះត្រង់ចំពោះជាតិត្រូវទទួលបានកេរ្ដិ៍ឈ្មោះកិត្តិយសល្អ...។

• <u>សរុបមតិទី១</u> : .......ដូចនេះមែន។

❖ មតិទី២ "<u>ជីវិតមានតម្លៃជាងភក្ដីភាព</u>" ដោយសារជីវិត៖

- ប្រឹងប្រែងតស៊ូ កសាង និងការពារជីវិត ពោលគឺគេប្រើគ្រប់ឧបាយកល រហូតប៉ានក្បត់ឧត្តមគតិ មនសិការ គុណធម៌... ដោយធ្វើអំពើល្អអាក្រក់គ្រប់យ៉ាង...។
- គេខិតខំបង្កើតសម្ភារៈផ្សេងៗ ថ្នាំសង្កូវ...សម្រាប់ទ្រទ្រង់ជីវិត
- ម្យ៉ាងទៀត គេខិតខំស្វែងរកពុទ្ធិឲ្យបានជ្រៅជ្រះខ្ពង់ខ្ពស់ ឬលះបង់ទ្រព្យសម្បត្តិច្រើនលើសលប់ សុទ្ធតែដើម្បីការពារជីវិត។

ឧទាហរណ៍៖

- តាមរយៈរឿងរាមកេរ្ដិ៍៖

  \+ យក្សពិភេក ប្អូនក្រុងរាពណ៍ សុខចិត្តក្បត់បងប្អូន និងជាតិចូលបម្រើព្រះរាម មកពីចង់រក្សាជីវិត។

  \+ ស្វាសុគ្រីព ប្អូនរបស់ពាលីនៅនគរខាស់ខិនបុរីប៉ានសម្លាប់បងប្អូនឯងនិងជាតិ មកពីចង់រក្សាជីវិត។
- រឿងថៅកែចិត្តចោរ៖ ពូហំសុខចិត្តប្រព្រឹត្តអំពើខុសច្បាប់និងអមនុស្សធម៌ សម្លាប់អ្នកដទៃ ដើម្បីប្រាក់មួយម៉ឺនរៀលចិញ្ចឹមជីវិតគ្រួសារ។
- រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់៖ សមសុខចិត្តក្បត់ឧត្តម-

គតិ ឆក់កាបូបប្រាក់ប្រពន្ធឧកញ៉ាសម្បូរសម្បត្តិដើម្បីយកប្រាក់ទិញអាហារចម្អែតក្រពះ ព្រោះជីវិតជិតដាច់ពោះស្លាប់...។

- <u>សរុបមតិទី២</u> : .......ដូចនេះមែន។

❖ សំយោគមតិ

- មតិទី១ និងមតិទី២ ត្រឹមត្រូវដូចគ្នា ព្រោះទាំងភក្ដីភាព ទាំងជីវិតសុទ្ធសឹងតែមានតម្លៃ។
- ជាការពិតមនុស្សត្រូវចេះរក្សាជីវិតប្រកបដោយភក្ដីភាព និងគុណធម៌។

## គ. សេចក្ដីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : រវាងមតិទាំងពីរ យើងចាត់ទុកមតិទី២ ត្រឹមត្រឹម ឬមានអាទិភាពជាង ព្រោះ៖
  - បង្ហាញតម្លៃនៃជីវិតមនុស្ស
  - អប់រំមិនឲ្យប្រមាថ កាប់សម្លាប់ជីវិតមនុស្ស
- <u>មតិផ្ទាល់ខ្លួន</u>

# ប្រធានទី២៥



**ទស្សនៈអ្នកប្រាជ្ញបរទេសបានកំណត់ថា "រឿងរាមកេរ្តិ៍ខ្មែរចម្លងតាមរឿងរាមាយណៈឥណ្ឌា"។ ឯទស្សនៈខ្មែរយើងយល់ថា "រឿងនេះជាស្នាដៃរបស់បុព្វបុរសខ្មែរសុទ្ធសាធ"។ តើអ្នកយល់ដូចម្តេច? ចូរពិភាក្សា។**

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> :
- <u>ចំណូលបញ្ហា</u> : ......"រឿងរាមកេរ្តិ៍ខ្មែរចម្លងតាមរឿងរាមាយណៈឥណ្ឌា"។ ឯ........."រឿងនេះជាស្នាដៃរបស់បុព្វបុរសខ្មែរសុទ្ធសាធ"។
- <u>ចំណោទបញ្ហា</u> : តើមតិទាំងពីរខាងលើនេះណាមួយត្រឹមត្រូវជាង?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u> :
- <u>ពន្យល់ពាក្យ</u>
  - ចម្លងតាម : យកតាម ធ្វើតាមទាំងស្រុង សរសេរតាម។
  - ស្នាដៃបុព្វបុរស : អ្វីដែលកើតចេញពីមនុស្សខ្មែរជំនាន់ដើម។
- <u>ពន្យល់ន័យប្រធាន</u> : ខ្មែរមានស្នាដៃអ.សិ. រឿងរាមកេរ្តិ៍ ប៉ុន្តែស្នាដៃនោះ ត្រូវបានមនុស្សពីរក្រុមវាយតម្លៃខុសគ្នា គឺពួកជនបរទេសថា ខ្មែរ

សរសេរតាមឥណ្ឌា ចំណែកខ្មែរយើងអះអាងថា ស្នាដៃនោះកើតចេញពីស្នាដៃរបស់អ្នកប្រាជ្ញខ្មែរពិតៗ។

- **បកស្រាយ**
  - ❖ មតិទី១ "រឿងរាមកេរ្តិ៍ខ្មែរចម្លងតាមរឿងរាមាយណៈឥណ្ឌា" ៖
  - តាមប្រវត្តិសាស្ត្រ ព្រាហ្មណ៍នាមកោណ្ឌញ្ញចូលមកប្រទេសកម្ពុជាយើងតាំងពីដើមស.វ.ម៉្ល៉ះ បានរៀបការជាមួយស្តេចខ្មែរគឺព្រះនាងលីវយី។
  - សាសនា មានព្រះពុទ្ធសាសនា និងព្រហ្មញ្ញសាសនា។
  - វប្បធម៌ អរិយធម៌ខ្មែរទទួលឥទ្ធិពលពីឥណ្ឌាយ៉ាងច្រើន។
  - រឿងរាមកេរ្តិ៍៖
    - ▪ ប្រភពរឿង
      - • បម្រើសាសនាព្រាហ្មណ៍ ជាសាសនារបស់ឥណ្ឌា។
    - ▪ លក្ខណៈដែលថាចម្លង៖
      - • តួអង្គនៃរឿងទាំងពីរ
        - ឈ្មោះតួអង្គដូចគ្នា គឺព្រះរាម នងសីតា ព្រះបាទទសរថ ឥន្ទ្រជិត...
        - សកម្មភាពតួអង្គរាមកេរ្តិ៍ដូចឥណ្ឌា
          ឧទា. ព្រះរាមលើកធ្នូ ចេញបួស ត្រូវគេបំបរបង់រយៈពេល១៤ឆ្នាំ ព្រះរាមធ្វើសង្គ្រាមជាមួយក្រុងរាពណ៍យកនាងសីតាមកវិញ...។
        - ទីកន្លែង ភ្នំចិត្រកូដ នគរលង្កា...
        - រឿងរាមកេរ្តិ៍ខ្មែរគ្មានឈ្មោះអ្នកនិពន្ធ

- រឿងរាមយណៈកើតមុនរឿងរាមកេរ្តិ៍ឆ្ងាយណាស់។ ពិសេសមានលក្ខណៈអច្ឆរិយ និងលើកយកភាពអស្ចារ្យរបស់អាទិទេពតំណាងអវតារព្រះវិស្ណុ...។

▪ សរុបមតិទី១ : រឿងរាមកេរ្តិ៍ខ្មែរពិតជាចម្លងតាមរាមយណៈឥណ្ឌា។

▪ តើរឿងរាមកេរ្តិ៍ខ្មែរពិតជាចម្លងតាមរឿងរាមាយណៈឥណ្ឌាមែនដែរឬទេ?

❖ មតិទី២ "<u>រឿងរាមកេរ្តិ៍ខ្មែរជាស្នាដៃរបស់បុព្វបុរសខ្មែរសុទ្ធសាធ ព្រោះ រឿងរាមកេរ្តិ៍ខ្មែរខុសពីរាមាយណៈឥណ្ឌាត្រង់</u> ៖

ក. ផ្នែកអត្ថន័យ

- រឿងរាមយណៈ លើកតម្កើងព្រះរាមជាអាទិទេព(វិស្ណុ) ចុះមកដើម្បីសង្គ្រោះមនុស្សលោកឲ្យផុតពីការរាតត្បាតនៃពួកយក្ស។ ចំពោះនាងកៃកេសីក្នុងរឿងរាមាយណៈឥតមានកំហុស ឥតមានចិត្តលោភលន់ក្នុងការទាមទាររាជសម្បត្តិទេ។

- ចំណែករឿងរាមកេរ្តិ៍ខ្មែរវិញ ព្រះរាមជាតួអង្គមានលក្ខណៈជាមនុស្សសុទ្ធសាធ៖
    - ចេះប្រច័ណ្ឌ លេងសើច គំរាមកំហែង បោកបញ្ឆោត
    - លួចសម្លាប់(ពាលី)
    - មិនដឹងហេតុការណ៍ (ដូចកុម្ភការណ៍ច្បាំង)
    - ចេះយំសោក
    - ចរិតឆេវឆាវ (យកនាងសីតាទៅសម្លាប់ទាំងយប់)

- ឈ្លោះជាមួយកូនក្មេង ធ្វើពុតជាស្លាប់

- រាមកេរ្តិ៍ខ្មែរបានបញ្ចូលទ្រឹស្តីព្រះពុទ្ធសាសនា
  - ព្រះរាមធ្វើសកម្មភាពល្អ អ្នកនិពន្ធហៅពុទ្ធង្កុរ
- លើកយកទ្រឹស្តីពុទ្ធសាសនាមកនិយាយ...

ក. ផ្នែករូប

- ផ្តើមរឿង៖ បង្ហាញពីទេសភាពជុំវិញអាស្រមឥសីពិស្វាមិត្រ
- សាច់រឿង៖ រឿងរាមកេរ្តិ៍មានចំនួន៨០ខ្សែ ឯរាមាយណៈមានតែ៧កាន្ទ។
- បញ្ចប់រឿង៖ រឿងរាមាយណៈ ព្រះរាមមានជ័យជំនះ បានឡើងឋានសួគ៌វិញ។ ឯរឿងរាមកេរ្តិ៍ខ្មែរវិញ ព្រះរាមស្ថិតនៅឋានមនុស្ស ហើយជាប់ជំពាក់នឹងនាងសីតាដែលពុំព្រមស្រឡាញ់ព្រះអង្គវិញ។

ក. ផ្នែកអត្ថរស

- រឿងរាមកេរ្តិ៍ខ្មែរមានតថរស និងសង្គមរស។ វិបត្តិទំនាស់តួអង្គមានភាពតឹងតែង ធូរស្រាល មានចាញ់ មានឈ្នះបង្កើតជាតម្លៃមួយទៀត គឺនាដ្យរស។
- ចំណែករឿងរាមាយណៈស្ថិតក្នុងអច្ឆរិយរសដែលជាតម្លៃអស្ចារ្យ...។

▪ សរុបមតិទី២ : លក្ខណៈខុសគ្នារវាងរាមយណៈ និងរាមកេរ្តិ៍ ទាំងអត្ថន័យ អត្ថន័យ និងអត្ថរស មិនកំណត់ថា រឿងរាមកេរ្តិ៍ចម្លងតាមរាមយណៈឡើយ។

❖ មតិពិភាក្សា

- មតិទី១ដែលលើកឡើងហាក់ដូចជាសមហេតុផលម្យ៉ាងដែរ ព្រោះឥណ្ឌាគេមានរឿងរាមាយណៈ ហើយដំណើររឿងខ្មែរប្រហាក់ប្រហែលឥណ្ឌា....។
- ឯមតិទី២ ចាត់ទុកថាត្រឹមត្រូវ ព្រោះរឿងរាមកេរ្តិ៍ខ្មែរបង្ហាញ ពីទំនោររបស់ខ្មែរ ដែលនិយមពីការពិត។ ការពិតរឿងរាមកេរ្តិ៍ខ្មែរកើតចេញពីស្នាដៃរបស់បុព្វបុរសខ្មែរ ព្រោះខ្មែរបាននីយកម្មមកជាខ្មែរសុទ្ធសាធ...។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : មតិទី១ ជាមតិយល់ច្រឡំ ដែលមានគំនិតចង់បន្ទាបបន្ថោកវប្បធម៌ជាតិគេ ⇨ ជាទស្សនៈពុំត្រឹមត្រូវ។
- <u>មតិផ្ទាល់ខ្លួន</u> : នៅពេលមានការរិះគន់ពីពួកបរទេស ខ្មែរយើងត្រូវមានសេចក្តីក្លាហាន ហ៊ានពន្យល់គេឲ្យបានច្បាស់លាស់អំពីតម្លៃជាតិ។ យើងត្រូវមានមនសិការជាតិ លើកតម្លៃជាតិ មានជំហរជាតិនិយម។

# ប្រធានទី២៦



**អក្សរសិល្ប៍ពុទ្ធនិយមប្រើវិធីអប់រំពីរយ៉ាង គឺការទូន្មានប្រដៅឱ្យធ្វើល្អតាមទ្រឹស្តីពុទ្ធលទ្ធិ និងការបន្លាចដោយវិធីបង្ហាញនូវទោសទណ្ឌកម្មឬបាបកម្មយ៉ាងធ្ងន់។ តើអ្នកយល់ដូចម្តេច? ចូរពិភាក្សាដោយរកឧទាហរណ៍ក្នុងអក្សរសិល្ប៍ និងក្នុងសង្គមមកបញ្ជាក់ផង។**

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : លើកទ្រស្តីពុទ្ធសាសនាមកបង្ហាញ។
- <u>ចំណូលបញ្ហា</u> : ហេតុនេះ “..........................”។
- <u>ចំណោទបញ្ហា</u> : តើ.....ត្រឹមត្រូវដែរឬទេ?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>
- <u>ពន្យល់ពាក្យ</u>
  - ទ្រឹស្តីពុទ្ធលទ្ធិ : គោលការណ៍ដែលពន្យល់ប្រាប់ដំណើរទំនងត្រូវធ្វើនៃពុទ្ធសាសនា។

- បន្លាច : ធ្វើឲ្យខ្លាចដោយអាការគួរស្ញើប។
- ទណ្ឌកម្ម : ការធ្វើទោសតាមដំណើរធ្វើខុស។
- បាបកម្ម : អំពើអាក្រក់។

- <u>ពន្យល់ន័យប្រធាន</u> : អក្សរសិល្ប៍ពុទ្ធនិយមប្រើវិធីអមរំដោយលើកយកទ្រឹស្ដីពុទ្ធសាសនាមកប្រដៅផង និងបង្ហាញពីការធ្វើទោសទណ្ឌផ្សេងៗឲ្យមនុស្សខ្លាចផង.....។
- **បកស្រាយ**

❖ មតិទីស្រប <u>អក្សរសិល្ប៍ពុទ្ធនិយមប្រើវិធីអប់រំពីរយ៉ាង គឺ</u> ៖

<u>បែបទី១ : "ការទូន្មានប្រដៅឲ្យធ្វើល្អតាមទ្រឹស្ដីពុទ្ធលទ្ធិ"</u> ៖

- ធ្វើឲ្យមនុស្សចេះពិចារណារកហេតុផល ល្អអាក្រក់តាមបញ្ញាផ្ទាល់ ហៅថាវិចារណាវិធី។
- បង្ហាញថា ការប្រព្រឹត្តល្អដោយកាយ វាចា ចិត្ត តែងផ្ដល់នូវផលល្អ។
- ការមានមេត្តា ករុណាធម៌ ជាបុណ្យកុសលដ៏វិសេសណាស់។
- ការចេះអត់ឱន មិនប្រើហិង្សា នាំឲ្យមនុស្ស និងសង្គមមនុស្សបានសេចក្ដីសុខ មានសន្តិភាព។

<u>ឧទាហរណ៍ក្នុងអក្សរសិល្ប៍</u>

+ <u>រឿងមហាវេស្សន្តរ</u>
  - តែងធ្វើទានជាទ្រព្យផ្សេងៗរហូតដល់មហេសី បុត្រទាំងពីរ។
  - មិនប្រទូស្ដរាយចំពោះអ្នកនគរស្រីពិរាស្ត្រដែលបានបណ្ដេញព្រះអង្គ។

- ទង្វើល្អនេះនាំឲ្យព្រះអង្គបានវិលចូលនគរវិញ ហើយបន្តការធ្វើទានរហូតអស់ព្រះជន្ម និងបានសរជាតិជាព្រះពុទ្ធ។

+ <u>រឿងព្រះតេមិយ</u>

- ទ្រាំធ្វើគ ថ្លង់ ខ្វិនខ្វង់ និងការពិសោធផ្សេងៗរហូត១៦ឆ្នាំ។
- ព្រះអង្គសម្រេចបាននេក្ខម្ម និងធ្វើឲ្យព្រះបិតា មាតា ស្រីស្នំនាម៉ឺន អ្នកផ្សារ ព្រមទាំងស្ដេចសាមន្តរាជបីប្រទេសលែងប្រទូស្តរាយ ហើយសាងផ្នួសទាំងអស់គ្នា។

+ រឿងសុវណ្ណសាម

- មានកតញ្ញូតាធម៌ចំពោះមាតាបិតា។
- មិនខឹងចំពោះអ្នកលបប្របហារ គឺមានអធ្យាស្រ័យចំពោះព្រះបាទបិលយក្ខ។
- ទីបំផុត ផលល្អនេះបណ្ដាលឲ្យសុវណ្ណសាមរស់រានមានព្រះជន្មវិញ។

<u>ឧទាហរណ៍ក្នុងសង្គម</u>

- ប្រជាពលរដ្ឋខ្មែរដែលជាពុទ្ធបរិស័ទមានជំនឿថា ការធ្វើបុណ្យទាននឹងទទួលបានអានិសង្សខ្ពស់ ដូចជាសប្បុរសជនមានសទ្ធាជ្រះថ្លា ដោយ៖
  - កសាងស្ពាន ថ្នល់ សាលារៀន មន្ទីរពេទ្យ វត្តអារាម ស្រះ អណ្ដូង...។
  - ផ្ដល់នូវអំណោយផ្សេងៗជាគ្រឿងឧបភោគបរិភោគដល់ជនក្រីក្រខ្វះខាតទូទៅ។

- ទង្វើនេះនាំឲ្យបានទៅកើតនៅសុគតិភពក្នុងអនាគតជាតិ។

<u>បែបទី២ : “ការបន្ទាចដោយវិធីបង្ហាញទោសទណ្ឌកម្ម ឬបាបកម្មយ៉ាងធ្ងន់</u>” ៖

ធ្វើឲ្យមនុស្សតក់ស្លុត ភិតភ័យចំពោះអំពើអាក្រក់ ហើយបែរទៅប្រព្រឹត្តអំពើល្អវិញ គឺប្រើអច្ឆរិយវិធី ដូចជាការលើកបង្ហាញ៖

- កម្មល្អឲ្យផលល្អ កម្មអាក្រក់ឲ្យផលអាក្រក់។
- មនុស្សជាអ្នកសាងកម្មដោយខ្លួនឯង ហើយត្រូវទទួលផលពីកម្មនោះដោយខ្លួនឯង គ្មាននរណាទទួលជំនួសបានទេ។
- កម្មល្អនិងកម្មអាក្រក់ពុំអាចលុបលាងបានឬទូទាត់គ្នាបានឡើយ។
- ផលនៃកម្មមិនសាបសូន្យទេ គ្រាន់តែការទទួលផលបានឆាប់ ឬយូរ។
- កម្មខ្លះផ្ដល់ផលភ្លាមៗក្នុងជាតិនេះ។
- កម្មខ្លះផ្ដល់ផលក្នុងជាតិខាងមុខបន្ទាប់ពីជាតិនេះ។
- កម្មខ្លះផ្ដល់ផលក្នុងជាតិជាលំដាប់មិនចេះចប់។

<u>ឧទាហរណ៍ក្នុងអក្សរសិល្ប៍</u>

+ <u>រឿងពុទ្ធិសែននាងកង្រី</u> : (នាងដប់ពីរ)
  - នាងបងទាំង១១ដោតភ្នែកត្រីទាំងសងខាង ត្រូវខ្វាក់ទាំងពីរ។
  - នាងពៅដោតភ្នែកត្រីតែម្ខាងត្រូវគេគ្លុះភ្នែកតែម្ខាងដែរ។
+ <u>រឿងចៅស្រទបចេក</u>
  - ម្ដាយស្រទបចេកពីអតីតជាតិបានប្រើល្បិចវាយធ្វើបាបតាបសក៏ត្រូវនាយឆ្មាំទ្វារវាយទាល់តែស្លាប់។

- ចៅស្រទបចេកពីអតីតជាតិបានសម្រាតលោកសង្ឃជាល្បែងមួយភ្លែតក៏ត្រូវស្លៀកស្រទបចេកនិងកំណាត់កន្ទបសំពត់១២ឆ្នាំ។

+ រឿងសុភមិត្រ

- ស្តេចសុភមិត្រកាលពីអតីតជាតិបានយកកូនសេកឲ្យកូនលេងនិងដកស្លាបអស់បីសរសៃត្រូវរងកម្មព្រាត់ប្រាសមហេសីបុត្រអស់រាប់ឆ្នាំ។

<u>ឧទាហរណ៍ក្នុងសង្គម</u>

- ប្រជាពលរដ្ឋខ្មែរដែលជាពុទ្ធបរិស័ទមានជំនឿថា ការធ្វើអំពើអាក្រក់ បាបកម្មនឹងត្រូវធ្លាក់ទៅនរកអវចីក្នុងអនាគតជាតិ។

➢ សរុបមតិស្រប : អក្សរសិល្ប៍ពុទ្ធនិយមពិតជាប្រើវិធីអប់រំពីរយ៉ាងមែន។

❖ មតិផ្ទុយ : <u>អក្សរសិល្ប៍ពុទ្ធនិយមប្រើវិធីអប់រំពីរយ៉ាងខាងលើពុំទទួលផលស្មើគ្នា ឬមានតម្លៃដូចគ្នា ឬក៏មិនមែនជាវិធីដ៏ល្អគ្រប់គ្រាន់ទេ</u> ព្រោះ៖

- បុគ្គលខ្លះមិនមានជំនឿថា ធ្វើអំពើល្អ កុសល បានឡើងឋានសួគ៌។
- បុគ្គលខ្លះមិនជឿថា ធ្វើអំពើអាក្រក់ អកុសល ចុះនរកឡើយ។
- បញ្ញវ័ន្ត អ្នកចេះដឹងច្រើនពុំអាចកោតខ្លាចតក់ស្លុតចំពោះអច្ឆរិយភាព។
- អ្នកមានកម្រិតវប្បធម៌ទាប អវិជ្ជាពុំអាចយកវិចារណវិធីទៅអនុវត្តដែរ។

<u>ឧទាហរណ៍ក្នុងអក្សរសិល្ប៍</u>

+ <u>រឿងចៅស្រទបចេក</u>

- នាយឆ្មាំទ្វារដែលវាយម្តាយស្រទបចេករហូតដល់ស្លាប់ អនាគតជាតិមិនធ្លាក់ទៅនរកសោះ។
- តាបសដែលជាក្មេីរបស់ប្តីនាងម្តាយស្រទបចេកក្នុងអតីតជាតិ ធ្វើអំពើល្អ ក៏មិនឃើញឡើងឋានសួគ៌ ឬកើតជាអ្វីក្នុងជាតិថ្មី។

+ <u>រឿងសុភមិត្រ</u>

- នាយព្រាននេសាទដែលយកជ័យទត្ត ជ័យសែនបំបែកពីមាតា ក៏មិនដឹងជាទៅឋានសួគ៌ឬឋាននរក។
- នាយភេត្រាដែលចាប់ព្រះនាងកេសនីទៅឃុំឃាំង និងតាមថៃចង់ព្រះនាងធ្វើជាភរិយារាប់ឆ្នាំ ព្រមទាំងចាប់ជ័យទត្ត ជ័យសែន ឲ្យទៅស្តេចធ្វើទុក្ខទោសថាបានរំលោភភរិយារបស់ខ្លួន (ព្រះនាងកេសនី) មិនដឹងជាត្រូវចុះនរក ឬឡើងឋានសួគ៌។

+ <u>រឿងសុវណ្ណសាម</u>

- ព្រះបាទបិលយក្ខដែលបានបាញ់សម្លាប់សុវណ្ណសាម ហើយខិតខំកាន់ធម៌ បែរជាបានឡើងឋានសួគ៌ ខុសពីទ្រឹស្តីថាកម្មល្អអាក្រក់មិនអាចទូទាត់គ្នាបានទេ។

<u>ឧទាហរណ៍ក្នុងសង្គម</u>

- អ្នកធ្វើបុណ្យទាន ដូចជាកឋិន និងបានចូលរួមហែទៅកាន់ទីអារាម បែរជាជួបគ្រោះថ្នាក់ស្លាប់ដោយលិចនាវាឬគ្រោះថ្នាក់ចរាចរណ៍។
- មនុស្សអន្ធពាលបែរជាមានអាយុវែង ទោះជាត្រូវជាប់គុកក៏

មិនព្រមរាងចាល ពេលរួចពីទុក្ខទោសក៏ទៅប្រព្រឹត្តអាក្រក់ដដែល។

❖ សំយោគមតិ

- ដើម្បីធ្វើឲ្យការអប់រំមានលក្ខណៈល្អគ្រប់គ្រាន់ មានប្រយោជន៍ចំពោះមនុស្សទូទៅ យើងគប្បីលើកយកវិធីមួយទៀតដែលជាការសំយោគរវាងវិធីទាំងពីរ គឺវិទ្យាវិធី ឬបច្ចេកវិធី។
- វិទ្យាវិធី ឬបច្ចេកវិធី ជាវិធីដែលប្រែប្រួលទៅតាមលក្ខណៈមនុស្ស និងសភាពជាក់ស្តែង ហើយនាំមកនូវគុណធម៌ សីលធម៌ មនសិការ ឧត្តមគតិ ធ្វើឲ្យកើតសេចក្តីសុខសាន្ត មានសន្តិភាពពិសេសអភិវឌ្ឍន៍សង្គម។
- ផ្សារភ្ជាប់ទ្រឹស្តីពុទ្ធលទ្ធិទៅនឹងសកម្មភាពរបស់មនុស្សឲ្យតួអង្គមនុស្សធ្វើចលនាសកម្មជាការប្រសើរ ព្រោះតួអង្គល្អតែងតែមានប្រៀបនៅទីបញ្ចប់។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : វិធីអប់រំពីរយ៉ាងខាងលើត្រឹមត្រូវដែរ តែមិនទាន់គ្រប់ជ្រុងជ្រោយ ព្រោះមានគុណវិបត្តិបន្តិចបន្តួច។
- <u>មតិផ្ទាល់ខ្លួន</u> : ត្រូវចេះជ្រើសរើសរកអត្ថបទអក្សរសិល្ប៍ពុទ្ធលទ្ធិដែលមានការអប់រំល្អ ចម្រើនដល់បញ្ញាស្មារតី។

# ប្រធានទី២៧



គេថា “នាងសូរបនខាថែចង់អ្នកបួសខុសបវេណី ជាហេតុធ្វើឱ្យមានសង្គ្រាមដ៏ធំរវាងព្រះរាមនិងពួកយក្ស”។ តើអ្នកយល់ដូចម្តេច? ចូរបង្ហាញពីលទ្ធផលរបស់ព្រះរាមនិងពួកយក្សដែលទទួលបានពីសង្គ្រាមនេះ។

## គម្រោងតែង

### ក. សេចក្តីផ្តើម

- លំនាំបញ្ហា : លើកទិដ្ឋភាពរឿងរាមកេរ្តិ៍មកបង្ហាញ
- ចំណូលបញ្ហា : ហេតុនេះ “..........................”។
- ចំណោទបញ្ហា : តើ.....ត្រឹមត្រូវដែរឬទេ?

### ខ. តួសេចក្តី

- ឃ្លាភ្ជាប់សេចក្តី
- ពន្យល់ពាក្យ
  - ថែចង់ : ចូលទៅទាក់ទងក្នុងបំណងសុំស្នេហ៍ សុំស្រឡាញ់
  - អ្នកបួស : អ្នកដែលកាន់សីល លះបង់ផ្លូវលោក
  - បវេណី : ទំនៀម លំអាន ពូជពង្ស
- ពន្យល់ន័យប្រធាន : សង្គ្រាមរវាងព្រះរាមនិងក្រុងរាពណ៍បណ្តាល

មកពីនាងសូរបនខាទាក់ទងសុំសេចក្ដីស្នេហាជាមួយអ្នកកាន់សីលខុសពីទំនៀមទម្លាប់។

- **បកស្រាយ**

❖ មតិស្រប : <u>នាងសូរបនខា.....ជាហេតុធ្វើឱ្យមានសង្គ្រាមដ៏ធំរវាងព្រះរាមនិងពួកយក្សមែន ព្រោះ៖</u>

- ងប់ងល់នឹងតណ្ហា មិនគោរពច្បាប់ជាស្រី ដើរចែចង់ប្រុស។
- មានះរឹងរូស ខ្វះការអប់រំ។

  ឧទា. នាងសូរបនខា ម្ដងទៅសុំស្នេហ៍ព្រះរាម ម្ដងសុំស្នេហ៍ព្រះលក្ស្មណ៍ មួយលើកជាពីរលើក។
- មិនស្ដាប់ការពន្យល់របស់ព្រះរាម ព្រះលក្ស្មណ៍។
- ល្ងង់ខ្លៅ ខ្វះការពិចារណា មិនយល់ពាក្យរបស់ព្រះរាម ព្រះលក្ស្មណ៍ ដែលបញ្ជូនមក។
- ចរិតល្អាច គ្មានការអៀនខ្មាស (ឧទា. "លុះទៀបអាស្រមព្រះឥសី បញ្ចើររូបនូវឫទ្ធី អំពើអំពើក អស់អង្គ"។) ជាហេតុធ្វើឱ្យព្រះលក្ស្មណ៍ធុញទ្រាន់ក៏ធ្វើទារុណកម្មនាងតែម្ដងទៅ (កាត់ដៃកោរសក់)។

  - <u>សរុបមតិស្រប</u> : .....ដូចនេះមែន។

❖ មតិផ្ទុយ : <u>ផ្ទុយទៅវិញ សង្គ្រាមរវាងព្រះរាមនិងពួកយក្សមានហេតុផលផ្សេងទៅវិញ ករណី៖</u>

- ព្រះរាមបញ្ជូននាងសូរបនខាទៅមក ដូចជាការលេងសើច ហើយប្រមាថនិងធ្វើទណ្ឌកម្មទៅលើនាងសូរបនខា។

- គំនុំសងសឹកនាំឲ្យនាងសូរបនខាខឹង ចងអាឃាតជាមួយព្រះរាម ហើយទៅប្រាប់បងឲ្យមកសងសឹក ញុះញង់ឲ្យមកដណ្ដើមយកនាងសីតាពីព្រះរាមវិញ។
- មានះរឹងរូស និងអត្តនោម័តរបស់តួអង្គ ដូចជា៖
    - នាងសីតាមានះរឹងរូស លោភលន់ ទោះបីព្រះរាមពន្យល់ហេតុផលក៏មិនជឿ និងចេញពីរង្វង់ដែលព្រះលក្ស្មណ៍គូរ។ ឧទា. ចង់បានស្បែកប្រើសមាសដែលយក្សមហារីកកាឡាខ្លួន
    - ក្រុងរាពណ៍មិនព្រមស្ដាប់កុម្ភការណ៍ ថានេះជាកំហុសរបស់នាងសូរបនខា ដូចឃ្លាថា "នាងសូរបនខាចង់ប្រុសខុសក្រឹត្យ"...។
- ដណ្ដើមប្រយោជន៍គ្នា គឺដណ្ដើមស្រីគ្នា(សីតា)។
- ឥទ្ធិពលសាសនា : ព្រះរាម ព្រះលក្ស្មណ៍ជាអាទិទេពមានភារៈសង្គ្រោះមនុស្សលោក កំចាត់សភាវៈអាក្រក់(ពួកយក្ស) ពិសេសក្រុងរាពណ៍។

  ហេតុផលដូចបានរៀបរាប់មកខាងលើនេះ ដែលបង្កឲ្យមានសង្គ្រាមរវាងព្រះរាមនិងពួកយក្ស។

    - <u>សរុបមតិផ្ទុយ</u> : ............ដូចនេះមែន។

❖ សំយោគមតិ

- មតិស្របក្ដី មតិផ្ទុយក្ដីត្រឹមត្រូវម្យ៉ាងម្នាក់។
- ដូចនេះលទ្ធផលសង្គ្រាមរវាងព្រះរាមនិងពួកយក្សគឺបង្ហាញឲ្យឃើញ៖
    - គំនិតចក្រពត្តិនិយមរបស់ព្រះរាម ឈ្លានពាននគរគេ ញុះញង់

បងប្អូនគេ បំបែកបំបាក់ដើម្បីត្រួតត្រា... ដូចជាការសម្លាប់ពាលីដើម្បីត្រួតត្រាសុគ្រីព ខ្ចីអាវព្រះនរាយណ៍ពាក់ដើម្បីគម្រាមមហាជម្ពូពានរ...។

- គម្រាមកំហែងអ្នកទន់ខ្សោយ ដោយអាងឥទ្ធិពលខ្លួនជាអាទិទេព គម្រាមឋានទាំងបី។
- បង្ហាញឲ្យឃើញពីវីរបុរសជាតិ តាមរយៈតួអង្គកុម្ភការណ៍ ពាលី ឥន្ទ្រជិត មហាជម្ពូ...
- បង្ហាញអំពើក្បត់ជាតិសាសន៍ឯងតាមរយៈពិភេក និងសុគ្រីព។

ពោលគឺសង្គ្រាមបង្កនូវក្តីវិនាសអន្តរាយប្រទេសជាតិគ្រប់បែបយ៉ាង(ប្រជារាស្ត្រលង្កាស្លាប់ ហិនហោចទ្រព្យសម្បត្តិ...)។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ត្រឹមត្រូវ តែមិនទាន់គ្រប់ជ្រុងជ្រោយ ព្រោះឥទ្ធិពលសង្គ្រាមបង្កឲ្យមានវិនាសកម្មដ៏ធំធេងនេះដោយសារតែតណ្ហានិយមរបស់តួអង្គមួយចំនួនទៀត។ ដើម្បីបញ្ចៀសនូវសង្គ្រាម មានតែបំបាត់ចោលគំនិតអត្តនោម័តទំនាស់ផ្សេងៗឲ្យបាន។
- <u>មតិផ្ទាល់ខ្លួន</u> : ត្រូវគិតគូរផលប្រយោជន៍ជាតិជាធំ ហើយធ្វើអ្វីៗត្រូវចេះគិតពិចារណាឲ្យបានល្អិតល្អន់។

# ប្រធានទី២៨



មានមតិមួយពោលថា សាសនាជាប្រភពនៃសេចក្តីសុខ។ ឯមតិមួយទៀតយល់ថា វិទ្យាសាស្ត្រទេដែលជាប្រភពនៃសេចក្តីសុខ។ ចូរពិភាក្សា។

## គម្រោងតែង

### ក. សេចក្តីផ្តើម

- <u>លំនាំបញ្ហា</u> : មនុស្សគ្រប់រូបតែងតែព្យាយាមស្វែងរកសេចក្តីសុខក្នុងជីវិតស្របទៅតាមវិធីរៀងៗខ្លួន ។
- <u>ចំណូលបញ្ហា</u> : មតិទីមួយពោលថា "សាសនាជាប្រភពនៃសេចក្តីសុខ" ឯមតិមួយទៀតយល់ថា "វិទ្យាសាស្ត្រទេដែលជាប្រភពនៃសេចក្តីសុខ" ។
- <u>ចំណោទបញ្ហា</u> : តើមតិទាំងពីរខាងលើនេះ មួយណាត្រឹមត្រូវជាង?

### ខ. តួសេចក្តី

- <u>ឃ្លាភ្ជាប់សេចក្តី</u>
- <u>ពន្យល់ពាក្យ</u>
  - សាសនា : ពាក្យបណ្តាំ ពាក្យទូន្មានប្រៀនប្រដៅរបស់គ្រូបាអាចារ្យណាម្នាក់ ។

- វិទ្យាសាស្ត្រ : វិជ្ជាមួយបែបដែលគេរកឃើញដោយការលៃផ្សំមានការផ្សំធាតុជាដើម ។
- សេចក្តីសុខ : សំដៅលើភាពសុខស្រួលរបស់មនុស្ស ទាំងកាយទាំងចិត្ត ។

- ពន្យល់ន័យប្រធាន : មតិទីមួយបានផ្តល់សារៈសំខាន់ទៅដល់សាសនាក្នុងការស្វែងរកសេចក្តីសុខឱ្យមនុស្ស ឯមតិទី២បានផ្តល់សារៈសំខាន់ទៅឱ្យវិទ្យាសាស្ត្រទៅវិញទេដែលផ្តល់សេចក្តីសុខឱ្យមនុស្ស ។
- **បកស្រាយ**

❖ មតិទី១ : សាសនាជាប្រភពនៃសេចក្តីសុខ៖

- សាសនាបានបង្រៀនមនុស្សឱ្យស្គាល់ច្បាស់ពីមូលហេតុនៃសេចក្តីទុក្ខ និងបង្ហាញផ្លូវស្វែងរកសេចក្តីសុខដោយការសង្រួមកាយ វាចា ចិត្ត ។
- សាសនាបានបង្រៀនមនុស្សមិនឱ្យបៀតបៀនយាយីគ្នា ពោលគឺត្រូវគោរពសិទ្ធិគ្នាទៅវិញទៅមក ដែលស្របទៅនឹងរដ្ឋធម្មនុញ្ញសហប្រជាជាតិ ក្នុងការលើកកម្ពស់សិទ្ធិមនុស្សជាសកល ។
- សាសនាបានផ្តល់នូវវប្បធម៌ អហិង្សា ក្នុងន័យកាត់បន្ថយទំនាស់កាត់បន្ថយការឈ្នានីសគ្នាដោយប្រើកំហឹងទល់កំហាល់ ។
- សាសនាបានប្រដៅមនុស្សឱ្យលះបង់នូវសេចក្តីកំណាញ់ គឺឱ្យចេះចែករំលែកគ្នា ឱ្យទានដល់គ្នា ឱ្យអភ័យទានដល់គ្នា ឱ្យចេះសង្គ្រោះគ្នានៅគ្រប់កាលៈទេសៈ ឱ្យចេះអត់ធ្មត់ខន្តី និងចេះប្រើបញ្ញាញាណមកដោះស្រាយបញ្ហា ។

- ឧទា. ក្រមសីលធម៌មួយនៅក្នុងទ្រឹស្ដីពុទ្ធសាសនា ត្រង់និច្ចសីល ឬសីលប្រាំរបស់មនុស្សបានថែងថា៖
    - បាណាតិបាតាវេរមណី ឱ្យវៀរចាកការសម្លាប់ជីវិតគេ,
    - អទិន្នាទានាវេរមណី ឱ្យវៀរចាកការលួចប្លន់ទ្រព្យសម្បត្តិគេ,
    - កាមេសុមិច្ឆាចារាវេរមណី ឱ្យវៀរចាកការសេពកាមខុសច្បាប់ គឺការលួចប្ដី ប្រពន្ធ កូនគេ,
    - មុសាវាទាវេរមណី ឱ្យវៀរចាកការនិយាយពាក្យភូតភរឡេះឡោះឥតប្រយោជន៍ និង,
    - សុរាមេរយមជ្ជបមាទដ្ឋានាវេរមណី ឱ្យវៀរចាកការសេពគ្រឿងស្រវឹង គ្រឿងញៀនផ្សេងៗ ។
- ក្រៅពីពុទ្ធសាសនា ក៏មានសាសនាដទៃជាច្រើនទៀតសុទ្ធតែបានបង្រៀនមនុស្សឱ្យស្រឡាញ់សន្តិភាព ឱ្យធ្វើអំពើល្អ ឱ្យចែករំលែកទានដល់អ្នកក្រីក្រជាដើម មានសាសនាគ្រិស្ត សាសនាឥស្លាម និងសាសនានានាជាច្រើនទៀតក៏ដូចគ្នាដែរ ។
- ក្នុងសង្គមបច្ចុប្បន្ន ប្រជារាស្ត្រខ្មែរនិយមធ្វើបុណ្យតាមប្រពៃណីពុទ្ធសាសនា មានបុណ្យកតញ្ញូ បុណ្យផ្កា បុណ្យកឋិន បុណ្យភ្ជុំបិណ្ឌ ដារភូមិជាដើម ក្នុងន័យរឹតចំណងសាមគ្គីភាព និងសេចក្ដីដឹងគុណចំពោះអ្នកមានគុណតាំងពីនៅរស់រហូតដល់ស្លាប់ ។
- ឧទា.ក្នុងអក្សរសិល្ប៍៖
    - រឿងព្រះវេស្សន្តរក៏បានឆ្លុះបញ្ចាំងឱ្យឃើញពីការចែក

រំលែកបរិច្ចាគទានដល់ទុគិតជន ពីសំណាក់ព្រះវេស្សន្តរ ដែលធ្វើឱ្យអង្គព្រះវេស្សន្តរមានព្រះកិត្តិនាមល្បីល្បាញរ ទៅដល់ នគរដទៃ ។

- រឿងសុវណ្ណសាម ដែលជាអក្សរសិល្ប៍ពុទ្ធនិយមមួយ ដែរនោះក៏បានប្រៀនប្រដៅមនុស្សឱ្យមានសេចក្ដីកតញ្ញូ កតវេទីចំពោះអ្នកមានគុណ ដូចមានតួអង្គសុវណ្ណសាម ជាគំរូ ។

- <u>សរុបមតិទី១</u> : សាសនាពិតជាបាននាំមកនូវសេចក្ដីសុខដល់ មនុស្សពិតប្រាកដមែន ។

តើមានតែសាសនាទេឬដែលនាំឱ្យមនុស្សមានសេចក្ដីសុខ?

❖ មតិទី២ : <u>វិទ្យាសាស្ត្រជាប្រភពនៃសេចក្ដីសុខ៖</u>

- ផលិតផលវិទ្យាសាស្ត្របានផ្ដល់គុណប្រយោជន៏ដល់ជីវភាពរស់នៅប្រចាំថ្ងៃដល់មនុស្សបានយ៉ាងច្រើនឥតគណនា ។
- វិទ្យាសាស្ត្រជួយឱ្យមនុស្សរស់នៅសុខស្រួល មានសុខភាពល្អ ដូចជាមានអាហារបំប៉នសុខភាព មានក្បួនវេជ្ជសាស្ត្រការពារ និង ព្យាបាលជំងឺ ។ល ។
- វិទ្យាសាស្ត្រជួយឱ្យមានរបស់របរប្រើប្រាស់ទំនើប១ និងអាចទាក់ទងគ្នាបានរហ័សទាន់ចិត្ត ដូចជាយានជំនិះ សម្លៀកបំពាក់ ម៉ាស៊ីនបោកគក់ ម៉ាស៊ីនភ្លើង គ្រឿងចក្រ វិទ្យុ ទូរទស្សន៏ ទូរស័ព្ទ កុំព្យូទ័រ អ៊ីនធឺណែតជាដើម ដែលរបស់របរទាំងអស់នេះធ្វើឱ្យមនុស្សរស់នៅបានសុខស្រួល មានផាសុកភាពគ្រប់ពេលវេលា និងចំណេញ

ពេលវេលា គឺកាត់បន្ថយការប្រើកម្លាំងមនុស្សសុទ្ធសាធ ។

- ដោយសាររបកគំហើញវិទ្យាសាស្ត្រកាន់តែជឿនលឿន គេអាចបង្កើតវត្ថុវិទ្យាសាស្ត្រកាន់តែទំនើប ហើយមានទំហំកាន់តែតូច តែមានមុខងារច្រើនយ៉ាង ដូចជាទូរស័ព្ទ អាយហ្វូន អាយផេត មេម៉ូរី យូអេសប៊ីផ្លាស់ដែលអាចផ្ទុកឯកសារបានជាច្រើនអនេកអនន្តរាប់ពុំអាចគណនាបាន ។
- ផ្នែកវេជ្ជសាស្ត្រវិញ គេបានបង្កើតម៉ាស៊ីនសម្រាប់ព្យាបាលជំងឺ ម៉ាស៊ីនពិនិត្យជំងឺ ម៉ាស៊ីនឆ្លុះមើលទារកក្នុងផ្ទៃម្ដាយដែលអាចឱ្យយើងដឹងពីភេទ និងដំណើរទំនងនៃគភ៌នៅក្នុងផ្ទៃម្ដាយ ។
- ឧទា.នៅក្នុងអក្សរសិល្ប៍ខ្មែរ៖
    - រឿងព្រះអាទិត្យថ្មីរះលើផែនដីចាស់ បានបង្ហាញពីការធ្វើកសិកម្មទំនើបតាមបែបវិទ្យាសាស្ត្រក្នុងសម័យសង្គមរាស្ត្រនិយម ដូចជាការធ្វើនយោបាយទឹកការជ្រើសរើសពូជ ការប្រើជី ការកំចាត់សត្វល្អិតជាដើម ។ ដែលអាចទទួលបានទិន្នផលខ្ពស់រហូតដល់ធ្វើឱ្យតួអង្គសមមានជីវភាពកាន់តែប្រសើរ ។

- <u>សរុបមតិទី២</u> : មានតែវិទ្យាសាស្ត្រទេដែលជាប្រភពនៃសេចក្ដីសុខពិតប្រាកដ ។

❖ សំយោគមតិ

- មតិទាំងពីរនេះសុទ្ធតែមានលក្ខណៈត្រឹមត្រូវទាំងពីរ ព្រោះ៖

- កត្តាដែលជំរុញឱ្យមានសេចក្តីសុខពិតប្រាកដ គឺត្រូវស្ថិតនៅលើការទទួលការអប់រំតាមបែបសាសនាផង និងវិទ្យាសាស្ត្រផង ដែលកត្តាទាំងពីរនេះជួយបំពេញឱ្យគ្នាទៅវិញទៅមកនៅក្នុងតម្រូវការរបស់មនុស្ស ។
- សាសនាអប់រំខាងស្មារតី ឱ្យមនុស្សចេះប្រកាន់សីលធម៌ សច្ចធម៌ និងមានវិចារណៈ ចេះទទួលខុសត្រូវលើទង្វើរបស់ខ្លួន ។
- វិទ្យាសាស្ត្រជាការអនុវត្តក្នុងការស្រាវជ្រាវបំពេញតម្រូវការឱ្យមនុស្សរស់នៅបានស្រួល ។ ផលិតផលវិទ្យាសាស្ត្រត្រូវផ្សារភ្ជាប់នឹងសីលធម៌ ទើបមិននាំអន្តរាយដល់មនុស្ស ។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : មតិនីមួយៗរបស់ប្រធានមានភាពសមហេតុផលម្យ៉ាងម្នាក់ តែមិនទាន់គ្រប់ជ្រុងជ្រោយទេ ព្រោះជាមតិដែលប្រកាន់ជំហរតាមគំនិតរៀងៗខ្លួន ។ តែទោះជាយ៉ាងណាក៏ដោយក៏មតិទាំងពីរនេះបានឱ្យយើងឃើញពីសារៈសំខាន់រវាងសាសនា និងវិទ្យាសាស្ត្រចាំបាច់ត្រូវដើរទន្ទឹមគ្នាពុំអាចខ្វះមួយណាបានឡើយ ។
- <u>មតិផ្ទាល់ខ្លួន</u>

# ប្រធានទី២៩



**គេនិយាយថា “ចលនាតស៊ូរបស់ក្រុមជួន និងនៅ ប្រឆាំងបារាំងនៅក្នុងរឿងភូមិតិរច្ឆាន គឺជាការបរា-ជ័យ”។ តើអ្នកយល់យ៉ាងណា?**

## គម្រោងតែង

## ក. សេចក្ដីផ្ដើម

- លំនាំបញ្ហា : និយាយទាក់ទងទៅនឹងប្រធាន(រឿងភូមិតិរច្ឆាន)
- ចំណូលបញ្ហា : ហេតុនេះ “..........................”។
- ចំណោទបញ្ហា : តើមតិប្រធានខាងលើត្រឹមត្រូវដែរឬទេ?

## ខ. តួសេចក្ដី

- ឃ្លាភ្ជាប់សេចក្ដី
- ពន្យល់ពាក្យ
  - ចលនាតស៊ូ : អំពើនៃការខំប្រឹងដើម្បីសម្រេចគោលបំណង
  - ប្រឆាំង : ប្រណាំងប្រជែងដោយអាការរនិងរនាំង ។
  - បរាជ័យ : ដំណើរចាញ់គេ។
- ពន្យល់ន័យប្រធាន : ការប្រឆាំងជាមួយបារាំងដែលដឹកនាំដោយជួន និងនៅ មិនបានទទួលជ័យជំនះ។
- **បកស្រាយ**

❖ មតិស្រប : ចលនាតស៊ូរបស់ក្រុមជួននិងនៅ ប្រឆាំងនឹងបារាំង ក្នុងរឿងភូមិតិរច្ឆានគឺជាការបរាជ័យដោយសារ៖

- ក្រុមបាតុករខ្លះត្រូវជាប់គុកច្រវ៉ាក់ ស្លាប់ រត់ចោលភូមិករ អត់បាយក្រហាយទឹក ខ្លះទៀតពិការអស់មួយជីវិត...
- មិនមានការឯកភាព ការដឹកនាំច្បាស់លាស់ ប្រើរយៈពេលខ្លី គ្មានផែនការច្បាស់លាស់...
- ទទួលទណ្ឌកម្មក្លាយពីឃុំក្រាំងលាវទៅជាភូមិតិរច្ឆាន ប្រជាជនជាប់ជាអ្នកងារ
- ទទួលរងនូវការបង្ខិតបង្ខំឲ្យកសាងចេតិយលោកបារដេស ត្រូវធ្វើបុណ្យគោរពវិញ្ញាណក្ខន្ធជារៀងរាល់ឆ្នាំ
- រាជការរបស់បារាំងកាន់តែដំឡើងពន្ធយ៉ាងធ្ងន់ធ្ងរ
- ព្រាត់ប្រាសគ្រួសារ រត់ចោលស្រុកទៅរស់នៅតាមព្រៃ ភ្នំ...

- <u>សរុបមតិស្រប</u>៖ ការតស៊ូពិតជាទទួលភាពបរាជ័យ...។

❖ មតិផ្ទុយ : តែផ្ទុយទៅវិញការតស៊ូនេះពិតជាទទួលបានជ័យជំនះ

- ទោះបីជាបាតករស្លាប់បាត់ចង់ជីវិត តែវីរភាពនៃការតស៊ូរបស់ពួកគេនៅតែជាប់ឈ្មោះជាក្រុមអ្នកក្លាហានទាមទារសិទ្ធិសេរីភាព ហ៊ានប្រឆាំងជាមួយពួកបារាំង ពិសេសបារដេស។
- ការប្តូរឈ្មោះពីភូមិតិរច្ឆានមកក្រាំងលាវវិញ ក៏ដោយតម្លៃនៃការទាមទារនេះដែរ និងមេធាវីជនជាតិបារាំងព្រមទាំងអ្នកម្នាងម្នាក់មានស្រុកកំណើតនៅព្រៃខ្មែរ
- ការតស៊ូរបស់អ្នកទាំងពីរជាពន្លឺមួយសម្រាប់ឲ្យអ្នកជំនាន់ក្រោយយកតម្រាប់តាមហ៊ានលះបង់ជីវិតដើម្បីបុព្វហេតុជាតិ

- បង្ហាញអំពីតម្លៃសាមគ្គីដែលផុសចេញពីប្រជាពលរដ្ឋគ្រប់ស្រទាប់វណ្ណៈរហូតទទួលបានឯករាជ្យ
- ទោះបីជីវិតស្លាប់ ប៉ុន្តែជាតិរស់ទទួលបានកេរ្តិ៍ឈ្មោះល្បីរន្ទឺ
- អំពើនេះកើតឡើងពីឆន្ទៈទទួលខុសត្រូវខ្ពស់មានគោលជំហរច្បាស់លាស់។ សំដីរបស់នៅ លើកឡើងថាៈ រឿងនេះពុំមែនឆាកកំប្លែងទេ គឺមានស្លាប់មានរស់ មានស៊ីមានសង ព្រោះបារាំងគេមានអំណាចលើខ្មែរយើង

• <u>សរុបមតិផ្ទុយ</u> : ការតស៊ូនេះពិតជាទទួលជោគជ័យ បើទោះបីជាបាត់បង់ជីវិតក៏ដោយ ក៏កេរ្តិ៍ឈ្មោះអ្នកក្រាំងលាវជាអ្នកស្រឡាញ់ឯករាជ្យ។

❖ មតិពិភាក្សា :

- បើតាមមតិទីមួយបានលើកឡើងអំពីការបរាជ័យរបស់ជួន និងនៅ ធ្វើឲ្យប៉ះពាល់ដល់ប្រយោជន៍រួម មិនចង់ឲ្យមានចលនាតស៊ូប្រឆាំងជាមួយបារាំង។
- ចំណែកមតិទីពីរវិញផុសចេញពីគំនិតស្នេហាជាតិ គិតពីតម្លៃនៃសេរីភាព ឯករាជ្យភាព មិនគិតពីប្រយោជន៍ផ្ទាល់ខ្លួន។ មតិទីពីរអាចទទួលយកបានសមស្របទៅនឹងមនសិការជាតិ ជាតិនិយម។

## គ. បញ្ចប់សេចក្តី

• <u>វាយតម្លៃប្រធាន</u> : តាមការពិភាក្សាមតិ យើងអាចវាយតម្លៃប្រធានថាមិនត្រឹមត្រូវឡើយ ព្រោះធ្វើឲ្យមនុស្សខ្លាចរអា មិនហ៊ានតស៊ូ សំងំសុខ មិនគិតប្រយោជន៍ជាតិ

- <u>ចំណាប់អារម្មណ៍ផ្ទាល់ខ្លួន</u> : ដូចនេះក្នុងនាមជាពលរដ្ឋត្រូវបាន លះបង់ប្រយោជន៍ផ្ទាល់ខ្លួនដើម្បីប្រយោជន៍ជាតិ បានតស៊ូប្រឆាំងរាល់អំពើទាំងឡាយដែលធ្វើឲ្យប៉ះពាល់ដល់ជាតិមាតុភូមិ។



# ប្រធានទី៣០



ប្រវត្តិសាស្ត្របញ្ជាក់ថា ប្រទេសខ្មែរទទួលឥទ្ធិពលសាសនាធំៗចំនួនពីរគឺ ព្រហ្មញ្ញសាសនា និងព្រះពុទ្ធសាសនា ហើយក្នុងវិស័យអក្សរសិល្ប៍ ក៏បានទទួលឥទ្ធិពលសាសនាទាំងពីរនេះដូចគ្នាដែរ។ ចូរប្រៀបធៀបអក្សរសិល្ប៍ព្រហ្មនិយម និងអក្សរសិល្ប៍ពុទ្ធ-និយម ដោយលើកយកអំណះអំណាងតាមចលនាអក្សរសិល្ប៍នីមួយៗមកបញ្ជាក់ឱ្យបានច្បាស់លាស់។

## គម្រោងតែង

### ក. សេចក្តីផ្តើម

- លំនាំបញ្ហា :
- ចំណូលបញ្ហា :
- ចំណោទបញ្ហា : តើអក្សរសិល្ប៍ទាំងពីរនេះមានលក្ខណៈដូចនិងខុសគ្នាត្រង់ណាខ្លះ?

### ខ. តួសេចក្តី

- ឃ្លាភ្ជាប់សេចក្តី :
- ពន្យល់ពាក្យគន្លឹះ
  - អក្សរសិល្ប៍ព្រហ្មនិយម គឺជាអក្សរសិល្ប៍ទាំងឡាយដែលទទួលឥទ្ធិពល និងបម្រើលទ្ធិសាសនាព្រាហ្មណ៍។

- អក្សរសិល្ប៍ពុទ្ធនិយម គឺជាអក្សរសិល្ប៍ទាំងឡាយដែលទទួលឥទ្ធិពល និងបម្រើលទ្ធិពុទ្ធសាសនា។

- <u>ពន្យល់ន័យប្រធាន</u> : ទស្សនៈប្រធានតម្រូវឲ្យរកលក្ខណៈដូច និងលក្ខណៈខុសគ្នាទៅលើចលនាអក្សរសិល្ប៍ទាំងពីរខាងលើ៖ ផ្ដើមរឿង តួរឿង និងបញ្ចប់រឿង។

- **បកស្រាយ**

ក. <u>លក្ខណៈដូចគ្នា</u> : ចលនាអក្សរសិល្ប៍ទាំងពីរមានលក្ខណៈដូចគ្នាត្រង់៖

១. ផ្ដើមរឿង៖ លើកបង្ហាញតាមបែបសាសនា។

២. តួរឿង

- ➢ តួអង្គ
  - ទេវៈ មនុស្ស យក្ស ធម្មជាតិ...
  - មានលក្ខណៈបង្ហាញតួអង្គ
- ➢ ទីកន្លែង : ឋានទាំងបី
- ➢ សកម្មភាពរឿង
  - បញ្ហាចោទ
    - ទំនាស់រវាងរាជសម្បត្តិ ក្នុងសង្គមមនុស្ស
    - បញ្ហាស្នេហា
    - បញ្ហាវណ្ណៈ
    - ការតស៊ូ
    - កម្សត់ ព្រាត់ប្រាស លះបង់ ទណ្ឌកម្ម
  - បញ្ហាស្រាយ

- តស៊ូ ព្យាយាម អត់ធ្មត់
- អហិង្សា ហិង្សា
- ជោគជ័យ បរាជ័យ

➢ ឧត្តមគតិរឿង

- អប់រំឲ្យជឿលើលទ្ធិសាសនា
- អប់រំឲ្យមានការតស៊ូ

៣. បញ្ចប់រឿង

- អំពើល្អឈ្នះអំពើអាក្រក់
- ផ្សព្វផ្សាយលទ្ធិសាសនា

ឧទាហរណ៍៖

- រឿងរាមកេរ្តិ៍
- រឿងទសជាតក បញ្ញាសជាតក

រួមមក ចលនាអក្សរសិល្ប៍ទាំងពីរមានលក្ខណៈដូចគ្នា...។

ខ. <u>លក្ខណៈខុសគ្នា</u> : ចលនាអក្សរសិល្ប៍ព្រាហ្មណ៍និយមខុសពីអក្សរសិល្ប៍ពុទ្ធនិយមត្រង់៖

<u>អក្សរសិល្ប៍ព្រាហ្មណ៍និយម</u>

១. ផ្តើមរឿង៖ បង្ហាញពិធីបូជាយញ្ញ ឬហោមពិធី បង្ហាញឈ្មោះអាទិទេពទាំងបី។

២. ដំណើររឿង

➢ តួអង្គ៖ អាទិទេព ឬអវតាររបស់ព្រះវិស្ណុមកយកកំណើតជាមនុស្សប្រុសអស្ចារ្យ និងនារីអស្ចារ្យ ឯតួអង្គផ្សេងៗទៀតមានតួអង្គឥសី ទេវតា យក្ស ស្វា គ្រុឌ...។

➢ ទីកន្លែង៖ ព្រៃហេមពាន្ត ស្ថានសួគ៌ ស្ថានសិម្ពលី...

➢ សកម្មភាពរឿង

- បញ្ហាចោទ៖ ដោយមានទំនាស់រវាងសភាវៈល្អ និងសភាវៈអាក្រក់។
- ដំណោះស្រាយ៖ ដោយសិល្ប៍មន្ត ឫទ្ធិអំណាច ធ្វើចម្បាំងនឹងគ្នា ដោយហិង្សា សងសឹក យុទ្ធវិធី។
- បញ្ហាស្នេហា មកពីអាទិទេព ហើយអ្នកឈ្នះទទួលបានស្នេហា កើតឡើងពីការប្រឡងមហិទ្ធិឫទ្ធិ។
- កម្សត់ កើតឡើងដោយវិបត្តិទំនាស់រវាងសភាវៈល្អ និងសភាវៈអាក្រក់ច្បាំងទាស់ទែងគ្នា មានទារុណកម្មខាងផ្លូវចិត្ត និងផ្លូវកាយ។

➢ ឧត្តមគតិរឿង៖ អប់រំមនុស្សឲ្យជឿលើអាទិទេព និងមានជំនឿលើអាទិទេព ធ្វើឲ្យមនុស្សខ្វះការជឿជាក់លើខ្លួនឯង

៣. បញ្ចប់រឿង៖ ឲ្យពួកសភាវៈល្អឈ្នះសភាវៈអាក្រក់។

ឧទាហរណ៍៖

- រឿងរាមកេរ្តិ៍ ជាអក្សរសិល្ប៍ព្រាហ្មណ៍និយម ព្រះរាមគឺជាទេវៈ ជាអវតាររបស់ព្រះវិស្ណុ នាងសីតាជាកំពូលនារី មានរូបសម្បត្តិស្អាត។ អ្នកទាំងពីរបានជួបគ្នាដោយសារការប្រឡងមហិទ្ធិឫទ្ធិ។ ដំណើររឿងគឺជាទំនាស់រវាងមនុស្សនិងយក្ស ច្បាំងសងសឹកគ្នារហូតរលំរលាយម្ខាងៗ។ អប់រំមនុស្សឲ្យជឿលើអាទិទេព។

<u>អក្សរសិល្ប៍ពុទ្ធនិយម</u>

១. ផ្តើមរឿង៖ ធ្វើបទមនស្ការរំលឹកគុណព្រះរតនត្រៃ គ្រូបាអាចារ្យ មាតាបិតា...។

២. ដំណើររឿង

- តួអង្គ៖ តួអង្គឯកជាពោធិសត្វ ឯតួអង្គឯកស្រីជាកន្សៃសារពេជ្ជ។ តួអង្គរងមានមនុស្ស ទេវតា អសុរៈ ...។
- ទីកន្លែង៖ នគរតក្កសិលា នគរពារាណសី ព្រៃហេមពាន្ត...
- សកម្មភាពរឿង
    - បញ្ហាចោទ៖ ទំនាស់រវាងព្រះពោធិសត្វនិងសង្គមមនុស្ស។
    - ដំណោះស្រាយ៖ ដោយសន្តិវិធី ខន្តី អហិង្សា។
    - បញ្ហាស្នេហា៖ ជាស្នេហាបរិសុទ្ធ ហើយមានការសរជាតិ។
    - កម្សត់ ព្រាត់ប្រាសគ្នាដោយសារកម្មពៀរ។
- ឧត្តមគតិរឿង៖ អប់រំមនុស្សឲ្យជឿបុណ្យបាប ល្អ អាក្រក់ ចេះតស៊ូ ជឿជាក់លើសមត្ថភាពខ្លួនឯង។

៣. បញ្ចប់រឿង៖ បង្ហាញការសរជាតិរបស់តួអង្គ។

ឧទាហរណ៍៖ លើកយករឿងក្នុងទសជាតក ឬបញ្ញាសជាតកមកបង្ហាញ។

- <u>សរុបសេចក្តី</u> : រួមមក ចលនាអក្សរសិល្ប៍ទាំងពីរមានលក្ខណៈដូចគ្នាផង ខុសគ្នាផង...។

## គ. សេចក្តីបញ្ចប់

- <u>វាយតម្លៃប្រធាន</u> : ទស្សនៈប្រធានមានតម្លៃល្អ ដោយលើកយកមកបង្ហាញឲ្យឃើញពីតម្លៃនៃអក្សរសិល្ប៍ពុទ្ធនិយម និងព្រាហ្មណ៍និយមបានច្បាស់លាស់ ហើយម្យ៉ាងទៀត រឿងទាំងពីរនេះបានផ្ដល់ជាគតិអប់រំល្អៗជាច្រើនដល់អ្នកសិក្សា...។
- <u>មតិផ្ទាល់ខ្លួន</u>

# ប្រធានទី៣១



ប្រៀបធៀបលក្ខណៈសម្បត្តិនៃតួអង្គព្រះរាម ក្នុងរឿងរៃបព្រាហ្មណ៍និយម និងតួអង្គព្រះវេស្សន្តរ ក្នុងរឿងបែបពុទ្ធនិយម។

## គម្រោងតែង

### ១-សេចក្តីផ្តើម

- លំនាំបញ្ហា : លើកយកតួអង្គព្រះរាមនិងព្រះវេស្សន្តរមកនិយាយ
- ចំណូលបញ្ហា : លើកយកប្រធានមកបង្ហាញ
- ចំណោទបញ្ហា : តើភាពអស្ចារ្យនៃតួអង្គទាំងពីរមានលក្ខណៈដូចគ្នានិងខុសគ្នាយ៉ាងណាខ្លះ?

### ២-តួសេចក្តី

- **ឃ្លាភ្ជាប់សេចក្តី**
- **ពន្យល់ពាក្យ**

  \+ លក្ខណៈសម្បត្តិ : លក្ខណៈ ទ្រង់ទ្រាយ បែបផែន.... ដែលមនុស្សគ្រប់គ្នាមាន។
- **ពន្យល់ន័យ :** ប្រធាននេះចង់ឱ្យយើងលើកយកពីលក្ខណៈដូចគ្នានិង

លក្ខណៈខុសគ្នារបស់ព្រះរាមនិងព្រះវេស្សន្តរ មកធ្វើការប្រៀបធៀប និងចង់ដឹងថាតួអង្គឯកទាំងពីររូបនេះមានលក្ខណៈសម្បត្តិយ៉ាងណា។

- **បកស្រាយ**

\+ លក្ខណៈដូចគ្នា

- ➢ ជាបុត្រព្រះមហាក្សត្រ
- ➢ មានមហេសីនិងមានកូនពីរនាក់
- ➢ មិនប្រើហិង្សាក្នុងការដោះស្រាយទំនាស់រាជវង្ស
- ➢ ចាកចេញពីនគរទៅរស់នៅក្នុងព្រៃ
- ➢ .......................................

\+ លក្ខណៈខុសគ្នា

- **ព្រះវេស្សន្តរ**
  - ➢ ជាព្រះពោធិសត្វ
  - ➢ បរិច្ចាគទានសព្វបែបយ៉ាងប្រាថ្នាជាព្រះពុទ្ធ (ទ្រព្យ កូន ប្រពន្ធ...)
  - ➢ លះបង់សេចក្ដីលោភលន់
  - ➢ លក្ខណៈទានមានភាពស្ថិតស្ថេរជារហូត
  - ➢ ដោះស្រាយទំនាស់ដោយធម៌ខន្តី អហិង្សា
  - ➢ បានជួបជុំប្រពន្ធកូន
  - ➢ ...................................
- **ព្រះរាម**

- ➢ ជាវិស្ណុអវតារ
- ➢ ចុះមកបង្ក្រាបពួកយក្សអាក្រក់
- ➢ ជំពាក់ដោយសេចក្តីលោភលន់
- ➢ លក្ខណៈជាអាទិទេពតែពីដំបូងប៉ុណ្ណោះ
- ➢ មានចរិតឆេវឆាវ ខ្វះការពិចារណា
- ➢ ដោះស្រាយទំនាស់ដោយហិង្សា ធ្វើសង្គ្រាម
- ➢ ល្មោភសង្គ្រាម ( សូម្បីកូនក្មេងក៏មិនលើកលែង...)
- ➢ ធ្វើទារុណកម្មលើកុមារ ( បញ្ជាឱ្យគេធ្វើបាបជបលក្សណ៍)
- ➢ ប្រើល្បិចកលថោកទាប( លួចប្រហារពាលីពីក្រោយខ្នង, ចូលកោដ្ឋបញ្ឆោតនាងសីតា...)
- ➢ ព្រាត់ប្រាសប្រពន្ធកូន
- ➢ ................................

- **សរុបសេចក្តី** : តួអង្គទាំងពីរនេះមានលក្ខណៈសម្បត្តិដូចគ្នាផង និង ខុសគ្នាផង ប៉ុន្តែតួអង្គព្រះវេស្សន្តរមានលក្ខណសម្បត្តិល្អប្រសើរជាង ។

## ៣-សេចក្តីបញ្ចប់

- **វាយតម្លៃប្រធាន** : ប្រធានមានលក្ខណៈល្អប្រសើរ បណ្តុះមនុស្ស ឱ្យចេះសិក្សាប្រៀបធៀប និងពិចារណាទៅលើអ្វីមួយបានគ្រប់ជ្រុងជ្រោយ....។
- **ទស្សនៈចូលរួម**



# ប្រធានទី៣២



**ចូរប្រៀបធៀបរឿងព្រេងកថានិងរឿងទសជាតក។**

## គម្រោងតែង

## ក. សេចក្ដីផ្ដើម

- លំនាំបញ្ហា :
- ចំណូលបញ្ហា :
- ចំណោទបញ្ហា : តើប្រភេទរឿងទាំងពីរមានលក្ខណៈដូចគ្នានិងខុសគ្នាយ៉ាងដូចម្ដេចខ្លះ?

## ខ. តួសេចក្ដី

- ឃ្លាភ្ជាប់សេចក្ដី
- ពន្យល់ពាក្យ
  - រឿងទសជាតក : រឿងរ៉ាវទាំងដប់ជាតិរបស់ព្រះពោធិសត្វមុនពេលបានត្រាស់ដឹង។
  - រឿងព្រេងកថា : សំដៅលើរឿងនិទានស្ដីពីទីតាំងប្រវត្តិសាស្ត្រនិងភូមិសាស្ត្រ។
- ពន្យល់ន័យប្រធាន : បង្ហាញពីលក្ខណៈដូចគ្នានិងខុសគ្នារវាងរឿងរ៉ាវទាំងដប់ជាតិរបស់ព្រះពោធិសត្វ និងរឿងព្រេងនិទានដែលទាក់ទងនឹងប្រវត្តិសាស្ត្រនិងភូមិសាស្ត្រ។
- **បកស្រាយ**

ក. លក្ខណៈដូចគ្នា : ប្រភេទរឿងទាំងពីរមានលក្ខណៈដូចគ្នា ត្រង់៖

១. អត្ថន័យ

- លើកយកបញ្ហាមនុស្សមកចោទនិងដោះស្រាយ
- បង្ហាញពីការតស៊ូព្យាយាមពុះពារគ្រប់ឧបសគ្គរបស់តួអង្គ
- ឧទា. រឿងធនញ្ជ័យ បង្ហាញពីទំនាស់វិបត្តិរវាងធញ្ជ័យ ដែលតំណាងឲ្យវណ្ណៈតូចតាចនិងពួកនាម៉ឺន សេដ្ឋី ស្តេច ដែលតំណាងឲ្យវណ្ណៈជិះជាន់។ ប៉ុន្តែរាល់បញ្ហាទាំងឡាយ ធនញ្ជ័យខិតខំដោះស្រាយរហូតទទួលបានជោគជ័យគ្រប់ពេលវេលា។
- ឧទា. រឿងព្រះវេស្សន្តរ រាល់ការបរិច្ចាគទានរបស់ព្រះវេស្សន្តរតែងមានប្រតិកម្មប្រឆាំងពីសំណាក់ប្រជារាស្ត្រក្នុងនគរ....ព្រះវេស្សន្តរខិតខំពុះពារជំនះគ្រប់ឧបសគ្គក្នុងដំណើរជីវិត ដើម្បីសន្សំនូវទានបារមីប្រាថ្នាជាព្រះសម្មាសម្ពុទ្ធ។

២. អត្ថរូប

- តែងជាពាក្យរាយ ពាក្យកាព្យ...។
- សិល្បវិធីតែងនិពន្ធ៖ សំវាទវិធី ឯកវាទវិធី ហាសវិធី សន្ទេហវិធី ឧបមានវិធី...។

៣. អត្ថរស

- បង្កប់តម្លៃអប់រំដូចគ្នា(កុសលរស)
- .......................................។

ខ. <u>លក្ខណៈខុសគ្នា</u> : ប្រភេទរឿងទាំងពីរមានលក្ខណៈដូចគ្នាត្រង់៖

១. រឿងព្រេងកថា

ក. ផ្តើមរឿង

- ជាការដំណាលតៗគ្នារបស់មនុស្ស
- ភាគច្រើនផ្តើមដោយប្រើពាក្យថា "កាលពីព្រេងនាយ"

ខ. តួរឿង

- តួអង្គជាមនុស្ស សត្វ យក្ស ទេវៈ ខ្មោច ព្រាយ... មានលក្ខណៈអច្ឆរិយ ហើយតំណាងឲ្យមនុស្សគ្រប់ប្រភេទ។
- បង្ហាញពីប្រពៃណី ទំនៀមទម្លាប់ខ្មែរ
- បង្ហាញពីប្រវត្តិសាស្ត្រទាក់ទងនឹងភូមិ ឃុំ ស្រុក ខេត្ត រជ្ជកាល ឬប្រាសាទ...
- ទីកន្លែងនៃរឿងស្ថិតក្នុងសង្គមខ្មែរ មានឈ្មោះ ទីតាំង ជីវភាពរស់នៅ អាជីវកម្មរបស់ខ្មែរ...។
- ចលនារឿងមានលក្ខណៈខ្លីៗ ផ្តោតលើបញ្ហាស្នេហា ទំនាស់វិបត្តិរវាងគ្រួសារជាដើម។
- ជាប្រភេទរឿងខ្លីៗ
- ជាប្រភេទអត្ថបទពាក្យខ្លះ កំណាព្យខ្លះ សម្រាប់អានកម្សាន្តកែអផ្សុក និងបង្កប់នូវលក្ខណៈអប់រំខ្លីៗ។
- ប្រើពាក្យពេចន៍សាមញ្ញរបស់អ្នកស្រុក ពាក្យជាន់កណ្តាល ពាក្យជាន់ទាប ឃ្លាប្រយោគមិនសូវពេញលេញ តែស្តាប់បាន។

- អត្ថរសនៃរឿងផ្ដោតលើហាស្យរស ជាតិនិយម តថរស វីររស។

ក. បញ្ចប់រឿង

- បង្ហាញពីឧត្ដមគតិនៃរឿងជាសុភាសិត ឬជាពាក្យស្លោកអប់រំ។

ឧទា. រឿង គង់ហ៊ាន រឿង ធនញ្ជ័យ រឿង អ្នកតាឃ្លាំងមឿង រឿង ព្រះថោងនាងនាគ...

២. រឿងទសជាតក

ក. ផ្ដើមរឿង

- ប្រារព្ធបទមនស្ការព្រះរតនត្រៃ ដំណាលថាព្រះពុទ្ធគង់នៅក្នុងវត្តណាមួយ

- ជាធម្មទេសនារបស់ព្រះពុទ្ធ

ខ. តួរឿង

- តួអង្គឯកប្រុសជាពោធិសត្វ ឯស្រីជាកន្សែ្យសារពេជ្ជ

- តួអង្គដទៃទៀតមាន មនុស្ស សត្វ ទេវតា យក្ស... មានភាពអច្ឆរិយ

- កាលអាកាសរឿង កើតឡើងក្នុងសម័យមុនពុទ្ធកាល នៅក្នុងប្រទេសឥណ្ឌាបុរាណ ដូចជា នគរពារាណសី នគរតក្កសិលា នគរជេតុត្តរ មិថិលា...។

- ទាក់ទងនឹងទ្រឹស្ដីពុទ្ធសាសនា ដូចជា បញ្ហាបុណ្យ បាប បញ្ហាកម្មផល កម្មពៀរ ការកសាងបារមី។

- កម្មល្អបានផលល្អ កម្មអាក្រក់បានផលអាក្រក់

- ធ្វើល្អបានល្អ ធ្វើអាក្រក់បានអាក្រក់
- សាច់រឿងនិយាយពីការកសាងបារមីរបស់ព្រះពោធិសត្វ
- ចលនារឿងមានលក្ខណៈវែង មានទំនាស់វិបត្តិច្រើនកើតឡើងមកពីរាជសម្បត្តិ ស្នេហា កម្មពៀរ ការកសាងបារមី ។ល។
- វិបត្តិទំនាស់រវាងតួអង្គពោធិសត្វ និងពាហិរទ្រព្យ ដូចជាទ្រព្យសម្បត្តិ រាជសម្បត្តិ។
- វិបត្តិទំនាស់រវាងទ្រព្យសម្បត្តិនិងបិតា ប្រពន្ធ (ដើម្បីផ្តាច់លោភៈ ទោសៈ មោហៈ និងស្នេហា)។
- វិបត្តិរវាងទ្រព្យសម្បត្តិនិងរាស្ត្រខ្លះដែលជំទាស់មិនឱ្យពោធិសត្វធ្វើសកម្មភាពក្នុងគោលបំណងស្វែងរកប្រយោជន៍ជាពិសេសទៅបរលោក មានសកម្មភាពសាងសម្មាសម្ពោធិញ្ញាណ ប្រាថ្នាព្រះនិព្វានដើម្បីបានយាងមកស្រោចស្រង់ប្រោសសត្វលោកនានាឥតរើសមុខ
- អត្ថបទសរសេរជាពាក្យរាយខ្លះ កម្រងកែវខ្លះ មានលក្ខណៈជារឿងសម្រាប់ទេសនា ស្មូត្រក្នុងឱកាសបុណ្យបែបសាសនា។
- ប្រើពាក្យពេចន៍បាលី សំស្ក្រឹត ពុទ្ធដីកា ប្រើប្រាស់ឃ្លាប្រយោគវែងៗ ហើយទាក់ទងពាក្យសម្តីក្នុងសាសនា (ឧ-សីលទាន, ភាវនា, ព្រះតថាគត, ព្រះដ៏មាន បុណ្យ, ព្រះពោធិសត្វ, ទ្រង់ធ្យាន, ឈានសមាបត្តិ ។ល។

- អត្ថបទទាំងនេះមានចារជាសាស្ត្រាស្លឹករឹត, ក្នុងក្រាំង, គម្ពីរ ឬបោះជាសៀវភៅសម្រាប់ជាក្បួនខ្នាតសិក្សា និងសម្រាប់គោរពបូជា។
- អត្ថបទចែកជាវគ្គ ជាកណ្ឌៗ
- អត្ថរសនៃរឿងផ្តោតលើកម្សត់រស មនុស្សរស អច្ឆរិយ-រស
- ឧត្តមគតិរឿង អប់រំមនុស្សឱ្យជឿបុណ្យបាប ឱ្យធ្វើអំពើល្អ ខំប្រឹងតស៊ូព្យាយាមដោយជឿជាក់លើខ្លួនឯង។

គ. បញ្ចប់រឿង

- ចុងបញ្ចប់នៃរឿងបង្ហាញពីការសជាតិរបស់តួអង្គ

ឧទា. រឿងព្រះវេស្សន្តរ រឿងតេមិយ រឿងសុវណ្ណសាម...។

- <u>សរុបសេចក្តី</u> : រឿងព្រេងកថាក្តី ទសជាតកក្តីសុទ្ធតែចោទនិងដោះស្រាយតាមបែបបញ្ហារបស់មនុស្សជាតិ និងដើម្បីមនុស្សក្នុងសង្គម។ រឿងទាំងពីរខុសគ្នាត្រង់ថា៖

- រឿងព្រេងកថាលើកពីសង្គមមនុស្សក្នុងលោកិយសច្ចៈ ដើម្បីជាប្រយោជន៍ក្នុងការណែនាំ រិះគន់ កម្សាន្ត តស៊ូ វណ្ណៈ កំហឹងឈឺចាប់ចំពោះសង្គម...ជារឿងកំប្លែងបម្រើប្រយោជន៍សង្គម។
- រឿងទសជាតកលើពីដំណើរជីវិតរបស់ព្រះពោធិសត្វក្នុងការព្យាយាមបំពេញបារមី ដើម្បីប្រាថ្នាការត្រាស់ដឹងជាព្រះសម្មាសម្ពុទ្ធ ជួយចម្លងសត្វលោកឲ្យផុតចាកអវិជ្ជា

ជារឿងបែបអរិយសច្ចៈ គឺថអប់រំ។

## គ. សេចក្តីបញ្ចប់

- វាយតម្លៃប្រធាន : ប្រធានមានតម្លៃល្អ បណ្តុះស្មារតីត្រិះរិះវិភាគពីលក្ខណៈរបស់រឿងនៅក្នុងប្រភេទផ្សេងគ្នា....ទាញយកគំនិតរួម...ឆ្ពោះទៅរកសេចក្តីសុខ។
- មតិផ្ទាល់ខ្លួន

# សូមអរគុណ!